៤៣៥. ផ្ទួយសោកពោះស្ដេចចប់ប្រាប់ ស្បែកម្រឹគខ្ញុំខ្ចប់
ពីផ្ទិចសំឡីម្អកស្ដេច ។

៤៣៦. យកផែនដីសិលាសំរេច ជាទីមនកែវស្រេច
ក្រលាទិព្វទេពបីរសុំ ។

៤៣៧. មានទាំងស្នេតតត្រអភិរម្យ ខ្នើយខ្ពស់ព្រៃព្រំ
វាំងននពិតាននូវកំរាល[1] ។

៤៣៨. មានទាំងឧដារសម្ភារ ច្រើនពណ៌ប្រការ
ត្រកាលអនេកនានា ។

៤៣៩. មានឃុំត្រីសាច់សាភា រុក្ខមូលបុប្ផា
អធិការនិណាជង ។

៤៤០. ពោះទាំងទេពតាស្តួតដង ពុំអាចដើកន្លង
ប្រស្ឋិតនូវនន្ទឧទ្យាន ។

៤៤១. ទាំងទឹកស្រះស្រង់ក្រឡុមក្សាន្ត ស្រះផ្កាដើលមាន
បទុមក្រមុទឧត្បល ។

៤៤២. ស្រួលពានអញ្ជើញស្ដេចដល់ ស្ដុតពានដ័បណ្ដាល
តំបន់អញខ្ញុំមួយផ្ទៃ ។

៤៤៣. ព្រះស្ដាប់សួរសព្ទសម័យ[2] កុខិនស្ដេចថៃព្រ
អញ្ជើញព្រះអង្គពនេចរ ។

៤៤៤. ដាវៃភាកុខ័នអញអរ ឃាស្មោះស្មានស[3]
គួរពោងអញឈប់ដោយឃា ។

៤៤៥. គឺសោះនាយើងយាត្រា ដោយចិត្តចិន្តា
នូវចប់ចំរើនឫទ្ធីពារ ។

៤៤៦. ចតុទសវស្សាវិងចរ ភូលប្ការព្រះនគរ
បុរីរត្នភាជអយុធ្យា ។

៤៤៧. បើបរិបូណ៌ហើយយាត្រា វិលមកយល់ឃា
ដ័ងាឃមាមិត្រពោង ។

៤៤៨. កុខ័នស្ដាប់ព្រះបន្ទូលដង ស្រេចហើយចង្គង
ទាំងបីព្រះអង្គលុះដល់ត្រើយ ។

៤៤៩. ព្រះអង្គចុះស្រង់ស្រេចហើយ ទាំងស្លុរស្លៀងស្បៀយ
វិះរូសក្រសាលយាត្រា ។

៤៥០. ព្រះដណ្ដឹងវៃភាកុខ័នឃា ជិងដើមមាគ៌ា
បង្ហាញនូវដើរដោយបទ ។

(1) MBN : nūv bitān brah krāl
(2) RIB : sramai
(3) RIB : sar

៤៤១. ឃើញនាងទៅជិតត្រកួនបណ្ឌិត  សោយសីលពារព្រត
ព្រហ្មា(1)រនៃគោចរ ។

៤៤២. កូនខឹងក្រួញក្រោបកាយករ  បង្គំព្រះភូធរ
ក៏ទូលដោយដានមាគ៌ា ។

៤៤៣. បពិត្រជម្លាយផ្លូវណា  ស្តេចនឹងយាត្រា
អំពីនេះទៅទុរគម ។

៤៤៤. សឹងមានមុនីតាជីអាស្រម  ស្រះស្រង់ងារធំ
អំពាល់នូវដល់គង្គា ។

៤៤៥. ខ្ញុំដឹងដែរដើមមាគ៌ា  ស្ទះសព្វព្រៃក្សា
សិលានូវជ្រុងជ្រោយជ្រែក ។

៤៤៦. ខ្ញុំដឹងដែរដើរសព្វល្វែក  ផ្លូវបត់ផ្លូវបែក
ដំរិកគិរីគោហា ។

៤៤៧. ពោញពោងដកឈ្មួងគង្គា  បឹងបួរបញ្ចា
ជន្លោះជ្រលងដងងារ ។

៤៤៨. ក្រាំងក្រាក់(2)ថ្មថ្នាក់ថ្មល់ថ្មារ  សឹងសិលាដា
រអាងរអិលជ្រោះភ្នំ ។

៤៤៩. សូមពានស្តេចកុំព្រួយព្រួ  ផ្លូវនោះងាយខ្ញុំ
នូវនាំព្រះអង្គយាត្រា ។

៤៥០. ខ្ញុំដឹងផ្លូវកាចផ្លូវជា  ផ្លូវមានម្រឹគា
សហ័សសាហាវយំឃ្លង ។

៤៥១. ខ្ញុំនូវតាមរួមរក្សាគ្រង  ថ្លាញមស់ម្រឹគដង
មកបៀតប្រមាថជ័យព្រះអង្គ ។

៤៥២. ខ្ញុំនូវយកខ្លួនខ្ញុំឲ្យឲ្យ  ធានាការគ្រង
អម្រឹគណាមកពាធា ។

៤៥៣. ពោះបើមានសត្វហឹង្សា  ខ្ញុំយកនូវអាត្មា
ចេញថ្លាញសត្វនោះបង់ ។

៤៥៤. ខ្ញុំពុំឲ្យជិតដល់ព្រះអង្គ  ពោះពាល់ពិសយង់
ទាំងក្អែបនូវខ្មួយសត្វកាច ។

៤៥៥. ទុយភោមរពោមនូវរបាច  ស្មុចសោតនូវមមាច
មមង់នូវមូសស្រួយដង ។

៤៥៦. ខ្ញុំពុំឲ្យជិតដល់មានពោង  ខ្ញុំនៅរក្សាគ្រង
ទាំងបីព្រះអង្គវរលក្ខណ៍ ។

(1) MBN : prahā
    RIB : brahā
(2) RIB : prāk'

៤៦៧. ពោះនូវខ្ញុំពោះនូវដើរពោះនូវជាក់ ពោះនូវធ្វើព្រះជីណាក់
ជំងឺណាឯជំណើរមាតា ។

៤៦៨. ខ្ញុំនាំពលពាលយោធា តាមតែងរក្សា
លុះដល់សំនៅស្តេចស្តោះ ។

៤៦៩. ស្តេចស្តាប់ក្ខនីទូលស្មោះ ពាក្យពិតពីរោះ
នូវគុណសប្បុរសមហិមា ។

៤៧០. ទើបស្តេចបន្ទូលត្រាស់ថា ឱយាកូខ័នធា
មហាមានគុណពិតប្រមាណ ។

៤៧១. សមបាជាញាតិពីបុរាណ អញអធិដ្ឋាន
បាឯងស្មើឯកឧទរ ។

៤៧២. នាំយើងចេញចាកព្រះនគរ ត្រេចចៃព្រៃពនដរ
មកជួបនឹងបានេះតិរ្យូវ ។

៤៧៣. សប្បុរសគុណបាពិតត្រូ ពិតអ្នកឯណានូវ
មកថ្មើមគុណបាដ៏កន្លង ។

៤៧៤. រីអង្គអញឯងជាផ្សង អណ្តាប់បាយោង
ព្រះលក្ខជាប្អូនពៅបា ។

៤៧៥. រីឯរត្នភាជសីតា នេះជាថ្លៃ[1]បា
មហាបុរាណវិរមិត្រ ។

៤៧៦. ទាំងប្អូនស្មើខ្លួនស្មើចិត្ត ស្មើឯកជីវិត
កុំគិតជាអង្គទីទៃគ្នា ។

៤៧៧. ពោះបីអញនូវមានទុក្ខា ឈឺជរដល់បា
បាកើតនិមិត្ត[2]ពុំសុខ ។

៤៧៨. ពោះបីបាឯងមានទុក្ខ អញពុំស្រណុក
ទំងួលក្តុងចិត្តចិន្តា ។

៤៧៩. គេជះថ្កាំបេ្តជ្ញាថា ពាក្យពិតសត្យា
សច្ចាអធិដ្ឋានជាប់ឯ ។

៤៨០. ពោះបីញាតិវង្សាបាឯង ស្មើញាតិអញហោង
ទូវអស់ទាំងសាច់សន្តាន ។

៤៨១. រីវង្សាអញសោតសឹងមាន អញអធិដ្ឋាន
ស្មើញាតិសន្តានបាយោង ។

៤៨២. ប្អូនអញទាំងពីរសោតគ្រង ភក្តីពិភពផងឯ
ទម្ងន់ថ្មៃក្រោមអយុធ្យា ។

៤៨៣. រីកូខ័នឯងសោតបា ជាភាជត្រីក្សា
រក្សាបរិវេណាព្រះថៃព្រៃ ។

(1) RIB : thlai
(2) RIB : nirmitr

៤៨៤- អស់ញាតិជាសោកសព្វថ្ងៃ ក្រៀមក្សាន្តហឫទ័យ
អាស្រ័យតាំងនាក់ជាហោង ។
៤៨៥- នេះតប្អូនជានួនជង់ទៅដង អញតើនរណាក្រង
អស់ញាតិភរិយាបុត្រជា ។
៤៨៦- ជាជង់ចេញចាកប្លាតប្លា ក្រែងសត្រូវពាធា
នួវបៀនមណ្ឌលជាក្រង ។
៤៨៧- បងសូមលាជាពៅហោង ពោះព្រឹតយប់ឃ្លង
ពន្លឹកនួវយក្សហោរហោ[1] ។
៤៨៨- បងនួវថ្លៃងថ្លាញអស់សត្រូវ ដោយតេជឫទ្ធិគុណ
នួវឫទ្ធិសរសក្តិថ្លា ។
៤៨៩- កុំខំនស្តាប់ព្រះករុណា ជលនេត្រជាភា
សស្រាក់សញ្ញាប់ស្មុបនៅ ។

(1) MBN : yaks cāṃ phlūv

# កណ្ឌ ទី៦

៤៩០- ឯថ្ងៃនោះស្ដេចលេណទៅ ចេញចាកលំនៅ
កណ្ដាលនៃរុក្ខជា ។

៤៩១- គាប់កាលតិម្ហគ្គមាសា សៃវស្សប្រយាត្រា
សប្រួមតក្ដតវិធី ។

៤៩២- ហៃវប្បតស្មួតប្រេះប្រូជតី ចែងជាំងរស្មី
ជំហាយហាហាវង់វេហា ។

៤៩៣- ផ្កាយផ្សេញស្រប្បប់ព្រៃព្រឹក្សា រោយរុះផ្លែផ្កា
រស្ពោះសន្លឹកប្រួញព្រម ។

៤៩៤- ស្លឹកខ្លះខ្លោចខ្លះបីក្រហម ស្ម្បូវស្មៅស្រែងក្រោម
វិនាសអូវភ្លើងព្រៃងាល ។

៤៩៥- គេជះព្រះបាទភូវនាថ[1] ពង្សពោធិសម្ភារ
កំនាំទេពីលេណា ។

៤៩៦- មើលបានព្រៃព្រឹក្សសាខា សងខាងមាគ៌ា
សឹងប្រែត្រជាក់ដ៏សប្បាយ ។

៤៩៧- លូតណាស់មាណាបីបន្លាយ[2] ជុះជាលព្រៀបកាយ
រូបានរបៀបអភិរម្យ ។

៤៩៨- ស្រោងស្រឹងឈររលឹងជន្តុំ ស្លឹកស្លោងបីត្រសុំ
ត្រសាយត្រសៀកវិតា ។

(1) RIB : bhāvanā
(2) RIB : mālā lec lāy

៤៩៩- បក់បុស្បក្លិនរសគន្ធា ឥតទុំសោះសា
ល្ហួយល្ហប់ត្រឡប់ខ្ជាយខ្ជូរ(1) ។

៥០០- ពោះពៃរមធុរាមធុករ ភ្ជុមរាភ្ជុមរ
ផ្ញើជីវិតត្រេចត្រង់ត្រីបត្រា ។

៥០១- សព្វស្លឹកក្រៀមសោភា ពុំល្មេងជីអង្គា
ស្រែងដោក(2)ព្រះព្រៃព្រាលនេត្រា ។

៥០២- ស្បូវស្រែងតាំងនៃងងអម្ពរ ដូចព្រះចន្ទ្រចរ
ត្រចះកំពេញបូណ៌មី ។

៥០៣- ពុំអាចនឹងក្តៅក្បូរត្រកំងបី យោគព្រះបារមី
សម្តេចនារាយណ៍លោលា ។

៥០៤- ស្តេចស្ទ្រេចនោយជិតមាគ៌ា ទៀយលំដើមឈ្ជា
មានផ្កាតែមួយប្រាស់ប្រាល(3) ។

៥០៥- មានមែកមែនរនោងវល្លិវារ ផ្ការីកជ៏ត្រកាល
តែមួយ(4)នៅលើផ្កាឈ្វា ។

៥០៦- ផ្កាស៊ុះជិតដើមជំពូ ជំពូសោតផ្កា
តែមួយក៏រីកបីតំរួត(5) ។

៥០៧- លើផ្កានរនោងជាក់ស្លូត ជិតផ្កាបីប្រកួត
ក៏ផ្សាយទៅនូវកេសរគន្ធ(6) ។

៥០៨- មានកន្លង់ពីរសោតសព្វគ្នា ថ្ពុះស្ពុលជាប់គន្ធ
ត្រីបត្រងសំអងបុស្ប ។

៥០៩- ក្សិណានោះព្រះបាទនរបតី បង្ហាញភាពទេវី
ជាវៃយាយេមើលអស្ចារ្យ ។

៥១០- ឱបមាបុប្ផាពិពណ៌ ផ្កានេះគឺផ្ការ(7)
ក៏នេះកំលុងភ្លើងប្រាល ។

៥១១- រីផ្កានរនោងនៅកណ្តាល ដូចសុពណ៌កាល
រលាយនូវមាសមានរស្មី(8) ។

(1) MBN : ap' is mārgā
l-ap' l-añ kesar
(2) MBN : trasāk'
(3) MBN : mān phkā tae muoy ṭa prākaṭ
-------------------------
mān maek sākhā ṭa camhut
slik slom parisuddh
prākaṭ nūv phkā crās' crāl
(4) MBN : tamruot
(5) MBN : trapak pupphā pī tamruot
(6) RIB : tamruot nūv kesar gandh
(7) RIB : chgār (pas.)
(8) MBN : ramlāy nūv mās haem līoeṅ

៤១២. រឺផ្កាចំប៉ាពិសី ប្រាណប្រួតលើភ្រី
ននោងភាយរីកបុប្ផា(1) ។
៤១៣. នោះគឺនពគុណសុវណ្ណ ម្ជុរចំរុះកែមគ្នា
រលាយច្រមុំរស្មី ។
៤១៤. រឺអង្គកន្លង់បក្សី គឺឡូងអប្រិយ
នៃលាមនិលពុំផ្ទើង ។
៤១៥. រឺត្របកផ្កាឈ្លាប្រាលធ្លើង នោះគឺអណ្តាតភ្លើង
កំដេះនៃស្ពានរនោះណា ។
៤១៦. អង្គអញឯងដូចផ្កាឈ្លា ជាត្មានរជានា
អាចអត់នូវកំដៅអគ្គី ។
៤១៧. ននោងនោះគឺសីតាទេពី ជំប៉ាជំពិសី
គឺអង្គព្រះលក្ស្មអនុជា ។
៤១៨. នាឈើឯទាំងបីអង្គា ឯកចិត្តចិន្តា
ដូចត្មានរនូវមាសនោះហោង ។
៤១៩. រឺកន្លង់នោះគឺឡូងជង ជាមនិលឈ្នាង
ដូចពាក្យនាងកៃកេសី ។
៤២០. ស្តេចចង់ប្រាថ្នាបុរី លោមភាជទេពី
ពន្លកដង្កើមហឫទ័យ ។
៤២១. យាយយាត្រាត្រេចត្រីក្បាត្រៃ តន្លេងតន្ត្រៃ
សុវណ្ណវនេគោចរ ។
៤២២. ដូចមហាមករតដ៏បវរ ខ្លាស់(2) រស្មីស្នួរ
ដ៏ឡើងទាំងនៃព្រៃព្រឹក្សា ។
៤២៣. ស្តេចយល់បុស្សបុស្សនាគនា រីកកេសរផ្កា
សុភោចសុគន្ធាចរ ។
៤២៤. កន្លង់ទាំងគូភ្មរ ត្រងត្រីបកេសរ
ជញ្ជៀបនជៀលតន្ត្រាយក ។
៤២៥. កន្លង់ញីនោះស្មៀតសឹក ស្រៀតស្រែកនៅត្របក
បុស្សនាគបុប្ផាភាយភរ ។
៤២៦. ស្អិតល្អឯជង់ជង់ខ្វាយខ្វរ រុំកែ្លកភ្មរ
កំផ្ទេចមមីឬប៉ោ ។
៤២៧. ពុំយល់ស្តូវផ្ទោះហើរទៅ ស្ទាត់ផ្សៀលទៀបនូវ(3)
ទ្រហឹងរផ្សើងវិលវល់ ។

(1) MBN : rī phkā campā ruṅ rīoeṅ
rasmī thaem līoeṅ
pruot loe anujapupphā
(2) MBN : kaem
(3) RIB : daṃ nau

៤២៨- វីកន្លង់ឈ្មោលមិញដីឯកល់ កន្លង់ញីពុំយល់
ទៅហានឹងហើរទៅស្ពាន ។

៤២៩- ភ្លៀលធ្លាក់រង្គាត់ដេកដាន សៀរទំទៀបប្រាសា
ចំហើងបង្អីសព្វព្រៀ ។

៤៣០- កន្លង់ញីឮហើយហើរដោយ ដល់ជិតតាមក្រោយ
ទៅលុះដូចជិត្តជិន្តា ។

៤៣១- ស្តេចបង្ហាញអាឃ៌អត្តជាយា មេមើលក្នុងភា
ក៏នាំនៃក្នុងរីហើរ ។

៤៣២- ដូចហ្លួនមិត្រមានជ័ប្រសើរ អាជនគ្រប់ឲ្យដើរ
ក៏តាមអញបងនេះណា ។

៤៣៣- រួមអង្គរួមឯកមាគ៌ា រួមស្ពាននិទ្រា
ពុំគិតលំបាកពនេចរ ។

៤៣៤. បើស្និតនៅនាព្រះនគរ ដូចកលកេសរ
ក៏រុំក្នុងរបក្សី ។

៤៣៥. ហើយនូវកើតអង្គឯងអប្រិយ មានមន្ទិលស្រី
ជំណិះជំលៀលលោកឯង ។

៤៣៦. មេអាចស្នេះនៀងតាមបង ដើរដោយនូវគន្លង
ការស្នេហាពេញពោជញាណ ។

៤៣៧. បងនូវនាំមេកន្លងលែងស្ពាន អធិដ្ឋានបប្រាន
បង្វើងបង្វិលភពចក្រ ។

៤៣៨. បងនូវនាំមេមានទៅជាក់ ដល់ស្ពានតិតជំពាក់
ដីមហានិរោធនិព្វាន ។

៤៣៩. ស្តេចលោមព្រះម្លូនកល្យាណ បណ្តើរទៅបាន
ដល់ស្ពានមណ្ឌលស្រះស្រី ។

៤៤០- មានបុស្បាបោក្ខរណី ក្រពុំពេជ្រតី
គង្គាប៉ប្រៀបទងទ្រឹង[1] ។

៤៤១- ស៊ីឯក្នុងផ្ទៃរាំព្រៃលែងចំហឹង ហៃលោលហិចទៅវិង
កង្រោកកក្រៀវព្រមគ្នា ។

៤៤២- ខ្លះឯកដើមបទុមា កាំងក្រពុំភ្កា
បណ្តាលបណ្តែតតាមក ។

៤៤៣- គាប់កាលខ្យល់បក់នូវលក ដើមឈ្មួកសាត់មក
ដីពាក់កាំងទងទេរនៅ ។

៤៤៤- មានមេមយូរីហើរទៅ ផ្សារសត្វជ័កឡៅ[2]
ក៏យល់បទុមទងស្រស់ ។

(1) RIB : gaṅgā trīep trịm daṅ trịṅ
(2) MBN : phsār satv sau ṭau

៥៤៥. ត្រូវខ្យល់យល់ឃាក់ដូចរស់ គិតស្មានជាពស់
ក៏ចឹកចាប់ពាំនាំទៅ ។

៥៤៦. ទើបទុកសំបុកដ៏លំនៅ បក្សីស្រុនខ្លៅ[1]
ពុំដឹងដើមទងល្បូកឡើយ ។

៥៤៧. មានកូនពីរពេញក្រាសហើយ កូនណោះយំស្ដើយ
មកមេតារភស្ដុភោក្តា ។

៥៤៨. ឯមេមយូរស្ដើយថា ឲយាកូនពុំងា
កុំយំអាហារម្ហូបញ្ញការ ។

៥៤៩. ថ្ងៃនេះម៉ែបានអាហារ ត្រកល់ត្រកាល
ចំណីចំណាប់នេះចម្លែក ។

៥៥០. ក្បែរណាមេមយូរជីកថែក ចំពុះពាំមែក
ឲនទងបទុមបីកយ ។

៥៥១. ពុំបានបរិភោគសប្បាយ កូនខឹងនឹងម្ដាយ
បង្កើតជាទោសមួយលា ។

៥៥២. ជាលើងទន្ទឹងអាហារ លុះល្ងាចគតការ
ពុំបានអាហារភោក្តា ។

៥៥៣. ស្ដេចស្ដាប់កូនក្មេងថា បង្កើតទោសា
ឲនមេមយូរបីកឃ្វល់ ។

៥៥៤. ស្ដេចបញ្ញាញទេពនិមិត្ត ឲយាមេមាសយល់
ឲនបក្សីមយូរបុត្រ ។

៥៥៥. មួយនោះដូចចៅភិរុត មួយទៀតក្រោកដ
ដូចចៅសុត្រតម្លូនមញ ។

៥៥៦. សមនឹងរកបាវឯងសំឡាញ់ បន្ទោសម្ដាយឯញ
គឺអង្គនាបរិកកេសី ។

(1) MBN : pakṣī sau ṭau

# កណ្ឌ ទី៧

៥៥៧. ព្រះលោមព្រះភជទេវី អភិរអគ្គមហេសី
បណ្តើរដោយដងព្រៃភ្នំ ។
៥៥៨. ទៅទៀបមណ្ឌលអាស្រម ស្ថានរត្នជ័ចង្ក្រម
នៃមហាឫសីស្មឹងស្មាធិ ។
៥៥៩. ព្រះនាមតិសីភារទ្វារ ក្តត់ក្បែនព្រះបាទ
ចំរើនចតុពេទសាស្ត្រ ។
៥៦០. ទ្រង់ដងខាមណ្ឌលអភិកាស ព្រះអង្គកាយពាតពាស[1]
នូវស្បែកអម្រឹតគីជ័ខ្មៅ ។
៥៦១. ស្ពាយរៀងសឹងសំបកឈើ សិទ្ធិសក្តិនូវអំពើ
អំពល់ពិធីកណ្ឌការ ។
៥៦២. អស់អញ្ចលំគេញដោយនូវធម្ម ចំរើនភៀសពណ៌ា[2]
ជាមហាឫសីស្ងាត់ស្ងៀង ។
៥៦៣. មានពុកចង្កាគីជ័វែង មើលមុខគួរស្ញែង
មហាឫសីសាស្ត្រសុទ្ធ ។
៥៦៤. ទាំងព្រះព្រហ្មសឹងជ័ចំចំហុត ពិធីពារព្រត
មហាមុនីនឹកធ្យាន ។
៥៦៥. ពោះនូវធ្វើសិល្បសាស្ត្រជាន បរិបូណ៌មែនមាន
តេជះតបះបុណ្យក្រៃ ។
៥៦៦. យល់ព្រះពោធិសត្វថ្លៃ ត្រើត្រួចមហាឫទ័យ
ក៏ត្រេកត្រអាលអាក្ពាត់ ។

(1) MBN : kān' smiṅ bāk' bās
(2) RIB : camroen bes barṇā

៤៦៧- ស្ទួចបុរសមួយមានតំកាត់ ទៀបហៀបនូវម្នាត់
ជីវិតនឹងល្មះមរណា ។

៤៦៨- យល់ព្រះស្ទួចយល់ពេញា យកទុំសងា
វិញទេពមកប្រស់ព្រោសប្រាណ(1) ។

៤៦៩- ថាពោះបាបអញមិនមាន គេជះអញបាន
ប្រសប់ពុទ្ធក្តីវិវត្ត ។

៤៧០- អស់បាបទាំងនោះសឹងក្ស័យ អង្គអញគតភ័យ
វេរានុវេរទីងស្មួង ។

៤៧១- ពោះបាបបុរាណចាំចង ច្រើនជាន់កន្លង
ពុំអាចនូវរេងដីវេរា ។

៤៧២- ស្រេចព្រះមុនីនាថចិន្តា ឲ្យដងត្រដាយា
ឈើច្រត់នូវកណ្ដោចរ ។

៤៧៣- ចេញចាកមណ្ឌលស្ថានប- រមសាលាសាទរ
ពោតប់នៅស្ថានជ័ចក្រុម ។

៤៧៤- ទើបព្រះនារាយរាជជ័ឧត្តម បេះបុស្សក្រពុំ
បទុមទាំងឧប្បលា ។

៤៧៥- ចរចូលបីជ័ទូលបុប្ផា ថ្វាត់ថ្វាយអភិវាទ
នៃមហាឫសីជ័មុនី ។

៤៧៦- ព្រះមុនីអរនិបចក្រី ត្រេកត្រែះមេត្រី
សំណេះសំណាលសួរថា ។

៤៧៧- នៃហាក្សត្រឲ្យឫទ្ធិចេស្តា ស្តេចមកពីឯណា
ក័នាំស្រីរត្នជ័ប្រសើរ ។

៤៧៨- អញនូវចប់ជីងដើមជំណើរ ស្តេចត្រេចនៃព្រៃដើរ
ត្រមោចព្រះទៀមអនុជា ។

៤៧៩- ហើយព្រះអង្គតំរពាក្យក្សត្រា សឹងពៃប្រព្រាណជា
មហាឫសីមុនីនាថ ។

៤៨០- ឲ្យសំបកឈើពាក់សង្វារ ស្លុំសក់ជដាធារ
ពោះហេតុប្រការកលស្តេច(2) ។

៤៨១- ទើបព្រះមុនីនាថសារពេជ្ញ ប្រាប់ប្រការកិច្ច
មហាឫសីអស់អាជី ។

៤៨២- ទើបមហាឫសីសញ្ញា ថាបាបបុរាណកាល(3)
វេរាធៀសចាកពុំបាន ។

(1) MBN : sahās mak pras' pros prāṇ
(2) RIB : paṅ' bibhab bhār
mak mān prakār kal mtec
(3) RIB : purāṇakār

៥៨៣. វិស័យសត្វកើតក្នុងស្ថាន ភពចក្រប្រែប្រាណា
ប្រព្រឹត្តទិវារាត្រី ។

៥៨៤. ក្បិលាភ្លឺសាយសព្វទិសទី ដោយតេជរស្មី
ពន្លឺនៃព្រះសុរិយា ។

៥៨៥. លុះព្រះសូរ្យសោតយាត្រា កំបាំងជ្រុងមហា-
សុមេរមណ្ឌលបរិស្រប់ ។

៥៨៦. ប្រែជាងងឹតឈឹងល្អប់ អន្ធការសោតសព្វ
ទិសានុទិសពុំយល់ ។

៥៨៧. នេះគួរនាដូចកម្មផល កុសលអកុសល
អំពល់អំពើពីរមុខ(1) ។

៥៨៨. បង្កើតការកបនូវសុខ ហើយបង្កើតទុក្ខ
ពុំដែលនូវវៀសចាកឡើយ ។

៥៨៩. លុះបាននិព្វានជាប់ស្ពើយ ឥតមានកំដឹងឡើយ
រដោះលែងជាតិជរា(2) ។

៥៩០. ពុំអន្ទោលទៅមកឡើយណា និរនេសទុក្ខា
មហាបរមសកល ។

៥៩១. និរាសប្រាសវែងកង្វល់ អង្គឥតអំពល់
គឺក្សេមសប្បាយត្រេកអរ(3) ។

៥៩២. ព្រះមហាឫសីសាទរ នាំព្រះភូធរ
ទេពីនូវព្រះអនុជា ។

៥៩៣. ចូលទៅក្នុងបរមសាលា ថ្វាយត្រីក្សរជលា
ទាំងពីរព្រះអង្គស្ងោយសាន្ត ។

៥៩៤. ស្តេចស្ទុំនៅសាលាស្ថាន សុខស្កល់ក្សេមក្សាន្ត
បង់អស់មួយរាត្រីកាល ។

៥៩៥. លុះព្រឹកស្រាងស្រេចភូបាល ស្តេចតើនបពិត្រអាល
ដំរះព្រះអង្គសោភា ។

៥៩៦. ស្តេចនាំទេពីអនុជា បង្គំព្រះមហា-
ឥសីនូវណាជីរជរ ។

៥៩៧. ព្រះមហាមុនីសិទ្ធិករ ជំទើនព្រះពរ
សម្តេចនារាយរាមា ។

៥៩៨. ព្រះឫសីឯស្តិងវិញជា នាអ្នកលេណា
មកនៅកំលុងព្រះព្រៃ ។

(1) RIB : bī mukh
(2) RIB : noḥ nai doep spoey
raṭoḥ laeṅ jāti jārā
(3) St. 590 et 591 : manquent dans RIB

២៩៩. ធ្វើក្រឹត្យក្រមតបៈគុណាក្រៃ ព្រតសិល្បសាស្ត្រនៃយ
ប្រាំពៃពិធីកុណ្ឌកម្ម(1) ។

៣០០. លុះអំលុងអំបាលខែឆ្នាំ ហើយស្ដេចក៏នឹងនាំ
ទេពីអនុជគូចរ ។

៣០១. វិលវិញត្រេចព្រៃពនេចរ ចូលស្ថានព្រះនគរ
ពិភពបុរីរាជស្ថាន ។

៣០២. ទើបស្ដេចទូលស្នងវិញស្ថាន ជាខ្ញុំទៅបាន
លុះប្អូនជិតស្លាប់ឆ្នាំណា ។

៣០៣. ស្រែងហើយវិលវិញយាត្រា ស្ថានស្រីអយុធ្យា
ពិភពបណ្ដាលស្ថានស្ថិត ។

៣០៤. សូមលាព្រះបាទជ័យពិត្រ មុនីសាស្ត្រសុចរិត
ស្ដេចចោនៃរាគិស្ថាន ។

៣០៥. ពីនេះទៅតើចម្ងាយម៉ាន បើងខ្ញុំក៏នូវបាន
ដល់ចិត្តគូជបពិត ។

៣០៦. ព្រះមុនីប្រាប់ដោយនូវកំណត់ ជាដប់យោជគត់
គណនាស្ដេចទៅពីអាយ ។

៣០៧. លុះកណ្ដាលនៃទ្វីវាលទីវងឆ្ងាយ ងារធំទូលាយ
លលីមលល្បោកសោតសល់ ។

៣០៨. មុរគមព្រៃក្រៃដើរដល់ ផ្លូវនោះជ័អំពល់-
នូវខ្សាច់ក្រួសក្រៀមក្ដៅក្ដាត់ ។

៣០៩. ប្រណាំទេពីស្រីរត្ន ពិឡូវអញសូមឃាត់
ស្ដេចគង់នៅស្ថាននេះណា ។

៣១០. ពោះនូវធ្វើព្រតត្រឹទ្ធសាស្ត្រ(2) អញឯងជានា
ពុំឲ្យព្រួយព្រះហឫទ័យ ។

៣១១. ស្ដេចស្ដាប់ព្រះមុនីជានៃម- ត្រីឃាត់ក្សត្រនៃថ្ម
ក៏ស្ដេចបន្ទូលវិញស្នង ។

៣១២. បពិត្រគ្រូខ្ញុំនៅហោង ពុំគួរនូវកន្លង
ព្រះឱស្ឋពិសេសអាជ្ញា(3) ។

៣១៣. ដោះខ្ញុំយល់ស្ថាននេះណា ទៀបនឹងអយុធ្យា
ជំណោរពួពតិមាន ។

៣១៤. ទៅដល់ដេវពណ៌ជ័សណ្ឋាន បងប្អូនខ្ញុំមាន
នូវមករកខ្ញុំឯងហោង ។

(1) RIB : prabai bidhī kāyakarm
(2) MBN : doḥ nūv dhvoe prathamasilpasāstrā
(3) MBN : braḥ osṭh braḥ aṅg ājñā
RIB : braḥ osṭh bises cintā

៦១៥. ស្រេចព្រះបន្ទូលសារសង ពុំឲ្យមានឃ្លាង
នឹងព្រះឥសីសីលា ។

៦១៦. ស្តេចថ្វាយនមស្ការអភិវាទ៍ ប្រទក្សិណាលា
មហាមុនីចរចេរ ។

៦១៧. ស្តេចត្រេចព្រៃល្មុះលេចដល់ឆ្នេរ គង្គាគម្ភីរ
ពន្លឹកជ័យមហានទី ។

៦១៨. ទ់ឈ្មោះស្ទឹងនោះនាមតី ព្រោងបោកកាលតី
នទីទូលាយជ្រាលជ្រៅ ។

៦១៩. ព្រះអង្គចុះស្រង់បន្ទោ មន្ទិលសោះក្តៅ
បន្ទូលនឹងព្រះអនុជា[1] ។

៦២០. ចាវៃយាវរលក្សស្នេហា អញបងបានជា
ជាប្អូនសព្វថ្ងៃស្មើចិត្ត[2] ។

៦២១. វៃយាលក្សស្ទឹងនេះធំក្តាត់ ជ្រោះម្ភៃក្រែងសត្វ
វារីគោចរពោធា ។

៦២២. អាស្ងួរសំគាបងប៉ា សមនិងកើតកយា
ដ្រាងឡើយនូវអាចឆ្លងបាន ។

៦២៣. ព្រះលក្សស្តាប់ព្រះបន្ទូលក្តាន ហេតុព្រះអង្គមាន
បាបូទ័យបំរុងដេស្នា ។

៦២៤. ពុំឲ្យព្រួយព្រះចិន្តា ស្រេចយកខ័នថ្លា
ទៅកាត់ក្រពៃលលើចង ។

៦២៥. ជាក្បូនមានក្រែមែនត្លិង បេះបុស្សក្រាលក្រង
ទាំងទងជាមាលាបីសលាប់ ។

៦២៦. ជាព្រះក្រាលទិព្វស្រេចស្រាប់ លើមែនទិព្វគាប់
នូវក្បូនបវរពិចិត្រ ។

៦២៧. ថ្វាត់ថ្វាយព្រះបាទជិបតិត្រ ពីរព្រះអង្គស្ថិត
ព្រះលក្សក៏បោលនាំឆ្លង ។

៦២៨. ទៅបានត្រើយត្រាណាដូចបំណង ក្បត្រក្បាត្តគតឃ្លាង
ទាំងបីព្រះអង្គយាត្រា ។

៦២៩. ត្រេចត្រង់ព្រៃព្រឹក្សបព្វតា លុះលេចអត្ថា
ស្តេចកាត់ឆ្លងវាលរៃងឆ្ងាយ ។

៦៣០. សឹងភ្លើងព្រៃឆេះព្រោងព្រាយ ច្រាលច្រាស់ផ្សែងផ្សាយ
ជំហាយព្រះសុរ្យរង្សី ។

(1) RIB : brah anujaratn
(2) St.620 : manque dans RIB

៦៣១. ស្ដេចស្ដាប់សូត្រសាស្ត្រស្មូតិ ដោយតេជពិធី
ព្រះពិស្វាមិត្រឧបទេស[1] ។

៦៣២. ទិញមន្តខ្ទីមគុណាដ៏វិសេស ស្ពាននោះនិរទេស
ចំបាយព្រះសុរិយយាត្រា ។

៦៣៣. ក្រដាក់ដូចចន្ទ្រឆាយា ល្អតណាស់ក្រៃក្បួន
បុប្ផាផលផងបរិបូរ ។

៦៣៤. ដូចនន្ទោទ្យានស្ថានសួគ៌ សួគ៌គឺដ៏គួរ
បន្ទូលសម្ដេចឥន្ទ្រ ។

៦៣៥. អស់ជ្រើសព្រៃស្មេងម្រឹគា ពោធសឹងប្រែជា
មេត្តាអាសូរសត្វផង ។

៦៣៦. រីអស់អម្រឹគយំឃ្លង សឹងជាសត្រូវផង
បំបាត់ជីវិតគ្នាវិញ ។

៦៣៧. សឹងប្រែចិត្តជាសំឡាញ់ ស្គាល់ស្នេហាស្និទ្ធវិញ
ដោយភាសាសត្វមេត្រី ។

៦៣៨. គជបុត្របៅមេរាជសីហ៍ គជរាជជាត្រី
បំបៅបុត្ររាជសីហ៍គ្នា ។

៦៣៩. ក្ងោកប្រើសប្រែបៅមេខ្លា មេប្រើសប្រែជា
បំបៅបុត្រខ្លាស្នេហាស្និទ្ធ ។

៦៤០. អស់ម្រឹគបក្សីសុចរិត ក្បួនមក្បាគ្គមូលមិត្រ
រក្សាសុបាលស្នេហាស្និទ ។

៦៤១. ពោះស្អែបខ្ទុយពាល់ពិសផង សព្វសត្វយំឃ្លង
គ្មានពិសដ៏ឃោរឥតប្រមាណ ។

៦៤២. ពោះទាំពោះកំស្ទួលប្រួលប្រាណ អ្នកណាបើមាន
ទៅត្រូវគ្មានពិសបីចំហុត ។

៦៤៣. ដូចអ្នកយកទិញដ៏ឱសថ មកត្រួសប្រាកដ
កំណាត់រូបរោគាពាធ ។

៦៤៤. សាគ្គសះសព្វសារពើញាច អង្គឯងស្មែងស្អាត
និមិត្តអប្រិយដ៏ពិសស្មែង ។

៦៤៥. ពោះបីបើមផលរុក្ខរៃង ពិសពុលស្ងប់ស្មែង
ក្រៃលែងសាសីរពិសផង ។

៦៤៦. សឹងប្រែមានរសរឹងពោរ មធុរសដ៏កន្លង
ក្រអូបក្រអែបក្លិនក្លាយ ។

៦៤៧. ស្ដេចលេណាមាគ៌ានោះចម្ងាយ សឹងសុរភីភាយ
ក្រឡប់ត្រលោមគន្ធា ។

(1) RIB : ṭoy tej bar bī
brah̤ bisvāmitr abhides

៣៤៨. តេជះព្រះបារមីតា ស្តេចស្តែងជាតិជា
តិរស្សកំពូលពង្សពាឡ្យ ។

៣៤៩. លះលោកចរចាកចេញបង់ ព្រះនគរព្រះអង្គ
ប្រយោជន៍ធំទើរសាស្ត្រ ។

៣៥០. កាលនោះព្រះឈ្មោះវេលា រសៀលសុរិយា
បៀបទៀបនូវអស្តង្គត ។

៣៥១. ស្តេចដល់ចិត្រកូដបព៌ត មហាគិរីដ៏ប្រាកដ
កំពូលកំពស់ជេយ្យា ។

៣៥២. អស់ទាំងពពួកទេវតា សោតសឹងនាំគ្នា
មកលេងលើខ្ពង់ព្រះភ្នំ ។

៣៥៣. មានដើមដូងស្លាដ៏ល្មំ បរិវេណធារធំ
ជង្គំនូវព្រឹក្សាករ ។

៣៥៤. អស់មហាឥសីពាន់នន្ទរ[1] យល់ព្រះភូធរ
នូវព្រះទេពីអនុជា ។

៣៥៥. ពានរចរចេញបរមសាលា ទទួលព្រះភមា
នូវព្រះអនុជទេពី ។

៣៥៦. ឥសីសិទ្ធិពរនរបតី នរបតិន្ទភោជី
សិទ្ធីព្រះពរដ៏តិរេកា[2] ។

៣៥៧. ទុក្ខីពរទុក្ខីវិរវិណ្ណការ ទុក្ខីជន្មសុរម្យា
ទុក្ខីភាមាសាភាភុល[3] ។

៣៥៨. ព្រះរៀមព្រះមហោសីស្គាល់ ព្រះអនុជនិម័ល
បីខ្វល់រណ្តាប់រចនា ។

៣៥៩. ព្រៀបប្រុងសង់បរមសាលា លើខ្ពង់បព្វតា
ដ៏ជាអាស្រមព្រះបតិត្រ ។

៣៦០. យកមយូរព្រៃយព្រាយដ៏វិចិត្រ ប្រុះប្រក់ប្រឡូតជិត
ជាស្បូវនូវពិតានដាស ។

៣៦១. ហើយរៃដៃដែងតំបារមាស បិតឃាំងពេញពាស
លើព្រៃយមយូរកែមការ[4] ។

៣៦២. ជញ្ជាំងជុំ[5]សឹងសុពណ្ណ ឆ្លុះឆ្លាដ៏ពព្រាល
តាមព្រាបពព្រាយបិសស្នោ ។

៣៦៣. ស្តេចនាំមហោសីស្ថិតនៅ គយគន់ទតទៅ
អាស្រមប្រសើរសោភា ។

(1) RIB : mahāmunī sīl sar
(2) RIB : nara:po ṭǎ tirekā
(3) RIB : ṭal'
(4) MBN : kaem kāl
(5) RIB : ciñcāc traṭāc

៣៣៤- ព្រះសរសើរថាហៃលក្ខណា ចេះអាងរចនា
សាណាត្រកាលជីវិស័យ ។

៣៣៥- ផ្ការឯខ្លួនបងថៃត្រ បាងមកនៅត្រៃ
អាស្រ័យធ្វើខ្ញុំក្នុងជាហោង ។

៣៣៦. ព្រះអនុជនិងនាងសិររៀបរង ក្រាបក្រោមបាទបង
បង្គំប្រណម្យទូលថា ។

៣៣៧- បពិត្រសូមព្រះករុណា កុំមានព្រះចិន្តា
ប្រណីខ្លួននូវព្រួយ ។

៣៣៨- ខ្ញុំជាបុរសកម្មករ(1) មួយ ធ្វើម្ល៉េះពុំព្រួយ
ពុំគ្រាន់ជំណាងភក្តី ។

៣៣៩- ដូចកាលនាងកៃកេសី ឯស្តើមកាក្សតី
ព្រះអង្គក៏ឲ្យព្រះភិរុត ។

៣៤០- ខ្ញុំប៉ងថ្លែងសរធ្វើគត់ យកភាក្សាក្សាយបទ
ព្រះអង្គពិសេសឃាត់ឯង ។

៣៤១- ហេតុព្រះទ័យទិព្វក្រាបស្លៀង ប្រុះប្រាជ្ញាក្រែង
ទេភានុទេវរឹងស្មូង ។

៣៤២- ពីថ្ងៃនេះទៅនោតហោង ខ្ញុំនូវយករូបរាង
ព្រះជង្ឃព្រះបាទជើង្ហា ។

៣៤៣- ទោះមានសត្រូវពាលា ងារខ្ញុំឆាឆា
នូវឯខ្លួនព្រះបពិត្រ ។

៣៤៤- ស្តេចស្តាប់ព្រះអនុជស្នេហាស្និទ្ធ ឈ្មោះសម្មចរិត
សំលូតសំប្បាញ់ភក្តី ។

៣៤៥- ក្សត្រាមហាមហេសី ពីរព្រះអង្គបី
នូវព្រះអនុជឬលមិត្រ ។

៣៤៦- ស្តេចដំទើនពារពោធសាស្ត្រសិទ្ធ តបះការក្រមត្រិស្ស
ប្រព្រឹត្តលើ(2) ខ្ពុងបពិត ។

(1) RIB : kammakār
(2) RIB : loes

# កណ្ឌ ទី៨

៦៧៧. កាលព្រះបាទស្រីទសរថ ស្មោយទិវង្គត
រលត់ព្រះជន្មអនិច្ចា ។
៦៧៨. ព្រះមុនីវរសិទ្ធិ(1) មហា- ឫសីចេះវេទា
នូវលើកព្រះសពសំស្ការ ។
៦៧៩. ទេពីព្រះក្រុមបរិពារ អស់ស្រីស្រីង្គារ
សឹងសោកស្រណោះក្សត្រខ្លួ(2) ។
៦៨០. ទាំងមុខមន្ត្រីដទៃ សឹងសោកអាល័យ
បង្កើតនូវទុក្ខសល់ខ្វាត(3) ។
៦៨១. ស្រេចរិះរកពូជពង្សក្សត្រ ត្រងរាជសម្បត្តិ
សំបូណ៌ប្រវេណីនាថ ។
៦៨២. វរសិទ្ធិមុនីតែងរាជសារ មករាជបុត្រា(4)
គឺព្រះភិរុតរាជហោង ។
៦៨៣. នឹងឲ្យសេពសោយរាជ្យរង ទម្ងន់ខ្ពង់ក្រោមត្រង
ប្រជារាស្ត្ររដ្ឋជ័យបុរី ។
៦៨៤. ក្សិណនោះនាងកៃកេសី ក្រាបព្រះមុនី
កុហាកនូវកលជ័យមាយា ។
៦៨៥. លបលួចផ្ដាំដោយសារថា រាជសារនៃមហា-
ឫសីសុមេធវរសិទ្ធិ ។

(1) RIB : visiṭṭh (pas.)
(2) RIB : siṅ soy sokaṇal' ktāt'
(3) St. 680 : manque dans RIB
(4) RIB : rājaputr pāl

៣៨៦. ទីនូវនាងកៃកេសី ឲ្យសារសរវិន័យ
មេត្រីមក ព្រះរាជបុត្រ ។

៣៨៧. ត្រាស់ឲ្យអញ្ជើញ ព្រះភិរុត នូវព្រះសុត្រុត
នូវធ្វើមង្គលអភិសេក ។

៣៨៨. នូវប្រដាប់ប្រជុំភិសេក ព្រះរាមជាឯក
ឲ្យគ្រងពិភព អយុធ្យា ។

៣៨៩. ស្នងព្រះទសរថរាជា ព្រះវរបិតា
ដំកល់ព្រះរាជរាមហើយ ។

៣៩០. កុំព្រះភិរុតយូរឡើយ សព្វសារដល់ហើយ
នូវព្រះសុត្រុតយាត្រា ។

៣៩១. ទៅស្ថានបុរីរាជអយុធ្យា អភិសេកព្រះជេដ្ឋា
ភាតាធិរាជគ្រប់គ្រង ។

៣៩២. ដងនោះអស់រាជទូតផង នាំរាជសារស្នង
ព្រះឱស្ឋព្រះអង្គបីសម័យ[1] ។

៣៩៣. យាងយាត្រាត្រេចត្រឹកក្នុងព្រៃ ទៅតាំងយប់ថ្ងៃ
ប្រាំពីរទិវាតនេះហោង ។

៣៩៤. ស្រេចបានដល់ស្ថានព្រះនគរ សម្ដេចព្រះវរ-
បិតានៃកៃកេសី ។

៣៩៥. ថ្វាយសារសុចរិតមេត្រី ព្រះភិរុតនរបតី
នូវព្រះសុត្រុតក្សត្រក្សាន្ត ។

៣៩៦. ថាបវ[2] នាងកោកល្យាណា នាងកៃកេសីសាន្ត
ក៏ស្ទួយព្រះពរពិធី ។

៣៩៧. ឲ្យព្រះរាមទេពធិបតី[3] គ្រងរាជបុរី
បុរាណស្រីអយុធ្យា ។

៣៩៨. ព្រះវរបិតាមាតា គីអង្គក្សត្រា[4]
ស្ដេចត្រាស់ប្រើយើងខ្ញុំមក ។

៣៩៩. នានាំព្រះបណ្ដាំរួសរក អញ្ជើញព្រះពន្លក
តាំងពីរ[5] ព្រះអង្គលោលា ។

៤០០. ឲ្យទាន់ការប្រជុំ- ភិសេកព្រះជេដ្ឋា-
ធិរាជនារាយរាមទេព ។

៤០១. វរសិទ្ធិព្រះមុនីសារសេព[6] ស្ដេចជាខ្ចីងខ្លប

(1) RIB : braḥ osṭh braḥ aṅg bhisamăy
(2) RIB : tha bīr
(3) RIB : oy rāmadeb debī
(4) RIB : pī aṅg ksatrā
(5) MBN : dāmṅ pī
(6) RIB : siddhī braḥ munī sā seb

ត្រកូលអំបូរពង្សក្សត្រ ។

៣០២. ក្សិណានោះព្រះភិរុតអរក្ដាត់ ខ្ទមព្រះសុពណ៌ញាណ
ដំកល់មណ្ឌលសិរសា ។

៣០៣. បែរស្នោះស្ពោះព្រះភក្ត្រា ត្រង់នគរអយុធ្យា
លុតលើកព្រះករបីបង្គំ ។

៣០៤. ទាំងព្រះសុត្រុតត្រេកមនោរម្យ[1] សំពះថ្វាយបង្គំ
ចំពោះស្រុកស្រីអយុធ្យា ។

៣០៥. ក្រាមប្រើអស់អង្គសេនា មុខមន្ត្រីត្រា
យោធាអមាត្យមូលមក ។

៣០៦. ម្ហូងៗទ្រស្គរភេរីរក ភ្លឺពាលព្រឹកយក
គ្រឿងគ្រប់ប្រដាប់អង្គា ។

៣០៧. ព្រាហ្មណ៍ព្រឹទ្ធបុរោហិតហោរា ឫក្សពារដ៏ពេលា[2]
ជាតិជាដំណើរមង្គល ។

៣០៨. យោគយាត្រាត្រៃជកបកល ត្រៀបរៀបវិហាតល
ប្រកិតអាវុធភ្លេងស្គាំ ។

៣០៩. ខ្មាន់ធ្នូ ករកាន់ធ្នូកាំ ខ្មាន់ស្នាប៉ីធំណាំ[3]
រសៀបរលេនប្រួញព្រឹស ។

៣១០. វែលវ័នទូនទណ្ឌាប៉ីប្រទៀស ស្រុះស្រើបស្រៀវស្រើស
សន្ធឹកឃោរាដុយដង ។

៣១១. ខ្មាន់គជជិះ[4] គជរៀបរប់ ខ្មាន់អស្សពាហាទ្វង
ប្រដាប់នៃពាជីជុំ ។

៣១២. សព្វសេះសៀងសូរវៃរវីសម ភ្លឺដំភ្លស់អភិរម្យ
រំភាយរំភើយពាសពាត ។

៣១៣. បៃបង់វៃសនគ្នាន់ភាយភាត់ ភាជរជិចិមខាត់
ពិជិត្រនូវរត្នសុវណ្ណា ។

៣១៤. ទង់ជ័យគ្រប់ឯភាជរថា ទិព្វទង់ជ័យជា
ជរីឆ្លូបញ្ចណាស្រួចស្រាប់ ។

៣១៥. ស្រេចព្រះអាជ្ញាបីប្រញាប់ ស្ទាប់ប្រើប្រដាប់
សំភប់អស់ភាជបរិពារ ។

៣១៦. ព្រះភិរុតភាជរិះវេលាកាល ព្រះសុត្រុតជ័ត្រអាល[5]
ទូលថ្វាយបង្គំក្រាបលា ។

(1) RIB : trek ar ţă bhiramy
(2) RIB : ṛksabār ţă belā
(3) RIB : khmān' dhanū2 dhniṃ kār kāṃ
khmān' snā2 nāṃ
(4) RIB : bandh
(5) RIB : trakāl

៧១៧. ព្រះអយ្យកោធិរាជា នូវព្រះអយ្យិកា
ក្សត្រក្សត្រីទាំងពីរព្រះអង្គ ។
៧១៨. ស្រែចឡើងគង់ជើងបញ្ចាំ ទឹកអស្សុធារាពង្រំ
សិន្ទូពប្រទេសទិព្វយាន ។
៧១៩. ពីរព្រះអង្គអរក្សេមក្សាន្ត ស្រួលស្រើបស្មោះស្មាន
ជាញានយល់ទៀមភាមា ។
៧២០. លេងល្បែងពលស្រើសគ្រប់គ្នា សាន្តសេពនូវសុរា(1)
ទៀងដោយមាតានូវជម្ងាយ ។
៧២១. តូរ្យតន្ត្រីយពៃត្រសង្ខសាយ សេពសមសួរស្ងាយ
រំពងព្រះព្រៃត្រ អឹងអាប់(2) ។
៧២២. ភ្លេងភ្លួយស្រើសព្រមសំរាប់ ស្រែកស្រូមះតប់(3)
ជាប៉ិនូវប៉ីអងង ។
៧២៣. តារខៃខ្លួរជៀវដេញលេង អង្គុជគ្រប់ខ្លេង
ជ័ល្បេងនូវលក្ខណ៍ស្គរគង ។
៧២៤. ស្រាស្មាត់ពួចពានទូវពិន្ទុង(4) ស្រាជ្រាលជប់ជង
ជប់រងអារ៉ង់ទៀបទៀង ។
៧២៥. ស្រាឯកចែកអ្នកលេងល្បែង(5) ពលស្រើសព្រមគ្រៀង
ល្បែង(6)ល្បែងសាទរ ។
៧២៦. លុះថ្ងៃត្រាំពីរមានេជរ ទៀបទៅព្រះនគរ
បុរីអយុធ្យាយល់ ។
៧២៧. ស្ងប់ស្ងាត់ស្ងួនសោះសាសល់ នរអ្នកទុក្ខទល់
អិតពល់អិពើសោកសាយ ។
៧២៨. ព្រោះស្រាសនិរាសព្រះនារាយ រាមទេពទៅឆ្ងាយ
ពុំយល់ព្រះអង្គជ័ន្តម ។
៧២៩. អស់ប្រុសស្រីស្រុកតូចធំ នរគាមជ័និគម
ចំណោតជនបទឈ្មួញឆ្ងាយ(7) ។
៧៣០. ខ្មើរខ្មើទិសទីទេសនាយ ទល់ទុក្ខសោកសាយ
សឹងសោកសង្វេចជេស្មា ។
៧៣១. វង្វិលទាំងព្រះចន្ទ្រសុរិយា ងងុរតិក្សា
ស្រែទំពាំងមេឃជ័មណ្ឌល ។

(1) RIB : staeṅ stec līlā
(2) MBN : rambaṅ braḥ brai īṅ āy
basadhār sdoer niṅ kralāp'
(3) RIB : daḥ dāp'
(4) RIB : srā chmāt' buoc boeṅ biṇ daṅ
(5) RIB : caek as' anak spīeṅ
(6) RIB : lpaṅ
(7) RIB : nagar gām nigam
caṃṇat janapad juoñ chṅāy

៧៣២. ខែរដើមឆ្នាំហើយពុំយល់ អ្នកស្រែខ្វាយខ្វល់
នង្គ័លរនាស់រាស់ឆ្វៀរ ។

៧៣៣. ក្រៀមក្រំាងភាំងរាំងបឹងបួរ ស្ងួតស្រែមានម្ហូរ
សឹងស្ងួតសឹងស្វិតស្លឹកស្លោម ។

៧៣៤. ពោះទាំងព្រៃព្រឹក្សព្រោម ខ្លះខ្លោចជ័ស្លោម[1]
ក្រយាមសន្ធឹករុះរោយ ។

៧៣៥. បុប្ផាឯណាឯងដោយ ដើមដាលបីរពោយ[2]
របេះស្រពាប់ទុំខ្ចី ។

៧៣៦. ពេញស្ពានឧទ្យានស្រះស្រី ឥតបុរសនារី
នូវរិះរកទើសភោក្តា ។

៧៣៧. អន្តរធានទាំងភ្ញីផ្កា រោយរុះក្រៀបក្រា
ឥតអ្នកនូវក្រងជួតជៀត[3] ។

៧៣៨. ខែរឯផ្លាស់លាយលាបនូវរបៀត លាយពោះបង់សៀត
ពុំធ្វើប្រដាប់ខ្លួនម្ល៉ើយ[4] ។

៧៣៩. រឹងឯស្លាងអង្គទ្រង់ជាត្រើយ មិញមិនយល់ម្ល៉ើយ
ពុំទ្រង់នូវផ្ទឹមអម្ពរ[5] ។

៧៤០. ពីប្រាសនិរាសព្រះភូធរ អស់អង្គអ្នកនគរ
សឹងសោកសង្រេងទល់ទុក្ខ ។

៧៤១. ឥតឯល្អល្ហើយសាន្តសុខ សឹងស្ងប់ស្ងួតមុខ
ប្រម្ល៉ូលប្រឡាក់ទឹកភ្នែក ។

៧៤២. ជាត់ទាំងជាំទៀងភាំរែក ឈើងសើចស្រួលស្រែក
ក៏ស្ងាត់ពាក្យពុំឮម្ល៉ើយ ។

៧៤៣. ព្រោះប្រាសព្រះមាសត្រាណត្រើយ សោកសោះឥតល្ហើយ
ឥតល្អនូវទុក្ខវេទនា ។

៧៤៤. សំពត់ស្បៃអាវអាត្មា ពុំផ្លាស់ម្ល៉ើយណា
មន្ទិលមិនទើងបោកបង់ ។

៧៤៥. ស្លុតស្លេតរេវទេទ្រាទ្រង់ ស្លុតសោតសឹងបង់
ពុំបានបូជាព្រះនគរ ។

៧៤៦. អ្នកជិះសារសេះបើកបរ លះលែងចេញចរ
ត្រឡប់វិលវល់ជាជាយ ។

៧៤៧. អ្នកប្រត់[6]ភាជរជៀបរាយ បំបោលបរឆ្ងាយ
បង្ហាក់បង្អួល់គោត្រា ។

(1) RIB : khlaḥ khloc smuk smom
(2) RIB : pī poy
(3) MBN et RIB : cuot cīet
(4) RIB : buṃ pratāp' dhniṃ aṃbar(ṇ)
(5) St.739 : manque dans RIB
(6) RIB : anak par

៣៤៨. សឹងផាត់ស្លាត់ទាំងអាគា នរអ្នកយាត្រា
ទទាំងទទៀលទៅមក ។
៣៤៩. គ្រប់គ្រឹះស្ថានស្ថិតវែងវែក គន្លាផុមមក
ឱតដោយមណ្ឌលមុជអាប់ ។
៣៥០. រូបរាំវិជ្ជុងផ្ទុំផ្សាយផ្សព្វ សឹងស្ទូឡូបីរងាប់
រភ្លោះរភ្លើគ្រឹះស្ថាន ។
៣៥១. អ្នកធ្វើស្រែស្រូវដោយដាន ទំទៀបទឹកមាន
ស្រះស្រង់អន្លង់ដលសា ។
៣៥២. ឥតអ្នកផ្លូយមកជីកដា ប្រហ្មោះប្រឡាយគង្គា
បង្ហូរបង្ហូតទឹកទៅ ។
៣៥៣. ជិតដើមវៃស្រែស្រុកជ្រាលជ្រៅ ក្រាំងក្រៀមក្តាត់ក្តៅ
ភ្លៀងភ្លិតលៀនលេចស្លុកស្លឹង ។
៣៥៤. ឥតនរវៃនរំវៃពរំពឹង ផាធបើកបូរបឹង
បង្ហូតបង្ហូរដោកដាំ ។
៣៥៥. ក្របីគោឈូលដាន់ជំណាំ ផាក់[1] បង់តុំចាំ
របងរបើកខ្ទាស់ខ្ទាយ ។
៣៥៦. មើលសព្វស្បើទាំងឡាយ វិរងធ្វើទ្រង់ទ្រាយ
សំអាតសំអាងគ្រឹះស្ថាន ។
៣៥៧. ដៃវែងគ្រាក់ប្រុះបុះបាន ភាយរត្នមាសមាន
សន្ទឹកបង្ហូរធម៌ដើយដាយ ។
៣៥៨. សំពត់សំពាយព្រែព្រាយ ខោខៀនលេចលាយ
ណាណាតម្កល់មាលជីវ្យ ។
៣៥៩. ស្រស់ស៊ីជំពូ[2] ទេសរុំ កាសាសូត្រសម
នូវយមលាពាក់ពាត់[3] ។
៣៦០. ពីប្រាសនិរាសមហាក្សត្រ ស្មោះស្មូរស្ងប់ស្ងាត់
នាក្បូងកំលុងព្រះនគរ ។
៣៦១. ព្រះភិរុតព្រះសុត្រុតធិរធរ ឈ្មោះទីឧត្តរ
ក៏ចូលដោយហួរបន្ទាយ ។
៣៦២. យល់ផាត់ឆត្រទង់ព្រាត់ព្រាយ ចង្ក្រង់ភត់ភាយ[4]
រំយោលរយានគ្រាសា ។
៣៦៣. ស្លាត់ផុខមង្គ្រីអមាត្យ គង់គាល់ព្រះបាទ-
សិរីទេសរាជភាដា ។

(1) RIB : cāk
(2) MBN et RIB : srī jambū
(3) MBN et RIB : nūv yamanā bāk' bāt'
(4) RIB : rat(n) rāy

៣៦៤. ស្ដាប់ព្រាហ្មណ៍ត្រឹវស្មុំសូមយា– ចកទូលប្រាថ្នា
រែងបានព្រះរាជទានទៅ[1] ។

៣៦៥. សេនាយោធាក្នុងក្រៅ ពលទេវីរងនៅ
សំរាប់ព្រះមហាក្សត្រា ។

៣៦៦. ស៊ីងស្ងាត់ស្ងួតស្ងប់ភក្ត្រា ទុរភិក្ខភារា
ពាន់ពីរប្រការពេកក្រៃ ។

៣៦៧. មួយបទប្រោសព្រះជេស្សជ័យ សោយព្រះទិណាល័យ
មួយប្រោសព្រះរាមរាជបុត្រ ។

៣៦៨. ទាំងរាជសីតាទ្រង់ព្រត ព្រះលក្ខលំអុត
ភក្តីព្រះរៀមរាមា ។

៣៦៩. ទាំងបីព្រះអង្គយាត្រា ចេញចាកអយុធ្យា
កំផែងទាំងរាជបុរី[2] ។

៣៧០. ព្រះភិរុតវិះថាហេតុអ្វី យល់អម្ដីក្ដី
កុំដូចរៀងមកពីបុរាណ ។

៣៧១. នេះសមបុរីរាជស្ថាន ឱទ្ធក្រោមក្រែងមាន
កោលាហលហើយពុំវែង ។

៣៧២. ព្រះសុត្រុតបង្គំទូលថ្លែង សមមនុះកើតទុក្ខស្តែង
ដីជាទម្ងន់ពុំស្រាល[3] ។

៣៧៣. ដោយខ្ញុំយល់ហេតុទួរប្រការ ថ្លែកថ្នែកបីវង្គាល
មហាទុរយសយើងហោង ។

៣៧៤. បទព្រះរាមទេពកុំក្រែង ប្រទេសីរាជវង
ទម្ងន់ពិភពដ៏បុរី ។

៣៧៥. ស្ដេចខ្លាស់ព្រោះព្រះជននី អ្នកសូមពរពី[4]
សម្ដេចព្រះវរបិតា ។

៣៧៦. ជាឲ្យអង្គអញឯងជា ក្សត្រសោយរាជណា
ពិភពអយុធ្យាក្រុង ។

៣៧៧. យល់ពុំករុណាអ្នកហោង អ្នកសោកជាខ្លាំង
វិលវង្វេចព្រះជេស្ឋា ។

៣៧៨. នេះគិប្បវិសមព្រះរាមា ស្ដេចត្រេចយាត្រា
ចេញចាកពីព្រះនគរហើយ ។

៣៧៩. វីព្រះជនកសោកតតស្បើយ ទល់ទុក្ខតតស្បើយ
សោកស្ដាយសព្វរាត្រីវេលា ។

(1) RIB : raeṅ pān pradhān pradān dīeṅ dau
(2) RIB : kamphaeṅ dāṃṅ rājapūrī
(3) RIB : thā nǎy neḥ eṅ
sam koet dukkh dhṅan' buṃ srāl
(4) RIB : dūl sūm rājy bī

៣៨០. ដោយហេតុយប់យោបល់យល់ នូវកើតអំពល់
ទម្ងន់ដល់យើងពេកក្រៃ ។

៣៨១. ព្រះសុត្រតរិះអន្សាស្រ័យ ពេញព្រះឫទ័យ
សម្តេចព្រះភិរុតជេស្ឋា ។

៣៨២. ស្រេចថ្លៃអស់ពលយោធា គជរថអស្សពាហា
នូវពលសុវណ្ណសីវិកា(1) ។

៣៨៣. ដាក់ក្នុងខែត្រខណ្ឌបន្ទាយ ស្តេចទូលប៉ងថ្វាយ
បង្គំព្រះវរបិតា ។

៣៨៤. ស្តេចស្មានជាគាប់ជន្មា គួរគប់នៅនា
ប្រាសាទប្រសើរដ៏ភិរម្យ ។

៣៨៥. នូវនាងកោកល្យាដ៏ឧត្តម ទេពីព្រះក្រុម(2)
ព្រះស្នំស្លាលស្និទ្ធប្រក្រតី ។

៣៨៦. ស្តេចដល់មណ្ឌលទិព្វទី ទៀបប្រាសាទស្រី
សម្តេចវរកោកល្យា ។

៣៨៧. យល់ស្ងាត់ស្អួតតិតអង្គអា- មាត្យមុខសេនា
ពុំឮសញ្ញាតូរ្យតន្ត្រើយ ។

៣៨៨. ក្បួណនោះនាងកៃកេសី មើលយល់ព្រះភិ-
រុតនូវព្រះសុត្រតរាជបុត្រ ។

៣៨៩. នាងប្រើណាទៃដទៃតីរត់ មកថ្លែងតាំងបាត់
អញ្ជើញព្រះអង្គលេណា ។

៣៩០. ទៅថ្វាយបង្គំព្រះមាតា សញ្ញាថ្ងៃនេះណា
ទន្ទឹងព្រះអង្គពេកក្លាត់ ។

៣៩១. ព្រះភិរុតនូវព្រះសុត្រតក្សត្រ ឡើងប្រាសាទរត្ន
លំនៅនាងកៃកេសី ។

៣៩២. អរទិបរាជបុត្រភ្ញាប្រិយ សាកសួរ(3)អំពី
ព្រះជនកនូវព្រះមាតា ។

៣៩៣. ថាព្រះអង្គតាំងទ្វេបា(4) ព្រះអយ្យកោបា
គិប្បូវញាំងនៅស្ទេរស្និត ។

៣៩៤. ព្រះអយ្យិកាបាបពិត្រ ពីរព្រះអង្គស្និត
សន្តោសនិរភោគក្សេមក្សាន្ត ។

៣៩៥. អស់ទៅពណ៌ពាប្បុសន្តាន វិញ្ញាសោតមាន
គិប្បូវញាំងសុខសប្បាយ ។

(1) MBN : nūv basabarṇā bīkāy
RIB : nūv bal suvaṇṇasīvikāy
(2) RIB : braḥ kram
(3) RIB : sār suor
(4) RIB : thā braḥ pād kaikesī jā

៣៩៦. ព្រះភិរុតព្រះសុត្រុតទិនថ្វាយ បង្គំទូលប្រាប់ប្រាយ
អស់អាជីអំពើសាន្តសុខ ។

៣៩៧. ឯព្រះភិរុតព្រះសុត្រុត ថ្លែងអស់សុខទុក្ខ
ទើបទូលដណ្ដឹងនឹងថា ។

៣៩៨. បពិត្រព្រះវរបិតា ស្ដេចគង់ស្ថានណា
ពុំយល់ព្រះបាទនរបតី ។

៣៩៩. ឯនាងនោះនាងកៃកេសី សាសងមេត្រី
ប្រាប់បុត្រទាំងពីរសាកសួរ[1] ។

៤០០. ថ្លែងទាំងទុក្ខអាក់អួល ពិលាបខ្សឹកខ្សួល
បន្ទូលសំណោះប្រាប់ថា ។

៤០១. ឱយាបុត្របណ្ដូលថ្លើមថ្លា ទីព្រះជនកា
សិរីទិព្វទេពទេសរជ ។

៤០២. ស្ដេចសោយសួគ៌ទិព្វគត ទៅណាកាលកត់[2]
ទិនទៀបកន្លះខែហើយ ។

៤០៣. ម្ដាយសោកសង្រេងគិតស្បើយ ប្រាសព្រះត្រាណត្រើយ
ពន្លឺពន្លកថ្លើមថ្លៃ ។

៤០៤. ព្រះភិរុតឮព្រះជនកក្ស័យ ញ័រអស់ហឫទ័យ
រន្ធត់ទំប្រប់ប្រេះប្រាណ ។

៤០៥. ដួលដេកសន្លប់លើស្ថាន ប្រាសាទពិមាន
នាងកៃកេសីមាតា ។

៤០៦. ទាំងព្រះសុត្រុតអនុជា សន្លប់ថ្នាស់មរណា
ព្រមព្រះទ្រៀមរងទុក្ខទល់ ។

៤០៧. នាងកៃកេសីយំយល់ រាជបុត្រសោតសល់
ស្ទើរដល់ជីវិតមរណា ។

៤០៨. នាងភិតភ័យភាំងតក្កមា ញ័រអស់អង្គា
សន្លប់លើព្រះរាជបុត្រ ។

៤០៩. ព្រះហឫទ័យញ័របីរន្ធត់ ថ្នាស់នឹងស្មុគគត
ទាំងបុត្រទាំងព្រះរាជមាតា ។

៤១០. បរិពារយល់យកគង្គា សោតសឹងអប់ផ្កា[3]
លុបលាបស្រលាបព្រះអង្គ ។

៤១១. មានស្មារតីដោះឡើងគង់ គរគក់ទ្រូងទ្រង់
កន្សែងសែនសោកដំពិលាប ។

៤១២. ទឹកព្រះនេត្រាជ្រួតជ្រាប ឃ្លោរឃ្លាសជិតខាប
សរៈទុក្ខប្រេះប្រាណ ។

(1) RIB : sār suor
(2) RIB : kāl gat'
(3) MBN : cuoṅ cand krasnā

៤១៣. ឮញាតិក្សត្រទាំងទ្វីប　　ស្តេចឡើយព្រះអង្គអន្តរធាន
ដូចព្រះធម្មតារម្យស្ថាន　　រលាយកណ្តាលសមុទ្របង់(1) ៚
៤១៤. កាលក្សត្រ(2) វិសេសស្គុះ　　ស្តេចស្តែងនិតពិធីទ្រង់
កម្មតបះបូជាប -　　កើតជាបុត្របុរសប្អូន ៚
៤១៥. ស្តេចរួមរក្សាគ្រប់គ្រង　　តតឯប្អាងបិតាស្ងួន
ផ្តើមនៃផ្តួចផ្តើមខ្លួន　　ខ្ទីមព្រះរាជបុត្រភ្លា ៚
៤១៦. យើងខ្ញុំបុត្រទាំងនេះនៃ　　ស្តេចតាំងអាល័យទ្រង់ករុណា
ទៀសាសួរព្រះរាមា　　ស្តេចស្ងួនពុំដែលឲ្យមានឃ្លាង ៚
៤១៧. ក្រែងអស់យើងខ្ញុំទាំងប្អូនបាន　　ធ្វើខុសមែនមានទោសក្តៅក្តង
ជីវិតអើយស្តេចដោយចង　　បាប្ញុទ័យព្រោះដោះបង់បុត្រ ៚
៤១៨. ឱះឱខ្ញុំចាំព្រះជន្មជាក់　　ព្រះជនកអ្នកដ៏គង់ផុត
តាំងពីប្រាំមួយឆ្នាំគត់(3)　　កំណត់ព្រះជន្មព្រះបិតា ៚
៤១៩. បង្កើតយើងខ្ញុំបុត្រប្អូន　　បរិបូណ៌ស្ងួនសល់ស្នេហា
ឱតម្រូវលះលេលា　　ដោះបង់បុត្រភ្លាអសារសោះ ៚
៤២០. កាលកើតកោលាហល　　ពោធិអសុរមួយមានឈ្មោះ
បរមុស្ដិអសុរនោះ　　មកដណ្តើមយកតិភព ៚
៤២១. ត្រៃត្រឹង្សព្រះឥន្ទ្រា　　អស់ទេវតាភិតភ័យស្ញែងស្លប់
សឹងដុលមកគោរព　　អញ្ជើញព្រះអង្គស្តេចទៅឆ្ពោះ ៚
៤២២. បរមុស្ដិអសុរយល់　　ស្តេចស្តែងដល់ត្រៃត្រឹង្សស្មោះ
បរមុស្ដិអសុរនោះ　　ដោះទម្លាក់ចាញ់ចេស្ដា ៚
៤២៣. តម្រូវព្រះអង្គផាត់　　ក្រែងមហាក្សត្រស្តេចលេណា
ទៅជួយព្រះឥន្ទ្រា -　　ឃីរាជឬយើងពុំយល់ ៚
៤២៤. ឱព្រះឱស្ឋព្រះឱង្ការ　　វិះរាជសារទៀងទៅដល់
ស្រីណោះបន្ទូលសល់　　សឹងដោះស្នូន្យអសារ(4) ពេក ៚
៤២៥. ប្រមូលអស់យើងខ្ញុំ　　ខ្ញុំទទៀបរមាភិសេក
ព្រះរាមព្រះទៀមឯក　　តែរេករាជពិភពគ្រង ៚
៤២៦. ឱះឱព្រះជន្មស្លល់ -　　ស្លាប់បានយល់បុណ្យបុត្រឡើង
បានបរិបូណ៌ដូចនូវបំណង　　បំណាច់ចំណាប់ព្រះបាប្ញុទ័យ ៚
៤២៧. ឱស្តេចឡើយប្រាសឃ្លាតឃ្លា　　ព្រួយព្រះចិន្តាដល់ក្សត្រក្សួយ
ស្ងាយសួគ៌ព្រះវិមាល័យ　　និរាសរកពុំយល់ឡើយ ៚

(1) MBN : ralāy soḥ sūny poḥ paṅ'
(2) RIB : braḥ osṭh
(3) MBN : oḥ o cāṃ braḥ aṅg s-āt
nā braḥ pād srīdasarath
prāṃ muoy hmīn chnāṃ gat'
(4) RIB : āsūr

៤២៨- ព្រះភិរុត ព្រះសុត្រុត តតត្រើយ[1] សោយសោកពុំស្បើយ
សង្រេងនឹងព្រះបិតា ។

៤២៩- នាងកៃកេសីសោកា ខ្លុមភាជបុត្រា
ដាក់លើទីភាជ៍ប្រាកដ ។

៤៣០- នាងបន្ទូលថាវៃយាបុត្រ នាងពីកំណត់
សព្វសរិលអស់អង្គមនុស្សផង ។

៤៣១- ពុំដែលនាងនឹងកន្លង ចៀសចាកឲ្យរង
អំពើអំពល់ពុំដែលបាន ។

៤៣២- ជាតិឯភាមរណាមាន ជាតិកើតបាន
ជារូបធំទើនអង្គា ។

៤៣៣- ពុំវៃលងស្បើយលុះជិភា ចាស់ចាកមរណា
ដោយក្តីសភាពស្លាប់ហោង ។

៤៣៤- ដូចកលផលបុប្ផាផង ក្រពុំប៉ិចពីទង
ស្រទាប់ត្របកបុស្បបទិរ[2] ។

៤៣៥- សឹងទឹកវៃរបៃភាយកេសរ ក្លិនក្លែបជឹបទិរ[3]
ក្សែណាប្រែស្បើយស្បើយគន្ធា ។

៤៣៦- ក្តិបបិចលេចពីទងវា ខ្ទីចាស់ផលា
ស្រគាលហើយទុំទៀងហោង ។

៤៣៧- ក្សែណាធ្លាក់ចុះចាកវៃលងទង ដូចកំណើតសត្វផង
អន្ទោលអន្ទាក់ភពស្ថាន ។

៤៣៨- ក្រុងពាលកណ្តាលចាស់មរមាន ជាបរិយោសាន
សំរេចសំភាប់សព្វសរិល ។

៤៣៩- ក្នុងភូមិភពចក្របង្វិល សង្សារទឹងវិល
លង្វែកក្នុងមហាសមុទ្រ[4] ។

៤៤០- ទោះបីព្រះបាទទសរថ មានព្រះជន្មកំណត់
មួយសែនកោដិកល្បស្កល់ស្កប់ ។

៤៤១- លុះអំណើសសែនកោដិកល្បគ្រប់ ពុំអាចទល់ទប់
សឹងលុះនូវក្តីមរណា ។

៤៤២- វៃយាបុត្រពន្លកមាតា វិជាតិជរា
មរណាសំភាប់រូបហោង ។

៤៤៣- ព្រះភិរុតរំលត់ទុក្ខផង ហើយទើបទូលស្នង

(1) RIB : trāṇ troey
(2) RIB : sradāp' trapak pak pusp
(3) RIB : bañ' beñ gandh
(4) RIB : rūp rañ kamm cañ pī kañval' ṭūc kal gambhīr ma-hāmahant ṭă samudr

ឱស្តីឯនាងកៃកេសី ។

៨៤៤. បតិត្រ ព្រះវរជននី ព្រះបិតានរបតី
នោះមិញសុគតហើយហោង ។

៨៤៥. រីព្រះរាមទេពជ័ក្នុង ព្រះរាជបុត្រច្បង
ឥឡូវស្តេចគង់ស្ថានណា ។

៨៤៦. នាងប្រាប់ថាវៃហាបុត្រភ្វា ម្តាយលាក់អ្វីបា
បណ្តូលបណ្តាច់ផ្លើមវៃថ្លៃ ។

៨៤៧. រីព្រះរាមទៀមក្រោធក្រៃ នាំទេពីថ្លៃ
នូវព្រះលក្ស្មណះយាត្រា ។

៨៤៨. ព្រោះបង់ចេញចោលនគរា ត្រេចព្រៃព្រឹក្សា
ពុំដឹងដំណួចស្ថានស្ថិត ។

៨៤៩. ព្រះភិរុតឮព្រះវរមិត្រ ទៀមរាជដ៏បពិត្រ
ដ៏ត្រេចព្រះព្រៃយាត្រា ។

៨៥០. ដូចអ្នកយកអគ្គីសោះសា ដាលដុតទ្រភា
នូវថ្លើមជម្លើមពោរពុះ ។

៨៥១. ដូចនូវបែកក្បាលខ្ចាយធុះ ដូចខ្លោចឈ្លោចឈ្លុះ
ឱភារន្ធត់ក្រោធក្រៃ ។

៨៥២. ទើបខំទប់ទូលនាងកៃ – កេសីនូវសម័យ
ព្រះរាមព្រះទៀមរត់ទៅ ។

៨៥៣. នោះព្រះរាមទៀមពោលជ្រៅ ពាលទាស់ក្រៃក្រៅ
នូវច្បាប់បុរាណក្សត្រា ។

៨៥៤. ព្រះបាទទសរថរាជា ព្រះវរបិតា
ស្តេចក្រោធបណ្តេញបរបង់ ។

៨៥៥. ឬមួយទៀរព្រោងព្រះអង្គ ព្រះរាមទិះចង់
ទៅនៅនាព្រៃនោះឯង ។

៨៥៦. ដោយកម្មវិបាកបង្វែង ឬមួយសោកក្រែង
មហាឫសីសិទ្ធិ ។

៨៥៧. ឲ្យអាក់ខ្ញាល់ខ្ញាក់កលអ្វី ព្រះជេស្ឋានរបតី
ស្តេចខ្ញាល់(1) ពុំនៅព្រះនគរ ។

៨៥៨. ឬមួយពោលពីព្រះវរ – កោកល្បាបរ
បណ្តេញព្រះរាមរត់ទៅ ។

៨៥៩. មួយសោកព្រះបាទចោមចៅ ទសរថរាជចៅ
ព្រះជន្មាមាននៅឡើយ ។

៨៦០. ឬស្តេចស្តែងសុគតហើយ ព្រះអង្គគតត្រើយ(2)

(1) RIB : stec khmās
(2) RIB : trāṇ troey

ក៏រត់ទៅនៅនាព្រៃ ។

៤៦១- នាងប្រាប់សព្វសព្វសម័យ សំណោះជាវៃហា
ភិរុតរូបរត្នស្បូនភ្វា ។

៤៦២- កាលព្រះរាមទេពបងបា នាំរាជសីតា
ព្រះលក្ស្មអនុជចេញទៅ ។

៤៦៣- នោះព្រះជនកបានៅ ស្តេចសោកក្តាត់ក្តៅ
ហឫទ័យទល់ទុក្ខវេទនា ។

៤៦៤- ពេលរាំងនេះអង្គីព្រះបិតា ខ្ញាល់បរបងបា
លុះលះវៃងរាជបុរី ។

៤៦៥- មួយសោតអង្គីពាក្យពី មុនីវរសិទ្ធី
មហាឫសីភ្នំភ្នង ។

៤៦៦- នាងកេកយ្យាសោតហោង គិតឯមានឃ្លាង
រកាំរកៀសហឫទ័យ ។

៤៦៧- នាព្រះរាមទេពក្រោធក្រៃ រត់ទៅនៅព្រៃ
នោះហេតុពាក្យពីប្តេជ្ញា ។

៤៦៨- អញឯងសូមសត្យវាចា ពីព្រះជនកបា
នូវឲ្យបាបងជាក្សត្រ ។

៤៦៩- សេពសោយរាជ្យរម្យរាស្ត្ររដ្ឋ គ្រប់គ្រងសម្បត្តិ
សំបូណ៌បុរីអយុធ្យា ។

៤៧០- មួយសោតអញសូមប្តេជ្ញា ឲ្យព្រះរាម-
ជរាជចេញចាកព្រះនគរ ។

៤៧១- ទៅធ្វើតបះការករ ឰដ៏ព្រៃពនដរ
អស់លុងលុះប្អូនដណ្តាប់ឆ្នាំ ។

៤៧២- ឲ្យសាងសីលទិព្វការកម្ម ស្រេចហើយនៃនាំ
ទេពីនូវព្រះអនុជា ។

៤៧៣- វិលមកស្រីអយុធ្យា នោះព្រះជនកបា
ប្រសិទ្ធព្រះពរអញហោង ។

៤៧៤- ឆ្លេះឯងព្រះរាមបុត្រប្អូង អាក់ខ្នាក់ខ្ញាល់ជាង
ជាទោសទុំនៅព្រះនគរ ។

៤៧៥- ដោះបង់សម្តេចព្រះភូធរ ទសរថព្រះវរ-
បិតាកាលស្តេចពុំទាន់សុគត ។

៤៧៦- លុះឮជាព្រះរាមរត់ ស្តេចសោករាជបុត្រ
សង្រេងនោះសោយទិវាល័យ ។

៤៧៧- ព្រះភិរុតស្តាប់សព្វសម័យ ពាក្យពីនាងកៃ-
កេសីព្រួយព្រាប់តាំងពិលាប ។

៤៧៨- ដើមឡើយប្រណាម្យក្រែញក្រាប លុះឮជាក់ជ្រាប
ជាព្រះរាមរត់បទនោះ ។

៤៧៩. ព្រះភិក្ខុឥរិះរឹងខ្លាស់នោះ - សាសស់ក្បួនណានោះ
ក៏ញ៉ើរព្រះបាទវិស័យក្រោធ ។
៤៨០. យកព្រះបាទស្ដុកព្រះស្រោត តាំងតែរតុំកោត
តុំស្ដាប់បន្ទូលនាងឡើយ ។
៤៨១. នេត្រច្រាលនិងដាលតិតស្បើយ(1) ទះព្រះបាទហើយ
បំផ្លិចរន្ទះខ្ទារន្ទរ ។
៤៨២. ក្រោធក្រោកខាលដោះបើងឈរ ដូចទន្ទវិល្ហកព្រះនគរ
តាំងព្រះសុមេរញាប់ញ័រ ។
៤៨៣. សាគរតុះពោរអស្ចារ្យ ព្រះភិក្ខុភាគខ្លាស់
កក្រើកអំពើកប្រផតី ។
៤៨៤. ដានូវកាប់នាងនៃកកេសី កាចកាឡកិណី
សម្លាប់ព្រះបាទទសរថ ។
៤៨៥. ឲ្យព្រះអង្គសុះសុគត ពោលតាំងនេះបទ
ថែស្រីធណ្ដាលរឹងមាត់ ។
៤៨៦. គិតគួរអញឯងកាប់កាត់ ជាតិរបីកំណាត់
តិម្បូរឲ្យក្ស័យជន្មា ។
៤៨៧. គឺនោះបទជាមាតា ឆិតឆ្លឹមរក្សា
អញរស់បទក្បីរគាត់ហោង ។
៤៨៨. វិពោលគាត់ផ្លូវដីកន្លង ក្រៃវែងស្រីឯង
តាំងប្រែតប្រាកដលោកិយ ។
៤៨៩. នាឆ្លាប់វិស័យជាស្រី នៅនឹងប្ដីសី
សប្បាយបងប្អូនកូនចៅ ។
៤៩០. ស្ដេចដល់បណ្ដាលពោលជ្រៅ ឲ្យរំដួលក្ដៅ
ក្រៃក្រៅវិស័យក្សត្រី ។
៤៩១. ធណ្ដាលកាចកាឡកិណី សល់សម្លាប់ប្ដី
ជាក្សត្រប្រសើរសុគត ។
៤៩២. បទបានពាក្យប្ដេជ្ញាមត់ ទើបព្រះទសរថ
ស្ដេចតាំងរិះរកពាក្យសត្យ ។
៤៩៣. តាំងអាចឲ្យភាគសម្បត្តិ ព្រះភាពរៀមរត្ន
ដីជាព្រះភាគបុត្រថ្លៃ ។
៤៩៤. បទទើសតាល់ពាក្យពេជន៍ហោង ស្ដេចខ្លាសភាគស្ដេចឯង
ស្ទើរតក់ទៅនៅនាត្រា ។
៤៩៥. ព្រះជនកសោកមិនបានទៀងទាត្រ សុះព្រះជន្មក្ស័យ
តាំងបង់ពាក្យសត្យមេត្រី ។

(1) MBN : netr crāl jrāp jruot it spoey
RIB : netr crāl ṭaeṅ ṭāl jā troey

៨៩៦. ចាំបើនាងកៃកេសី នេះតាំស្រដី
នោះតើមានទោសអ្វីឡើយ ។
៨៩៧. បើយកនាងនេះជាត្រើយ ស្មើយកកេសរហើយ
លើព្រះអង្គឥឡូវហោង ។
៨៩៨. មួយបាបបុរាណអញផង នាំអញមករង
ទម្ងន់ចាប់ប្រតិសន្ធិ ។
៨៩៩. ក្នុងផ្ទៃនាងកៃកេសី នោះមាយាស្រី
កុហកមុសាខាងខ្នាត់ ។
៩០០. បើអញសោយរាជ្យជាក្សត្រ នេះហើយក៏នូវស្ងាត់
ប្រយោជន៍កើតក្តីអន្តរាយ ។
៩០១. រីសត្រូវទៀតសោតមើលងាយ ពុំកោតស្និទ្ធឆ្ងាយ
ចងចើកបំបែកស្រុកទេស[1] ។
៩០២. អង្គអញសោតកុំប្រហែស រកទៀនសិល្បវិសេស
អំពីលោកិយនេះហោង ។
៩០៣. ទើបនូវបាននាំរូបខ្លាស់ខ្លួន លះបៃលងវំលង
ចំណងចំណាំទេវា ។
៩០៤. ក្សួងថ្វាយបង្គំក្រាបលា នាងកោកល្យា
ទេពីពិសុទ្ធសីលាលៃសយ ។
៩០៥. បំបាត់បាបវេរាភ័យ កំណើតក្សិណក្ស័យ
ចង្រៃអង្គអញបីស្រលះ ។
៩០៦. ហើយនូវសាងសីលសុទ្ធតបះ - កម្ចកបនូវដំរៈ
មន្ទិលអសោចបាបបង់ ។
៩០៧. អញនូវតាមដោយស្ទួនព្រះអង្គ ព្រះរាមស្ដេចគង់
ស្ថានណាអញទៅស្ថាននោះ ។
៩០៨. សម្ដេចព្រះភិរុតគិតស្មោះ នូវព្រះសុត្រុតស្ពោះ
ប្រាសាទនាងកោកល្យា ។
៩០៩. លុតជង្ឃឹនអង្គសិរសា ក្រុញក្រាបដីក្រលា
មហាមណ្ឌលប្រថពី ។
៩១០. ផ្ទាប់ផ្ទាល់ព្រះលលាដដល់ដី ដៃដលដាក់សិរសី
នោះព្រះចរណីម្រាមប្រិត ។
៩១១. ព្រះលលាដព្រះជង្ឃដីជ្រិត ដៃដលព្រះភិរុត
ជាកេរតិតន្តងស្នាមនៅ ។
៩១២. នាងកោកល្យាហៅ ព្រះភិរុតឡើងទៅ
នូវព្រះសុត្រុតអនុជា ។

(1) RIB : pampaek nūv kul bhines

៩១៣- នាងថ្វាយព្រះកន្សែងសោភា ព្រះហស្តដ៏ប្រវា
ទិនទុំបអង្គព្រះភិរុត ។
៩១៤- នាងប្ញញព្រះបាទទសរថ តិណាបលុះលត់
វណាយរំសាយសោកស្បូរ ។
៩១៥. ថ្លៃងហំងទឹកនេត្រអាក់អួល ដំជ្រើមខ្សឹកខ្សួល
ស្រក់ទឹកព្រះនេត្របីរណាម ។
៩១៦. នាងក្រាប់ដោយដំណើរព្រះភាម វត់ស្ដេចឲ្យតាម
ហោយឃាត់មិនឲ្យដេរដេរ ។
៩១៧- អ្នកពុំទិលង្កានព្រះនគរ ឡើយលុះចេញចរ
ក៏ត្រៀងព្រះវៃត្រយាត្រា ។
៩១៨. ព្រះបាទទសរថភាជា សោកព្រះភាមា -
ធិភាជលុះស្ដេចសុគត ។
៩១៩. នាងក្រាយក្រាប់ព្រះភិរុត ដូចដើមពាក្យមត់
នាងកៃកេសីសូមពរ ។
៩២០- វិរសិទ្ធិមុនីប្រើសារល អញ្ជើញព្រះភិរុតជរ
ត្បូវព្រះសុត្រតអនុជា ។
៩២១. មកលើកព្រះសពព្រះបិតា ព្រះអង្គអនិច្ចា
លុះសោយព្រះទិព្វង្គត ។
៩២២. នាងកៃកេសីមកមត់ ប្រើក្រាប់ព្រះភិរុត
ជានូវនល្លាប់ប្រជិមា – ។
៩២៣- ភិសោកព្រះភាមភាជា . ឈ្លបព្រះបិតា
នោះសីងមុសាវាទទេ ។
៩២៤- នាងក្រាប់អស់សាធិតតទេ(1) ក្បុណានោះឯងឯង
ព្រះភិរុតរឹងក្រេវក្រោធក្រៃ ។
៩២៥- ដឹងដើមសារសព្វសម័យ ពាក្យពីនាងកៃ -
កេសីក៏ប្រើគ្វើកល ។
៩២៦. ដងនោះមហាមុនីនិម៌ល មកង្កានមណ្ឌល
ក្រាសាទនាងកោកល្យា ។
៩២៧- ព្រះភិរុតព្រះសុត្រតអនុជា យល់វរសិទ្ធិមហា -
ឫសីមកស្ទូរពតិមាន ។
៩២៨- ទុបយំលើក្រាសាទស្ពាន លុះបន្ទោសោកក្រាន
ស្រែជស្ទួរព្រះបាទគិសី ។
៩២៩- ក្រាយក្រាប់អស់ពាក្យពេចន៍ពី ព្រះជនកនរបតី
ក៏សោកព្រះភាមភដិបុត្រ ។
៩៣០- ជាវៃឃាព្រះស្រីជ័ភិរុត ព្រះជនកធាសុគត

(1) RIB : it dve

ដ៏ស្រាំដណ្ដាប់ថ្ងៃ ហើយ ។

៩៣១. ពុំគួរយើងផ្ងេងផ្ងើយ បន្ធូរសោកស្បើយ
សំរេចព្រះសពសំស្ការ ។

៩៣២. នាព្រះភិរុតព្រះសុត្រុតកុមារ ស្ដាប់ព្រះបន្ទូលសារ
មហាឫសីវរសិទ្ធិ ។

៩៣៣. ឲ្យរួចបទរន្ធរដ៏ភេរី ជុំមុខមន្ត្រី
នូវពលសកលយោធា ។

៩៣៤. ប្រដាប់មណ្ឌបសុវណ្ណា ភាយរត្នរចនា
រូបឋានពិមានត្រៃត្រិង្ស ។

៩៣៥. លើខ្នងព្រះសុមេរស្ទឹមស្ទឹង បរិពន្ធ(1) ជុំវិញ
សិងរត្ននូវនពសុវណ្ណា ។

៩៣៦. ហើយយកព្រះសពព្រះបិតា ផ្ដល់ធ្វើដ៏បូជា
ព្រះភ្លើងសំរេចសំស្ការ ។

៩៣៧. ស្រេចមហាឫសីមុនីអាឡ(2) ព្រាហ្មណ៍ព្រឹទ្ធគណាចារ្យ
មន្ត្រីសេនាដ៏អនេក ។

៩៣៨. នូវប្រដាប់មង្គលអភិសេក ប្រជុំមហាភិសេក
ព្រះភិរុតឲ្យសោយរាជ្យវង ។

៩៣៩. ចម្ងន់ថ្ងៃក្រោមគ្រប់គ្រង សេពសោយរាជ្យស្នង
សម្ដេចព្រះវរបិតា ។

៩៤០. ព្រះភិរុតក្រោធទ្រង់ព្រះចិន្ដា ឥតចិត្តចេតនា
នូវជាប់សោយរាជសម្បត្តិ ។

៩៤១. ដូចអ្នកយកពិសពស់(3)ក្ដាត់ ដាក់ជិវ្ហាច្វាត់
ស្ទើរក្ស័យព្រះជន្មកាលនោះ ។

៩៤២. ស្ដេចទ្រង់ព្រះចិន្ដាចំពោះ អញសោយរាជ្យស្ដោះ
ស្នាលស្នងព្រះវរបិតា ។

៩៤៣. ដោយពាក្យអ្នកតំងនេះណា សឹងហៅបានហា
ដូចពាក្យនាងកៃកេសី ។

៩៤៤. លោកខិលដល់សម្លាប់ប្ដី ឈ្មោះតើគាប់អ្វី
ក៏នឹងបំផុលចិត្តព្រមដង ។

៩៤៥. គួរព្រះរាមរាជបុត្រច្បង ស្ដេចសោយរាជ្យស្នង
សម្ដេចព្រះវរបិតា ។

(1) MBN : paribā
RIB : paribhaṇḍ
(2) RIB : munī āth
(3) RIB : bis bal

៩៦៣. ប្រែប្រាណាបីរូបានហាក់អង្គ ឫសីសិទ្ធពរពង្ស
ពិសេសពិសុទ្ធសីលា ។
៩៦៤. ឡើងលើរាជរថយាត្រា គគឹកដូចជា[1]
គេគោះទាំងរាជដំបុរី ។
៩៦៥. នាងកោកល្យាក្សត្រី នាងកៃកេសី
ប្រតីនូវនាងស្រមុត ។
៩៦៦. សឹងឡើងគង់លើរាជរថ តាមព្រះភិរុត
សន្និកដារាជរណើ ។
៩៦៧. អស់ភ្លេងភ្លាត់តូរ្យតន្ត្រី ព្រៃសឹងភេរី
រៀបរៀងដោយឧបមាគា ។
៩៦៨. ស្តេចទៅទាំងទុក្ខសោកា ស្តួតព្រះភក្ត្រា
ឱភាតាន់តឹងរលួលក្រំ ។
៩៦៩. ស្តេចប្រាមតាំងឲ្យជំនុំ តន្ត្រីយសេពសម
ប្រគំបរិទេវឡើយហោង ។
៩៧០. លុះទៅដល់ព្រះប្ញាទបង ឈប់ភ្លេងភ្លាត់ផង
ជនរៃង្គបំរើព្រះអង្គ ។
៩៧១. រាជរថព្រះភិរុតស្តេចគង់ ក្តិលស្មើរហាក់អង្គ
បណ្តាលនៃព្រះចន្ទ្រា ។
៩៧២. អស់មុខមន្ត្រីសេនា ស្រីស្នំត្រៀបត្រា
រូបានតារាការសធរ ។
៩៧៣. ស្តេចចេញចាកទ្វារព្រះនគរ ពល់ក្រាស់វិករ
ករក្រើកអំពើកប្រថពី ។
៩៧៤. ក្រុំមួយម៉ឺនអក្ខោភិនី ព្រះភិរុតនរបតី
នូវព្រះសុត្រុតយាត្រា ។
៩៧៥. ស្តេចចរលុះរស្សៀលសុរិយា ស្តេចដាក់នៅនា
ឧទ្យានដៃលព្រះរៀមផ្ទុំ ។
៩៧៦. ស្តេចលុតលើកករបីបង្គំ គក់ឱរាយំ
ស្រណោះព្រះរៀមដេស្មា ។
៩៧៧. លុះព្រឹកស្រាងស្រែចទិវា រិស្តួងស្តេចលេលា
ទៅដល់ឆ្នេរមហានទី ។
៩៧៨. សួរសព្ទសេនាសេនីយ រាជរថពាជី
នូវពលសកលយោធា ។
៩៧៩. សន្និកនៃត្រាព្រឹក្សបត្តា ធ្លាក់ធ្លាយសេលា
មហានទីបីរលក ។

(1) RIB : dau jā

# កណ្ឌ ទី៩

៩៨០- ឯថ្ងៃនោះកុខ័នចេញមក ងោកបើកភ្នែកឯក
កំមើលទៅយល់យោធា ។

៩៨១- យល់អស់រាជរថអស្សពាហា គជសារសេនា
នូវរេពលពាលក្រាស់ក្រៃ ។

៩៨២- កុខ័នក្រោធញ័រហឫទ័យ គិតអធ្យាស្រ័យ
ឋានេះនាងកៃកេសី ។

៩៨៣- អភិសេកព្រះភិរុតជាត- សួររាជបុរី
បុរាណនៃស្រីអយុធ្យា ។

៩៨៤- នេះសមព្រះភិរុតរាជា នាំពលយោធា
មកតាមព្រះរាមនូវព្រះលក្ស ។

៩៨៥- លោកដែលដេញស្ដើមរាជ្យអ្នក បានគ្រងរាស្ត្ររក្ស
ដោយពាក្យនាងកៃកេសី ។

៩៨៦- ស្ដេចពុំឃ្លានរាជបុរី ឡើយនាំទេពី
ជាបីនូវព្រះអនុជា ។

៩៨៧- មកនៅនាព្រៃបព្វតា ធ្វើតបះកម្មជា
ឫសីពិសេសសិទ្ធពរ ។

៩៨៨- ម្ដេចឡើយព្រះភិរុតនាំប- រិពារពលនិករ
មកតាមធ្វើគត់ព្រះអង្គ ។

៩៨៩- ពោះបីព្រះភិរុតនេះខ្ញុង[1]- ពលមកត្រៀមត្រង់
អញ្ជើញព្រះរាមនរបតី ។

៩៩០. វិលទៅសោយរាជ្យនាបុរី នោះអញមេត្រី
សំណេះសំណាលសួរតំរាន្ត ។

៩៩១. ស្ទឹកបើគ្រួសធ្វើហោរាន ដោះមករុករាន
បំពានតិឃាតបីព្រះអង្គ ។

៩៩២. អញនឹងថ្លាញព្រះភិរុតវៃវង្ស ឲ្យវិនាសបង់
ទាំងពលសកលយោធា ។

៩៩៣. ហើយអញយកព្រះភារា ទៅសោយរាជ្យា
ស្រីអយុធ្យាជ័ប្រាកដ ។

៩៩៤. យល់បាទព្រះភិរុតរាជបុត្រ ព្រះបាទទេវរាជ
ក៏ទៀលសរអញបានឃ្ញ ។

៩៩៥. ក្ងួវ័នឆ្នាំបំពាល់ប្រសើរ វិពងទាំងវៃព្រៃ
អស់ពលគ្រាំមួយម៉ឺនមក ។

៩៩៦. ឲ្យអ្នកទូកទាំងម៉ឺនសឹក ក្នុងវៃព្រៃហើយយក
នូវគ្រឿងអាវុធសស្ត្រា ។

៩៩៧. ចូលចាំសព្វច្រកអធ្វា ដោយឆ្មេរគង្គា
បង្កប់នូវកិច្ចភ្លឺមក្លាត់[1] ។

៩៩៨. ប្រាប់ថាគ្នាយើងប្រយ័ត្ន អញនឹងថ្លាញក្សត្រ
នេះឲ្យវិនាសអន្តរាយ ។

៩៩៩. ទោះទាំងទេពតាស្ទួគិនាយ អញនឹងបាញ់ឲ្យខ្ចាយ
ប្រល័យទាំងស្មគ៌វិនាសបង់ ។

១០០០. ស្ដេចឲ្យព្រះរាមទេពទ្រង់ សំបកឈើគប់
ត្រមោចព្រះអនុជទេពី ។

១០០១. នេះបទនាបៃកកេសី ដំណើ្តមរាជ្យពី
ព្រះរាមមកឲ្យព្រះភិរុត ។

១០០២. អញនឹងថ្លៃវៃសរបីប្រាកដ ឲ្យខ្ចាត់ដល់សមុទ្រ
បង្ហើរទាំងពលយោធា ។

១០០៣. ក្ងួវ័នទីងទិវងបរិយា ទៀបពលត្រៀបត្រា
បណ្ដាក់ដោយឆ្មេរនទី ។

១០០៤. កាលនោះអង្គឯកមន្ត្រី ទូលព្រះនរបតី
ព្រះស្រីភិរុតរាជា ។

១០០៥. បតិត្រសួមព្រះចិន្ដា នាំយើងយាត្រា
មកដល់នគរនេះនៃ ។

១០០៦. មានប្រមាញ់មួយជាស្ដេចព្រៃ ឈ្មោះក្ងួវ័នព្រៃ
នូវឫទ្ធិតេជៈបីទារ ។

(1) RIB : cūr cāṃ sabv crak ādhvā
pañkap' atmā
pañkot hoey buon klaṃ klāt'

១០០៧- រីកម្លាំងគីតូគជសារ(1) ឈ្លោះខ្លាំងពេញពល
មានពលប្រាំមួយម៉ឺននៃ ។

១០០៨- ក្ញូខ័នខ្ពស់ ធំស្កឹមស្កៃ ឈ្មោះស្មើភ្នំនៃ
មមា មមូរយោយាន ។

១០០៩- កាលព្រះរៀមស្តេចដល់ស្ថាន នេះព្រះរៀមបាន
ជាមិត្រនឹងក្ញូខ័ននោះ ។

១០១០- ក្ញូខិនឆ្មៃឆ្មុំពុងពោះ ចងចិត្តស្មើឈ្មោះ
សិម្ពាញ់សិល្ប៍តតតក្តង ។

១០១១- ហើយក្ញូខ័នឯងចម្លង ព្រះរាមស្តេចឆ្លង
ល្មះរួចទៅត្រើយនាយណា ។

១០១២- នេះតម្លូវព្រះអង្គយាត្រា នាំពលយោធា
ពលគជតាជីសារថី ។

១០១៣- បរិពារពាសពេញប្រថពី មកដល់នទី
នៃជនជាន ព្រះរៀមនេះតម្លូវ ។

១០១៤- ព្រៃស្ថានស្តេចនាំពលញូយា មកជាសត្រូវ
នឹងព្រះរៀមរាជរាមា ។

១០១៥- ក្រៃឯកក្ញូខ័នទឹងពុះពារ ការព្រះជេដ្ឋា
ប្រយ័ត្ននឹងព្រះនរបតី ។

១០១៦- គាត់ពុំដឹងដើមមកក្នុងក្តី ជាតិជាមេត្រី
បក្តិព្រះរៀមក្សត្រៃផង ។

១០១៧- ព្រះភិរុតប្រាបព្រះបាឬទ័យ ដឹងដើមត្រើវពៃព្រ
ពន្លឺកន្សែបឬទ្ធិដេស្តា ។

១០១៨- ឯងនោះក្ញូខ័នយាត្រា ល្មះឆ្នេរគង្គា
ប្រយោជន៍ទទួលសឹកសារ ។

១០១៩- ពេលយល់អស់រាជបរិពារ គប់គាល់ក្រាស់ក្រាល
អនេកអនន្តជាសងា ។

១០២០- ព្រះភិរុតព្រះសុត្រុតជាតិជា ស្ងប់ស្ងាត់ព្រះភក្ត្រា
ក៏ប្រែញពុំត្រើសរួសរាយ ។

១០២១- សោកសឹងទល់ទុក្ខសញ្ញាសាយ ពិតពុំសប្បាយ
ទាំងពលរោរាជបរិពារ ។

១០២២- ព្រះភិរុតព្រះសុត្រុតកុមារ សឹងពាក់ជជាធារ
សង្វារសំបកឈើទ្រង់ ។

១០២៣- ក្ញូខ័នសន្លប់លុតជង្ឃ ស្រយាកអស់អង្គ
ក៏ធ្លាក់ផ្កូកាំពីនៃ ។

(1) RIB : rī kamlāṃn git ṭă gajendr sār

១០២៤. ដាក់ជាព្រះភិរុតមកវៃ - ត្រីរកទៀមថ្លៃ
អាល័យសម្ដេចភាមា ។

១០២៥. ក្បួនលុះលាន់មាត់ថា អះអញស្មានថា
ព្រះរាមនូវព្រះជ័យភិរុត ។

១០២៦. ស្ដេចខ្លាល់សំដាគ្នាប ព្រះបាទទសរថ
ដោយពាក្យនាងកៃកេសី ។

១០២៧. អភិសេកព្រះភិរុតជាតិ - សួរភជជ័យបុរី
ព្រះរាមព្រះទៀមខ្លាល់ហោង ។

១០២៨. ហើយព្រះភិរុតសោះមកប៉ង ជាសត្រូវផង
សម្ដេចនាភយភាមា ។

១០២៩. ពុំដឹងដើមព្រះភិរុតជា ឈ្មោះទេក្បួនលា
តិម្បូវមកពាំងថ្កូវល់ ។

១០៣០. ក្បួនអង្សាស្រ័យយល់ សព្វប្រការកល
ដំណែងដំណើរនោះផង ។

១០៣១. ស្មើជាសុភាពពិតហោង ទើបក្បួនក្ដង
ថ្វាត់ថ្វាយបង្គំកាលនោះ ។

១០៣២. ព្រះភិរុតយល់ក្បួនស្មោះ មកថ្វាយបង្គំស្មោះ
សំលូតពិតពីហឫទ័យ ។

១០៣៣. ពិស្ដងស្ដេចលើកព្រះហស្ដថ្លៃ នមស្ការធ្មើរថៃ្ង
រឹងហើយសំណោះស្នេហាស្និទ្ធ ។

១០៣៤. ក្បួនទូលជាបពិត្រ នាស្ដេចទ្រង់ក្រឹត្យ
ព្រះក្រមពិសុទ្ធសីលា ។

១០៣៥. តីរអង្គព្រះលក្ស្មអនុជា សឹងរៀបព្រាណជា
មហាឫសីសុន្ទរ ។

១០៣៦. ហើយស្ដេចចេញចាកព្រះនគរ ត្រេចថៃ្ងពនចរ
មក់ដាក់ទ័ពទីទុរគម ។

១០៣៧. នាំពាំងទេពីព្រះស្នំ បរិពារនារជំ
អនន្តអនេកពេកក្លាត់ ។

១០៣៨. ស្ដេចពុំសោយរាជសម្បត្តិ បរិបូណ៌ជាក្សត្រ
អស់តិភពតារអយុធ្យា ។

១០៣៩. ដរាបនោះព្រះភិរុតឆ្លើយថា វាហាក្បួនបា
ជីជាតិសួរស្ដេចថៃ្ង ។

១០៤០. ភាព្រះរាមទេពថ្លាថ្លៃ រាជបុត្រឆ្លងនៃ
ស្ដេចពុំសោយរាជ្យរក្សរាស្ត្រ ។

១០៤១. ស្ដេចធ្វើយអង្គអញឧបាស[1] លោកលុះព្រាណព្រាស

(1) RIB : upās

នាភាយនរបតី ។

១០៦២. នេះឥឡូវអញបរាជ័យបុរី ប្រយោជន៍យកសិរីសី
មករបស់ព្រះបាទតរិន្ទ(1) ។

១០៦៣- សូមអញ្ជើញសម្ដេចព្រះភូមិន្ទ ភជាធិបតិន្ទ្រ
នូវព្រះទេពីវនិតា ។

១០៦៤. វិលស្ថានស្រុកស្រីអយុធ្យា សេពសោយភព្យជា
ឥស្សរកិត្តិល ពង្សក្សត្រ ។

១០៦៥. ឯងនោះកូវ័នអរក្ដាត់ ក្រឹញក្រាបប្រណិប័ត
បង្គំក្រាបក្រោមបាទ ។

១០៦៦. សរសើរព្រះភិរុតថា ប្រាសវៃលែងលោភា
ឆន្ទាទោសោភ័យដង ។

១០៦៧- ពាក្យពិតទៀងឥតក្លង ដើរដោយនូវគន្លង
ព្រះធម្មអាប្យសត្យសព្វ ។

១០៦៨- នាស្ដេចមកយកគោរព ប្រតិបត្តិអង្គអ-
ភិវាទអញ្ជើញព្រះបង ។

១០៦៩- កាលព្រះរៀមស្ដេចបកក្ដង អស់មហាឫស៊ីដង
សឹងអរទូលព្រះអង្គ ។

១០៧០- នេះឯងស្ថានដែលស្ដេចគង់ ហើយស្ដេចផ្ទំក្នុង
អាស្រមស្រេចមួយរាត្រី(2) ។

១០៧១- លុះព្រឹកស្ដេចនាំព្រះទេវី ព្រះអនុជនរបតី
លេលាចេញចាកព្រះអាស្រម ។

១០៧២- ព្រះភិរុតក្រាបថ្វាយបង្គំ ស្ថានដែលស្ដេចផ្ទំ
ក៏ញ៉ាំរ ព្រះអង្គបីធំប្រាប់ ។

១០៧៣- ស្ដេចទ្រង់ព្រះករនៃស្បូវសន្លប់ លើស្ថានស្ងល់ស្ងប់
អាណោះសម្ដេចព្រះចក្រី ។

១០៧៤- ស្ដេចផ្ទំអស់ឯករាត្រី(3) មួយនៅនាទី
អាស្រមដែលព្រះជេដ្ឋា ។

១០៧៥- ព្រឹកស្រេចវិស្ដងស្ដេចលក្ខណា សម្ដេចព្រះមហា-
ឥសីមុនីថ្វាយពរ ។

១០៧៦- កូវ័នក្រោមប្រើអស់ប- វិពារឆ្លងស្ទឹងចរ
ទៅនាំនាវាសព្វច្រក ។

១០៧៧- ទូកទាំងមួយម៉ឺនមីមក តុំគ្រាន់ល្មើយយក
អស់ទូកប្រមាញ់បរិវារ ។

(1) RIB : braḥ pād narabin
(2) RIB : āsram srap' muoy rātrī
(3) RIB : stec phdaṃ luḥ as' rātrī

១០៥៨- បានជាត្រាំជីកោជិក្រាស់ក្រាល[1] ខ្ពស់ខ្ពាប់ទាំងនារ
មហានទីខួរខ្សាយ ។
១០៥៩- ជន់ជោរពេញពោរសព្វសាយ ត្រាំងបាក់ធ្លាក់ធ្លាយ
ពន្លឹកពន្លុកហូរហៀរ ។
១០៦០- ចម្លងអស់រាជបរិពារ ពាជីគជសារ
នូវរាជរថក្រាស់ក្រៃ ។
១០៦១- សព្វកងទ័ពព្រើកក្បៃក្រៃ លុះដល់មាស្រមៃន
ព្រះភារព្វខជ័តសី ។
១០៦២- ទូលថ្វាយបង្គំព្រះមុនី សួរសព្វសេចក្ដី
អំពីព្រះរាមស្ដេចខ្វាល់ ។
១០៦៣- ព្រះមុនីថ្វាយប្រាប់អស់អាថ៌ ពាក្យពេចន៍សិបាល
ដំណើងដំណើរព្រះភូធរ ។
១០៦៤- ស្រេចព្រះមុនីសាន្តសារ ព្រះបាទជ័យអរ
នឹងព្រះភិរុតរាជា ។
១០៦៥- ឲ្យសៀងអស់ពលយោធា បរិកុលគោជគោក្តា
នូវក្បួនបំពេញពិធី ។
១០៦៦- បូជាក្បួនកើតជំណើ ទិនារសធី
ទុំត្រានូវផ្អែតផ្អន់ជិន ។
១០៦៧- កក្រើកទៅដល់ព្រះតន- ព្រៃស្រែសនិទ្ន
គ្រែកត្រាសបន្ទុលផ្ទឹមផ្ទា ។
១០៦៨- ឲ្យអស់ទេវបុត្រទេវតា ទាំងទេពកញ្ញា
ចុះមកចួបជុំនិមិត្ត ។
១០៦៩- ត្រីៈត្រៃគ្រប់គ្រឿងស្ពានស្អិត សឹងរត្នពិចិត្រ
ប្រាំពព្រះពិស្ណុការធ្វើ ។
១០៧០- បង្អួររភ្លីសួគ៌សាងលើ ទេសទិព្វនូវអំពើ
អំពីជោរជាលគន្ធ ។
១០៧១- ក្របួចឆ្លាយឆ្ងួញទិសា គ្រឿងថ្មមព្រស្ដា
អនេកអនន្តសព្វសាយ ។
១០៧២- គ្រាន់គ្រប់សព្វភស្ដុតាំងឡាយ សឹងសុខសប្បាយ
កំភលទិព្វទន់នៃបនិត្យ ។
១០៧៣- យកបាន ពិមានសួគ៌ស្ថិត ទាំងរស់ជីវិត
ពិតពុំវល់ងរូបកាយ ។
១០៧៤- ទាំងមាយាទិព្វសួគ៌នាយ ភាជងាសរៀបកាយ
គ្រាន់គ្រប់ទាំងពលបរិពារ ។

(1) MBN : pān jāp tiko krās krāl

១០៧៥. ទាំងស្ដេចពាជីគជសារ ធ្លាក់ពីកណ្ដាល
អាកាសពេញពាសប្រថពី ។
១០៧៦. ទោះក្របីគោសេះដំរី ដើរដេកឈរស៊ី
សឹងខ្ទែឆត្រអាលស្លាប់ស្ដូល់ ។
១០៧៧. ព្រះភិរុតផ្ទុំលើមណ្ឌល ទេព្វទិពនិម៌ល
បង្ហួស់ឯកភាត្រីត្រេក ។
១០៧៨. អស់ក្សត្រសេនាពលដេក លក់លង់នូវដំណេក
ដំណែងទិព្វទន់សុខសល់ ។
១០៧៩. លុះព្រឹកព្រះភិរុតនិម៌ល តើនតឿនវេល
សកលយោធាចេញចរ ។
១០៨០. នមស្ការមុនីនាថសាទរ ចំរើនឫទ្ធីពារ
សុរេចស្ដេចចរយាត្រា ។
១០៨១. សព្វសេះសារស្ទូរយោធា ភាជរថគជា
សន្ធឹកញាប់ញ័រប្រថពី ។
១០៨២. ស្និតស្លួនហុយធង់ធូលី អាប់អស់ទិសទី
មណ្ឌលអាកាសស្ងប់ស្ងែង ។
១០៨៣. អឺងអរខ្ចាយខ្ចរក្ដល់ក្ដែង លាន់ឮសព្ទសែង
គគឹកគគុកដាសដេរ ។
១០៨៤. ទៅទៀបមណ្ឌលបរិវេណ ព្រះគង់រូបគម្ភីរ[1]
រលកសមុទ្របីរំដែង ។
១០៨៥. ពុះពោរបោកបែកផ្កាត្រែង មុខគួរស្ងប់ស្ងែង
សន្ធឹកជាភាគរណី ។
១០៨៦. ព្រះលក្ខណ៍លើកករអញ្ជលី ដាក់ដល់សិរសី
បង្គំទូលព្រះរាមា ។
១០៨៧. បពិត្រសូមព្រះករុណា ស្ដេចទ្រង់ចិន្តា
នូវព្រះទិព្វញាណចក្រី ។
១០៨៨. នាព្រះភិរុតគ្រងរាជបុរី ឈ្មោះហើយព្រះស្រី-
ភិរុតពុំពេញចិត្តសោត ។
១០៨៩. ហេតុអ្វីព្រះភិរុតដ៏ពិរោធ រិះរកកលក្រោធ
ក៏នាំសេនាពលញុយា ។
១០៩០. មកតាមព្រះអង្គនេះតំរូវ ប្រយោជន៍ជាសត្រូវ
ពិឃាតព្រះម្ចាស់ដេស្នា ។
១០៩១. បពិត្រខ្ញុំសូមក្រាបលា ចេញនឹងសេនា
យោធាភិរុតឫទ្ធីរឹង ។

(1) MBN : kuṃbhel
RIB : gambher

ពុំឈឺសម្តេចរាជា ។

១៧៤០- ខ្ញុំគិតនោះហោងខ្ញុំណា ព្រះរាជសីតា
ខ្ញុំផ្ញើនៃព្រះចរណី ។

១៧៤១- ខ្ញុំមករកព្រះចក្រី ពោះខុសតាប់ក្តី
ពុំចេះនូវព្រះករុណា ។

១៧៤២- ស្រេចព្រះប្រើព្រះអនុជា រករាជសីតា
សម្តេចបរមទេពី ។

១៧៤៣- ព្រះអនុជរត់រកមហេសី សព្វស្ថានប្រក្រតី[1]
សីតាបតិត្រវៃងកប់ ។

១៧៤៤- បើកញ្ជូរព្រះកុដិធូលគ្រប់ បន្ទំព្រះតិរអគ្គ
ពុំយល់សម្តេចទេពី ។

១៧៤៥- ស្រែកហៅថៃាព្រះមហេសី ព្រះរៀម[2]នរបតី
បីស្តេចវិលមកហើយណា ។

១៧៤៦- ពុំឮសព្ទរាជសីតា ទើបផ្ចានព្រះជេស្ឋា-
ធិរាជទូលស្លាប់ៗយំ ។

១៧៤៧- ឯងនោះព្រះលក្ស្ម ស្តេចជាក់ក្នុងជ័បត្តុំ
លើកអញ្ជលីជ័ប្រណម្យ ក៏ទូលព្រះរៀមនៃភាមា ។

១៧៤៨- បតិត្រខ្ញុំទៅ ស្រែកហៅព្រះរាជសីតា
ពុំឮសព្ទសូរមធុរផ្លា ក៏ផ្ញើយសង្វេសនៃខ្ញុំសោក ។

១៧៤៩- ស្រែកហៅជោយប្រជតី គិរីព្រៃជ័កម្លោត
ពុំឮសព្ទមហេសីសោត ស្រែកហៅវឹងសូន្យស្ងាត់ ។

១៧៥០- រកនាអាស្រម ត្រណាបន្ទំព្រះតិរក្សត្រ
ពុំយល់ព្រះទេពីរត្ន នៅអាស្រមនោះក៏ស្បើយណា ។

១៧៥១- ស្តេចស្តាប់ព្រះអនុជនៃ ក្នុងព្រះហឫទ័យរន្ធត់ដាប់ឆ្លូ
ក្សិណខ្ចាយព្រះនេត្រជ័ធារា[3] ក៏ឃ្លាសវិល្បងជ័ពេញពាស ។

១៧៥២- ឱះឱសីតាមេជា ពីងាហងម្តេចស្បើយប្រាស
ឱមេត្រលីងមាស ម្តេចស្បើយប្រាសពីបងទៅ ។

១៧៥៣- ឱះឱមេជ័ប្អូនស្រី ប្រក្រតីសព្វថ្ងៃនៅ
ម្តេចស្បើយមេប្អូនពៅ ប្រែប្រាសទៅឥឡូវណា ។

១៧៥៤- ឱះឱរូបមេប្រសើរក្រៃ ស្រីកាំងក្រៃគតពស្លឹក
កាំងកូវទសទិសា ពុំអាចបីស្មើបាន ។

១៧៥៥- ឱយើងនេះអង្គបី ចេញវៃងស្រីអយុដ្យាជ័ពិមាន
ម្តេចស្បើយឥឡូវមកនៅស្ថាន នេះហោងឥឡូវប្អូនបាត់ ។

(1) RIB : sabv thṅai prakratī
(2) RIB : braḥ rām
(3) RIB : ksiṇ khcāy yal' chṅay braḥ netr ṭă dhārā

១៧៥៦- ឱសមមានទេវា　　បងនឹងប្អូនស្មើនិលរត្ន
បំភាសសង្ហារគេឲ្យព្រាត់　　អន្តរាយស្នេហ៍បីម្ចាស់បង ។
១៧៥៧- ទើបមកដល់ឈើងហោង　　ប្រាសស្នងជីវិតអង្គ
ក៏អន្តរាយស្នេហ៍បង　　តំណួរនេះពុំយល់ប្អូនដ៏ល្មើយល
១៧៥៨- បងចាំកេសីបីខ្មៅញាប់　　ប្អូនក្រសោបចាប់ចងនូវក្ដា
កែមដួតប្រេងតម្ពាណ　　អស់ក្ដាសារពេញក្លិន ។
១៧៥៩- បងចាំនាសា　　បីដូចពពិលមាសមានលៃរស្មី
ដូចព្រះចន្ទ្រពេញដីបូណ៌មី　　ពោកីយយល់ពន្លឺក្រៃ ។
១៧៦០- បងចាំចិញ្ចើមទ្រង់ល្អ　　បីដូចចង្កូយកោងធ្នូជ័យ
កោងស្រួលម៉ត់ក្រៃកាលនៃ　　ព្រះពិស្ណុការកាន់ក្បួរតំរង់វាស
១៧៦១- បងចាំនាកាំង　　សំស្ដួលសោភាបីដូចភ្លឺមាស
ពាក់តាំងរត្នអភិកាស　　ប្រសើរវៃវង់រត្នអំពល់ជង (1)
១៧៦២- បងចាំព្រះនេត្ររង្គស្លា　　រូបរាងប្រពាឡរត្នដ៏កន្លង
ចាំនាសាសស្ដួលមូលតតត្អង　　ពុំនស្មួងដ៏ល្មើយលៃ ។
១៧៦៣- ចាំធ្មេញខ្មៅជិត　　ដូចអ្នកប្រកិតនិលរត្នថ្លៃ
បងគន់សំគាល់នៃ　　អំពាលរូបដ៏ប្អូនបង ។
១៧៦៤- បងចាំសិរប្អូនជិត　　ក្រៃពេញស្រលិតឈ្មើងខ្ញើរដ៏ក
វារខ្វែកសិរបុរនោះដ៏បីដង　　មួយលៃខ្វះដ៏ង ។ បំព្រងទុំ ។
១៧៦៥- បងចាំចង្កេះមួយក្ដាប់　　ក្រសោបចាប់ព្រះហស្ដទុំ
ដោះរូវវែង ទន្លាប់មាសទុំ　　បីជិតស្រទាប់ផ្កាប់ល្មើនៃ
១៧៦៦- បងស្រណោះប្អូនបង　　ធង់ស្រីតយកក្បួរអធិកប្រសើរលៃ
ប្អូនប្រើបងតាមអស្រីតនៃ　　ប្អូនធង់អស្រីតដ៏រេខា (2)
១៧៦៧- បងកាន់ត្អូរសរទ្រង់　　ដោយធំណាប់ប្អូនស្នេហា
តំណួរនេះបានអស្រីតា　　ដោយធំណាប់នៃប្អូនស្រី
១៧៦៨- ស្ដេចសោយសោកានល　　ស្មើរនឹងដាច់ខ្យល់សម្ដេចនរបតី
បំរះព្រះអង្គដោយប្រធពី　　នន្ទៀលប្រមៀលពីដោយពៃ
១៧៦៩- ឈឺក្ដៅព្រះអង្គរន្ធត់　　ពុំត្រង់ធំប្រើប់ព្រះហឫទ័យ
ដូចនូវមរដូចនូវក្ស័យ　　ឈឺក្រៃសែនដ៏សោតសល់
១៧៧០- ស្ដេចសោយសោកា　　មហិមាពីតតដល់
បរប្រាសទេពកមល　　ប្រសើរព្រះអង្គម្ចាស់ ។
១៧៧១- ពីរ (3) ព្រះដោះដាលឡើងង្វាត់　　តាមទេពីរត្ន
អស្សរក៏លួចចេញចរ ។
១៧៧២- វរការ ពានព្រឹក្សាករ　　តតឈប់តតឈរ
ព្រះអង្គសង្ខាតយាត្រា ។

(1) RIB : kambal phaṅ
(2) RIB : ṭă rekhā
(3) RIB : bt

១៧៧៣- លេចទៅព្រៃពានលើបព្វតា ធ្លាក់ធ្លាយសិលា
រន្ធត់ក៏រងដែនធរណី ។

១៧៧៤- ក្នុងព្រះឋាឫទ័យនរបតី ក្រោធដូចអគ្គី
ក៏ឆេះសុមេរគិរីត្រី ។

១៧៧៥- ស្ដេចចរន្លាងខ្លាយនេត្រា ឈឺរាងពនិតា
ឋាឫទ័យព្រះអង្គរួលក្ដៅ ។

១៧៧៦- ដោយព្រៃទុរគមត្រើចទៅ ទាំងពីរព្រះចៅ
ស្រងាត់ត្រមោចសោតសល់ ។

១៧៧៧- ស្ដេចសោយសែនសោកានល សែនទុក្ខសោកសល់
ដោយថ្មើរមាងព្រៃភ្នំ ។

១៧៧៨- ឮសព្ទស្នូរសត្វនងយំ លន្លង់ទុរគម
សម្ដេចនារាយណ៍ធិបតី ។

១៧៧៩- ស្ដេចរត់តាមរាជទេវី ដោយតេជឫទ្ធី
កម្លាំងពីរក្សត្រដ័យដែង ។

១៧៨០- ក្បិរណាតើបលើក្រុងស្ទប់ស្ដែង យល់ឈាមក្រាលស្ដែង
ទៅក្រវែងសមុទ្រជលសា ។

១៧៨១- ព្រះដណ្ដឹងបៃហាក្រុងត្រងា មោះមានអ្វីជា
សត្រូវប្រយុទ្ធអធិកក្រៃ ។

១៧៨២- ក្រុងត្រុទស្ដាប់ព្រះបន្ទូលណែថ្លៃ ស្ដេចត្រាស់ដណ្ដឹងហៃ
អំពីអាធិក្ដីអង្គឃោង ។

១៧៨៣- ក្រុងត្រុទទូលព្រះរឹងស្នង បតិព្រតព្រះជ័កន្លង
ប្រសើរជ័ពីរភាសា ។

១៧៨៤- បតិព្រតនាគរាជសីតា មនតីភពអសុរ
ក៏នាំនាងនាជជ័មកក្លង ។

១៧៨៥- ដោយទៀតហាអាកាសស្ទួង ពះលើខ្ញុំហោង
ក៏ខ្ញុំយុទ្ធជងអសុរា ។

១៧៨៦- ខ្ញុំកាងស្លាបខ្ញុំមហិមា រាពណ៍ផ្លែងសរខ្លា
ក៏សរត្រុំដល់ខ្ញុំម៉ាយ (1) ។

១៧៨៧- ខ្ញុំបោះស្លុះស្លុសខ្ចាត់ខ្ចាយ ណាញរងអន្តរាយ
ត្រាត់ព្រាយពាជីនិរនាស (2) ។

១៧៨៨- រាពណ៍រឹងផ្លែងសរជេរដាស សរពេញអាកាស
ពុំអាចបិទមកដល់អង្គ ។

១៧៨៩- ឈ្មះរាពណ៍ហូតចក្រទំរង់ ពីព្រះឋាស្ដុទ្រង់
សីតាស្រីរត្នប្រសើរក្រៃ ។

(1) RIB : bum̤ ṭal' khñum̤ nai
(2) RIB : nīs nās

១៧៩០- ទៅក្រុងវិទ្ធិ អបរាជ័យ ហេតុឫទ្ធិស្ដេចនៃ
កម្ពុវិទ្ធិលុះមរណា ។

១៧៩១- ស្ដេចស្ដាប់ក្រុងគ្រុឌរាជា ថ្លែងដើមមាត្រា
ក៏ឈឺព្រះអង្គឯងហោង ។

១៧៩២- ស្ដេចបើកព្រះឱស្ឋស្បូវសង ថ្វាយព្រះកន្សែងដង
ជតាយុរាជអាណិតក្រៃ ។

១៧៩៣- ថាជតាយុមានគុណក្រៃ ឥតឯស្មើនៃ
បីអាចនឹងសងគុណណា ។

១៧៩៤- អញនឹងជូនព្រះស្ដេងឲ្យដល់សួគ៌ា បរិវារកញ្ញា
សម្បត្តិប្រាសាទរូតរត្ន ។

១៧៩៥- ក្រុងគ្រុឌស្ដាប់ព្រះបន្ទូលក្សត្រ ស្រេចហើយមរទ្វាត់
ទៅកើតនាសួគ៌ាល័យ ។

១៧៩៦- បានដោយបារមីបន្ទូលថ្លៃ សម្ដេចជេស្ឋជ័យ
អំប្ញូរតថាគតណា ។

១៧៩៧- ស្ដេចលើកសពក្រុងជតា- យុល្បះសួគ៌ា
ពិមានពិភពសម្បត្តិ ។

១៧៩៨- ស្ដេចសោយទុក្ខសោកច្រើនក្លាត ពីរព្រះអនុជក្សត្រ
ក៏ស្ដេចសង្វាតយាត្រា ។

១៧៩៩- ដោយព្រៃទុរគមអន្ធា ទុកភាពយាត្រា
ក្រទើនតាមព្រះភាជនេតិ ។

១៨០០- កាប់យល់យក្សយប់តិរិយ ស្រែកហៅនរបតី
សន្លាប់នឹងសត្វហៅបាន ។

១៨០១- ព្រៃនេះជាបុរីស្ថាន ទោះយោបីមាន
សត្វអម្រឹកយប់ឃ្លងណា ។

១៨០២- អាចមកដើរក្នុងសីមា អញនឹងតោក្ដា
ជុំអែតខុទរអញហោង ។

១៨០៣- កម្ពុវមឹងពីរមកក្ដិង កាប់អញជប់ហោង
បរិភោគនៃមនុស្សពិសា ។

១៨០៤- ទោះពីងធ្វើចិត្តក្រោធា គោះរឹងអបរា-
ជ័យពីងអញពោកបិរាយ ។

១៨០៥- ដងនោះព្រះពិស្ណុពង្សនារាយណ៍ ភ្លាស់ឆ្លើយអភិប្រាយ
ព្រះឱស្ឋព្រះស្នូរទៅវិញ ។

១៨០៦- ឱ!យយក្សយប់យសតិរិយ មិនធ្លាប់បាប់ស៊ី
អម្រឹកសព្វថ្ងៃតោក្ដា ។

១៨០៧- មិនជុំជីវិតឫទ្ធិចេស្ដា យើងពីរភាជា
ពន្លឹកខ្ញុំភ្លើងកល្បក្រៃ ។

១៨០៨- មិនស្លូតប្រក្លូតគាំង ពុំនឹងខ្លួនក្ស័យ

តិប្បូវនេះហៅដួលនៃស្ដេច ។

១៨០៩- ក្រុងកពន្ធ[1] ខេរវីងខាស់ខ្វេង ស្រែកស្រួលនូវតំរែញង
សន្ធាប់សំដេងភាជា ។

១៨១០- កាងធូលជាប់ព្រះបាទ ព្រះយាស្តភាជា
ក៏កាច់ដង្កូមយក្សបាក់ ។

១៨១១- ស្ដេចជីស្ដេចជាន់ស្ដេចផាក់ ស្ដេចច្រានស្ដេចចាក់
ស្ដេចហែកទុះវាយជោះបង់ ។

១៨១២- ឈាមហូរជ្រោះជ្រោកផ្កាយង់ ដោរជន់លិចលង់
រូបានសមុទ្រជលជី ។

១៨១៣- ស្ដេចស្ទាញខ្លួនយក្សនូវឫទ្ធិ តាំងព្រះនរបតី
វិតីងចេរចរយាត្រា ។

១៨១៤- ជងនោះតាំងព្រះភាជា ត្រេចត្រៃត្រីក្សា
សំបាកគោកយ៉ាកព្រះអង្គ ។

១៨១៥- ក្សិណាកុកយល់ព្រះតាំងពង្ស ហើរចុះធូលក្ដូប់
បង្គំនរេន្ទ្រនរបតី ។

១៨១៦- បតិត្រនាងនាជមហាសី ជាយានរបតី
ក្រុងភាពងងហៅយកទៅ ។

១៨១៧- នាងតក់ក្រូងនាងប្រាលស្ដៅ ខ្ញុំញយំស្រែកហៅ
នាងផ្ទាំងនៃយើងខ្ញុំហោង ។

១៨១៨- ប្រើខ្ញុំទូលព្រះអង្គជង ប្រើស្ដេចផ្លែងដ្ឋង
សភាពិសពាន់តាមនៃ ។

១៨១៩- ព្រះលក្ស្មណ៍ស្ដេចខ្លាល់បាប្ធទ័យ ហៃហាកុកបិទចង្ប្រែ
ស្ដេចឆ្ងើងចដើងពុតា ។

១៨២០- ម៉ឹងរឺងជីកអាហាររោកា ដោយស្ទឹងបីងណា
នោះឡាប់កំណើតនៃហង ។

១៨២១- កុកស្ដាប់ព្រះអនុជក្រោងផ្គង ដៀលអាត្មាហោង
ក៏សងវាចាវិងតិះ ។

១៨២២- ហៃហាក្សត្រតាំងតតចំណោះ ស្ដេចឡើយមកតិះ
នៃយើងជាផ្លួសាមាន្យ ។

១៨២៣- អញមានបុរិរម្យស្ថាន បរិពារជងមាន
ផ្សារយើងជាសត្វបក្សា ។

១៨២៤- ខ្លាចឯព្រះអង្គឯងណា មានភាជសីតា
តែមួយជាភាជទេតី ។

១៨២៥- រហោតុពាលស្រាលតុំចេះក្ដី ជាញ់កលអសុរី

(1) MBN : kruṅ khbaṅ
RIB : kruṅ kumbandh

ឲ្យយក្សយកទេវីបាន ។

១៨២៦- នេះហោងហោរដូរសាមាន្យ ស្ដេចមកទៀលប្រាណ
នៃយើងជាសាមាន្យណា ។

១៨២៧- ជឹងនោះសម្ដេចព្រះរាជា ស្ដាប់កុកបក្សា
ទៀលត្រូវព្រះអង្គហើយនៃ ។

១៨២៨- ស្ដេចត្រិះរិះព្រះហឫទ័យ ដោយប្រាជ្ញាវៃ
នាពាក្យកុកនេះនៅឆ្ងាយ ។

១៨២៩- ផ្លាញកុកនេះឲ្យអន្តរាយ ពុំមានសព្វសាយ
សំដីនេះហោងឡើយណា ។

១៨៣០- ស្ដេចទាត់កៅទណ្ឌដល់ជា ញ័រដែនពសុធា
ពន្លូកពន្លឹកសព្វព្រៃ ។

១៨៣១- បក្សីយល់ព្រះជេស្ឋជ័យ ឫទ្ធិព្រះលើសាគរ
ភិតភ្លាចខ្លួនក្ស័យលុះជីវរ ។

១៨៣២- ក្រាបទូលព្រះបាទជ័យវរ បពិត្រព្រះបាទភូធរ
អញខ្ញុំសុំណាទោសណា ។

១៨៣៣- ខ្លួននេះជាសត្វបក្សា ដូចខ្លៅឯងឯណា
ប្រមាថលោកបានបារមី ។

១៨៣៤- ទោះស្ដេចនូវយកទោសក្ដី ឱនថ្វាយសិរសី
ក៏យកជីវិតទូលហោង ។

១៨៣៥- បើព្រះករុណាខ្ញុំឯង បារខ្ញុំមាសសង
គុណស្ដេចទុកខ្ញុំរស់នៃ ។

១៨៣៦- នាអង្គអញខ្ញុំសព្វថ្ងៃ អនេកបីជាប្រៃ
ភាព្វទុបទ្រពណា ។

១៨៣៧- ព្រះអង្គនឹងចាប់លង្កា នាថ្ងៃណា ៗ
ព្រះអង្គប្រមាណអញខ្ញុំ ។

១៨៣៨- អញខ្ញុំហើរជាបីជុំ បន្ទាយលង្កាធំ
នោះសូន្យលង្កាអន្តរាយ ។

១៨៣៩- ស្ដេចស្ដាប់កុកទូលអភិប្រាយ ហឫទ័យស្ដេចរសាយ
ក៏ពុំចងទោសបក្សា ។

១៨៤០- ព្រោងកាលទូបរយុគា នារាយកាណា
ក៏រាមទេពចុះមកគង់ ។

១៨៤១- នូវទសិរដែងជេស្ឋព្រះអង្គ ថ្ងាញ់អសុរបង់
ជំរឿនជ័យទេពឫសី ។

១៨៤២- ព្រះតីរព្រះអង្គនរបតី ប្រាសព្រះទេវី
ពិសោធពិសុទ្ធសុន្ទរ ។

# កណ្ឌ ទី១២

១៨៤៣. ព្រះបន្ទូលព្រះអនុជពានរ ឮដីព្រៃពនន្តរ
នេះមានមហិង្សាយុទ្ធជ័យ ។

១៨៤៤. នាស្ពានបោមពានព្រះព្រៃ ដុងដោយឈើងវៃឈ
អធិកយោនយានសាយសម ។

១៨៤៥. គ្រៀកក្រោចកគ្រៅភ្លុលកើតជំបង់ដ៏លាស់សម
ពោធិពៃររបតីប្រណាម្យ ដ៏ទេពាធិបតីយោង ។

១៨៤៦. មានជាតិបុស្សបុស្សនាគស្សូរតីអញ្ជ័នផង
ក្រស្នានូវចន្ទមង - ឃុតទងលតាដ៏លាយលាស់

១៨៤៧. ក្រូចក្រាយបុស្តៅស្ទៀវស្រគំគុយក្រសាំងក្រាស់
ពេកាស្ការដ៏ឆ្លូកឆ្លាស់ វិរ្លិលដោរពានាលី ។

១៨៤៨. អនេកព្រឹក្សាករក្បុម្ភអតិរេកអនេកដ៏ដោរភ្រី
បក្សីពានានូវភ្ជុមរ ភ្ជុមរាពីណាសលោង ។

១៨៤៩. ប៉ឹងបុងដ៏ជ្រៅជ្រោះជ្រលងជង់ច្រូរឆ្ពៀរឈ្វង
សព្វសត្វដ៏ត្រែតែង បន្លឺងបណ្តើរយៅយគ្នាយោង

១៨៥០. ៗព្រព្រះយោមពានលន្លង់[1] ជារឿយស្រណុកសាយសាន្ត
សាន្តអើយតំរេកសត្វផង មុនមាន[2]មហិង្សាកាដក្រើសឃ្លង
បរទេសពាលជង សាន្តអើយអនេកសំខ្យា ។

១៨៥១. ជងនោះមហិង្សរាជ ជាតិជាញនូវអំណាច
ពីរេង្គនូវពលមហិមា ។

១៨៥២. វុំរក្ស[3] មហិង្សដ៏តណាត សល់សែនសំខ្យា

(1) RIB : anlaṅ'
(2) RIB : mun mān
(3) RIB : rīem raks

អនេកនូវពលបរិវារ ។

១៨៥៣. មានគេជជាញដល់ជីទុការ    រកភានបីរមាល
គជេន្ទ្រនូវសារសិង្ហសីហា ។

១៨៥៤. ដើរត្រេជសឹងញ្យប្រែភារី    សព្វសត្វប្រជិពី
រូភ្លឹកអំណាចស្ទប់ស្មែង ។

១៨៥៥. ដ្ឋាញ់អស់ទានពាដងស្តែង    គេជោជ័យដែង
មហាពន្លឹកមហិមា ។

១៨៥៦. នាមហៅមហិង្សភាជមហា -    ឈោរឈៅសោះសា
មនោមានះទ្រើសឃ្លង ។

១៨៥៧. ពោះកើតបុត្រឈ្មោលសព្វជង    មហិង្សជនកលង
មកបៀនជីវិតបុត្រឯង ។

១៨៥៨. ដោយនៃផលកម្មនូវបង្វែង    ហេតុលោភវង្វេង
នូវកាមតណ្ហា ។

១៨៥៩. ឯងនោះមហិង្សពនិតា    កើតបុត្រមហិង្ស
គឺនាមបីហៅទូភី ។

១៨៦០. ជននីនាំសុខសព្វគិរី(1)    ទូរដៃព្រៃពនាលី
ក្រវើនបំពួនបាត់ម៉ាំង ។

១៨៦១. នៅក្នុងព្រៃត្រែវក្រាស់ក្រាំង    ធំពេញកម្លាំង
លលៀបលលបគោក្នា ។

១៨៦២. បរិភោគអាហារមហិមា    ដឹងដើមមាត្រា -
នុភាពរឹងឫទ្ធិបីប្រៃព ។

១៨៦៣. ស៊ីស្មៅបីវាលមួយថ្ងៃ    ដឹកទឹកបឹងបឹ
បីដឹករហូតយល់ជី ។

១៨៦៤. នាមហៅមហិង្សភាជទូភី    ជណ្តឹងភាជជននី
នូវអំណាចព្រះភ្ជុមា ។

១៨៦៥. អញខ្ញុំនូវសូមបំពើព្រះបិតា    នបមទុមាទា -
រតិន្ន(2) ជនកសព្វថ្ងៃ ។

១៨៦៦. សូមព្រះករុណាខ្ញុំនៃ    ខ្ញុំនូវបង្អស់មាឫទ័យ
ទម្លុលទម្លន់ព្រះបិតា ។

១៨៦៧. ពោះបីមានសត្រូវពាធា    ឯវាខ្ញុំអាសា
ពុំឲ្យទុរយសព្រះតនូ ។

១៨៦៨. ជននីឆ្លើយដោយចិត្តភ្ជូ -    ធរភាជតស៊ូរ
មនោមានះទ្រើសឃ្លង ។

១៨៦៩. ពុំរកអនុកូលឡើយហោង    បុត្រឯងនោះហោង

(1) RIB : jananī nām santagirī
(2) RIB : pādā rū bin

បីសីងបំបាត់និស្វល ។

១៨៧០- ទូភីគិតខ្លួនទុរពល បីត្រូអាលខ្វាយខ្វល់
បំពួនអាត្មាឯងហោង ។

១៨៧១- ទូភីធ្វើសទារ[1] ជំឃ្លង ដើយប្លួយហោតលង
កំលោះកង្លុំងសោះសា ។

១៨៧២- ជ្រងជ្រួយឆ្កះឆ្កើសបញ្ចូតា ធ្លាក់ធ្លាយសិលា
រលើងទាំងព្រឹក្សាករ ។

១៨៧៣- ញូតេជតេជោជ័យខ្វុរ ទូរទីវខ្លារខ្វុរ
កក្រើករំពើកប្រឹថពី ។

១៨៧៤- ញូដល់ជនកទូភី ដាលក្រោធដូចអគ្គី
មហាមហិម្សដើររក ។

១៨៧៥- ដើយប្លួយជងខ្យល់ផ្ទួចផ្ទក សញ្ចសត្វជងជ្រក
កំខ្លាចកង្លុំងមហិម្សា ។

១៨៧៦- មនគីអញ្ចនាមមហិម្សា- ស្ទួរមានចេស្តា
មហាពន្លឹកជ័ទុទារ ។

១៨៧៧- ក្សិណនោះមហិម្សរាជរុកវាន ដើរត្រេចត្រប់ស្ថាន
សំនៅនៃបុត្រអាត្មា ។

១៨៧៨- ឃើលយល់ទូភីមហិមា រូបរុងគិរិន្ទ្រ
មហាពន្លឹកជ័ទុទារ ។

១៨៧៩- ដើរដោយដងឮរគ្រោះទារ[2] ដើយប្លួយថ្លួយទ្វា
ជជ្រួយជជ្រងបិតជី ។

១៨៨០- ក្សិណនោះមហិម្សរាជឫទ្ធិ ទូលក្មានទូភី
បីពោលនូវពាក្យឃោរឃោង ។

១៨៨១- ថៃបុត្រមឹងទុទារ[3] ធ្វើឃ្លង លេះអាចមកលង
នូវឫទ្ធិអញនេះតិច្ឆូវ ។

១៨៨២- លេះពីងអ្នកអាងឥទ្ធ ស្មើយកអាយុកូវ
មកជូនដល់ម្រឹត្យូវរាជ ។

១៨៨៣- ពោះពីងតុំភ្លឹកព្រះអំណាច អញនូវភ្លួលឲ្យខ្លាច
អំណាចនៃអញកុំបីលង ។

១៨៨៤- ក្សិណនោះទូភីគឺជ័ទ្រង់ - ឫទ្ធិក្រាបលុតជង្គង់
បង្គំប្រណម្យបិតា ។

១៨៨៥- ទូលក្រុងមហិម្សរាជមហិមា សូមព្រះមេត្តា
ករុណានៃខ្ញុំនេះតិច្ឆូវ ។

(1) RIB : dāru(ṇ)
(2) RIB : ṭaṅ dhvā jroḥ dhvā
(3) RIB : dāru(ṇ)

១៨៨៦. ខ្ញុំជាបរិចារព្រះគូ- ចររាជតានៅ
បំរើព្រះបាទសព្វថ្ងៃ ។

១៨៨៧. សូមបានស្ពានមួយអាស្រ័យ ដោយតានាល័យ
ដ៏ព្រៃពានន្តរហោង ។

១៨៨៨. ក្បូរណោះមហិស្សរាជរឹងចង ចិត្តរឹងរឹងស្អង
ក៏ពោលនូវពាក្យអាស្រូវ ។

១៨៨៩. លេះមីងលបណាក់ខ្លួននៅ ចងជាសត្រូវ
នូវអញដ៏ជាបិតា ។

១៨៩០. មីងពីងពួនព្រៃព្រឹក្សា ព្រោះព្រកបញ្ចូតា
ដ៏ជាលំនៅសព្វថ្ងៃ ។

១៨៩១. លុះមីងរុងរូបស្កឹមស្ទៃ មីងចង់លងជ័យ
ពិជ័យនៃអញមហិមា ។

១៨៩២. ពីងពាលពាលោលោហា លេះនាំមាត្រា
អាយុមកស៊ូនស្រីត្បូវ ។

១៨៩៣. អញនូវថ្លាញឲ្យអស់តនូ កណ្តាលរណភូ
ឫទ្ធិនៃអញស្រួចស្រាប់ ។

១៨៩៤. ស្រែចក្រុងទូភីស្ដែងស្លាប់ ជនកឃោរក្រៅធ្លាប់
នូវចម៌អសត្យមេត្រី ។

១៨៩៥. មកបៀតបៀនបុត្រឯងក្ដី ដោះគឺអសម្ពី
រង្វើងដោយពិសកាមកាច ។

១៨៩៦. ទើយទើយទូភី មិងស្ទួតឫទ្ធី
កន្លងលោកា អញនឹងពិឃាត
ឲ្យមីងមរណា កណ្តាលព្រឹក្សា
ឥឡូវនេះហោង ។

១៨៩៧. ទូភីលេះក្រេវក្រោធ មានះរឹងសោត
ប្រែប្រាណធ្វើសឃ្លង អាណាមានតុត
ឲ្យមរនេះម្តង រំលងឈ្មោះមានក្រង
តាំងតួងនេះណា ។

១៨៩៨. មហិស្សរាជ មានឫទ្ធិអំណាច
មានះសោតសា តណ្ហាហោហាន
ប្រកួតពាជា កូនឯងសិងជា
ជាធំធ្វើសឃ្លង ។

១៨៩៩. មោឃាមុះទុរជន កិលេសពេកពន់
ពុំពោលពាក្យស្នង ភ្លេចភ្លាំងវង្វេង
តារុណាធ្វើសហោង បណ្តាលចិត្តចង
ពៀរភ័យឃោរឃៅ ។

១៩០០. ទូភីគិតខ្លួនទុរពល ជនកតតាចមិនសល់

ស្រវឹងដោយពិសកាមរាគ ។

១៩០១ - ពេញពល(1) ពាលោភអំណាច ពុំក្រែងពុំខ្លាច
ពុំអាចពុំអាសូរបុត្រ ។

១៩០២ - អញនូវណាលងធ្វើយុទ្ធ(2) ពោះអស្ចារ្យទុ -
ក្លាតបរអំពើអ្នកយោង ។

១៩០៣ - ទាំងពីរសឹងទ្រើសទារឃ្នង(3) មហិង្សរជនកលង
ឫទ្ធានូវទូតីបុត្រ ។

១៩០៤ - ប្រតិរព(4) ផុលសមនូវប្រយុទ្ធ សឹងស្រឹង្គស្រួចមុត
គឺពេជ្រនូវពេជ្រផ្កាញផ្កា ។

១៩០៥ - រុងរូបផាត់ជំមហិមា រូបសុមេរគិរិត្រា
ដ៏ពីរកណ្ដាលប្រថពី ។

១៩០៦ - ពុំងពាត់ពុំយល់ស្មើ កក្រើកអស់តិ
ស្លុតសោប្បសព្រហ្មស្ដើល ។

១៩០៧ - ព្រះចន្ទ្រព្រះអាទិត្យឈរមើល ឃ្លាតឬក្សដំណើរ
នាទីពុំដូចសព្វដង ។

១៩០៨ - ប្រយុទ្ធពីប្រថមោទ័យយោង លុះប្រថមត្រង់យោង
ក៏ដ្ដួលឯនកនោះមារ ។

១៩០៩ - ឃ្មានអស់មហិង្សានិករ ទូតីម្លួតអរ
បីសេពានូវសុខបរិពារ ។

១៩១០ - ខ្លួនក្លោះខ្លាំងខែងឧទារ ដើរដោយនូវរពាល
កដេន្ទ្រឃ្លាសារសិង្ហសីហា ។

១៩១១ - ស្សូរសព្ទរូវៃសនអសនី ថ្លាស់ប្រេះប្រថពី
កគឹកកាំងព្រៃព្រឹក្សា ។

១៩១២ - ចតុដង្ស៊ៀឈរឈានយាត្រា រូបស្ដម្ភសិលា
មហាគិរីបព៌ត ។

១៩១៣ - ទីក្រចកដូចរត្នមរកត ផាទាច្រំច្រត់
រន្ធត់ទាំងមហាប្រថពី ។

១៩១៤ - រីទ្វេស្រឹង្គស្រួចរូសូលី មេសក្តិសូលពី(5)
សម្ដេចព្រះតស្សូរសារ ។

១៩១៥ - ហិតមហាជិវ្ហាព្រាយពណ៌ា ជ្រួចជ្រួលអំពាល
អណ្ដាតព្រះភ្លើងភ្លឺក្រៃ ។

(1) RIB : bīṅ bāl
(2) RIB : dhvoe dhammayuddh
(3) RIB : dāru(ṇ) ghnaṅ
(4) RIB : pratibal
(5) RIB : rī dvār sriṅg sruoc sūlī
mer sak sal' bī

១៩១៦- នេត្រស្រាលដូចសុរិយោទ័យ រស្មីច្រាស់ថ្ងៃ
ពន្លឺកទាំងទសទិសា ។

១៩១៧- កកាយមុខមកវាតា ដូចព្យុះព្យោមា
ពន្លកពន្លឺកផ្ទើងផ្ទៃង ។

១៩១៨- ឧត្តុំង(1) កាមកាយយល់ស្នែង រូបរុងរូកំពែង
កំពស់កំពូលបព្វតា ។

១៩១៩- រុករានរត់ដេញម្រឹគា ម្រឹគីព្រាត់គ្នា
សោក្តាអាហារពុំបាន ។

១៩២០- ព្រាត់គូព្រាត់គោត្រព្រាត់ស្ថាន ព្រាត់សុខព្រាត់សាន្ត
លំនៅទីថៃព្រាត់ផាត់ ។

១៩២១- ស្ថានគោចរាសិង្ហសីហាស្វាត់ ភាត់ភាយខ្ចាយខ្ចាត់
ក៏ដេញនូវគេដឫទ្ធិរឹង ។

១៩២២- ត្រេចត្រាច់បាច់ម្រឹគដែលនឹង សំដៅទៅបញ្ចូលវង្គ
អ្នកមានឫទ្ធិសិទ្ធិសក្តិ ។

១៩២៣- ដល់ភ្នំច្រាំច្រាការផ្ទាក់ ភ្នំជាភ្លាយធ្លាក់
រលំរលើងព្រឹក្សា ។

១៩២៤- អារក្សយក្សសិងអង្គា ពាក់ពីង(2) ព្រះមហា-
ឫសីសីលាសិំងឃាត់ ។

១៩២៥- ផ្លាស់ផ្លើយនូវក្តីសារសត្យ ថ្លៃងជាទៅធ្លាក់
ពៃភាខ្លួលកំពែងបមហិម្ព ។

១៩២៦- រមើលជាអ្នកស្វែងចរិយា ពីងភ្នំនេះណា
ជាស្ថានគោចរាប្រក្រតី (3) ។

១៩២៧- ចិរកាលកើតដំណាលប្រែចពី ពីដំណាលគិរី
កៃលាសព្រះឥស្សរស្ថិត ។

១៩២៨- ពុំដែលង(4) អាងអួតលងឫទ្ធិ ពុំដែលមានចិត្ត
ប្រមូលប្រមះសត្វផង ។

១៩២៩- ដាវៃយាយូភីមកពីងប៉ង បើពីងចប់លង
ឫទ្ធិជង់អ្នកដ៏មានចេស្តា ។

១៩៣០- អញ្ជូនូវពៃព្រះស្តែងលេណ ត្រង់ទេពជីតា
រក្សាមហាសាគរ ។

១៩៣១- អ្នកនោះឫទ្ធីមានប- រិពារពលវិករ
មករនូវនាគគណានា ។

(1) RIB : dan' dāṃṅ
(2) RIB : buok biṅ
(3) RIB : gohā braḥ kuṭi
(4) RIB : laeṅ

១៩៣២- ឮភីស្ដាប់ឫសីថា ទ្រង់ត្រាប់អង្វា
ដល់ទេពធីតាសាគរ ។

១៩៣៣- ព្រងព្រួយគង្គាខ្វាយខ្វល់ លាន់ឮស៊ុចគ្គែរ
រន្ធះទាំងទិសា ។

១៩៣៤- រលកដលខ្ទាត់ដល់អា- កាសកងសុរិយា
ចន្ទ្រាតារាភាំងភ្លាត់ ។

១៩៣៥- អស្ចារ្យរូវទ័រសព្វសត្វ មករនាគនាស[1]ស្វា
បំពាក់បំពួនអាត្មា ។

១៩៣៦- ខ្ទាប់ខ្ទះសាគរគង្គា ទាំងទេពធីតា
ក៏ភ្ញាក់អាត្មាផ្អាស់ផ្អរ ។

១៩៣៧- នាំអស់សត្វមិនសាគរ ហោមហាសាទរ
ស្ងាត់ពាក្យពោលពីងប្រាស្រ័យ ។

១៩៣៨- ចាវៃយាឮភីឫទ្ធិត្រៃ ពីងជាឯកង្គ-
សុភាស្ងៀតសត្វយប់ឃ្លង ។

១៩៣៩- ខ្លាញអស់សារសិង្ហសីហាឯង តព្វូវពីងប៉ង
ប្រូឬបប្រយុទ្ធសាគរ ។

១៩៤០- ព្រះសមុទ្រមានគុណជីបទិរ ក្រុងនាគស្ងៀមករ
អនន្តស្ងៀតនាគមឌ្ឍ ។

១៩៤១- ជាតិសូរអស់ឯគង្គា ស៊ីងបឹងឯងណា
អនេកនៃកោដិសែនសល់ ។

១៩៤២- សត្វសព្វភូមិភពមណ្ឌល មានសេពសុខសល់
ដីកល់នៃលោកប្រធាន ។

១៩៤៣- ពីងឯងភោគ្គាហើយមាន តព្វូវពីងឈុកឈាន
ស្ងួរយើងជ័មានគុណគាប់ ។

១៩៤៤- ចាវៃយាឮភីពីងស្ដាប់ អញ្ជើញលេណាប់
ទំរង់នគរយោមពាន ។

១៩៤៥- ទោះពីងស្វាញ់អ្នកនោះបាន ពីពីងមានស្ថាន
ប្រធានពាល្ពកស្ងួទេវតា ។

១៩៤៦- ធីងសុខយោមពានជាអា- ស្រ័យស្រានអាត្មា
ស្ងួទេពកញ្ញាស៊ុរស៊ុក ។

១៩៤៧- ពីងយកស្ថានយោមពានទុក ជាបុរីស្ថានសុខ
បន្ទែងព្រះសិម្មមហិម្ប៊ី ។

១៩៤៨- ក្សិណនោះមហិម្ប្រភងនោះលី- លាពៃលងដលធី
សំដែងទៅស្ថានយោមវា ។

(1) RIB : nāy

១៩៤៩- រុករានរត់លើបព្វតា  គ្រេចគ្រាប់សិលា
កក្រើកកម្មងមហាប្រថពី ។
១៩៥០- អឺអឹងគគឹកករូអគ្គី  ដេះកល្បកលី -
យុគយល់ពន្លឹកមហាវៃស្មង ។
១៩៥១- ហៅហៃហោមពានព្រះវិស្ណុង  ព្រះសមុទ្រអួតពីងវែង
នូវឫទ្ធិទារុ[1]មហិមា ។
១៩៥២- ធូរចេញអញនឹងអាលយាត្រា  ភ្លាញយសយក្សមហិម្សា
ជ័ទីងស្រីង្គាពិសពាន់ ។
១៩៥៣- ទេពារក្សសសិងមីលន់[2]  ខ្លាចខ្សិនទុរជន
មហាមហិម្បូរពាធា ។
១៩៥៤- ភ្លាស់ឆ្លើយសារសូមករុណា  ខៃហាទានពាដា
មហាឥស្សុរសត្រូជង ។
១៩៥៥- ពីងមកឥឡូវតើពីងប៉ង  យកសម្បត្តិក្រង
ឬមួយមកលងឫទ្ធ ។
១៩៥៦- រីសម្បត្តិដោយពីងប្រាថ្នា  រីងចេស្តា -
នុភាពពីងនោះយើងខ្លាច ។
១៩៥៧- រីអំណាចពីងគួរនូវអំណាច  យុទ្ធនូវពាលីរាជ
ទិរសសម្តេចតត្រា ។
១៩៥៨- នាមពាលីរាជទេវា  ចាប់ក្រុងរាពណា
អសុរសហ័សចាប់ចង ។
១៩៥៩- សោយសុខបុរីខាស់ខិនហោបី  រក្សាពានរជង
អនេកជ័វៃសនសំខ្យា ។
១៩៦០- មហិម្សាស្តាប់ហោមពានថា  រុករកយាត្រា
សំដៅទៅពានរងាយ ។
១៩៦១- អរម្ភួតដោយចិត្តពាលពាល  ឋាយសោតផ្លូចទុម្ភាយ
ព្រះបាទសម្តេចសាគរ ។
១៩៦២- សៅស៊ុចហោមពានបវរ  ពុំដឹងពានរ
ពន្លឹកគីភ្លើងកល្បកិន ។
១៩៦៣- បុរីគីជ័ហៅខាស់ខិន  ភិរម្យអចិន្ត[3]
ស្រណុកឥតឯឧបមា ។
១៩៦៤- ពាលីសោយរាជ្យនូវពា -  នរវៃសនសំខ្យា
នូវសក្តិនៃតេជោគុណា ។
១៩៦៥- ឆានទានពាមួយជ័ទារុណា  សេយ្យា[4]គីគុណា

(1) RIB : ṛddhi dāru(ṇ)
(2) RIB : debā raksas siṅ mī lan'
(3) RIB : bhiramy aciṇṇ
(4) RIB : sayā

នូវកម្លាំងមហិទ្ធិស្វា ។

១៩៦៦. ហោមពានមេគិរីទួល ពានរព្រៃមួល
នូវសក្តិនៃតេដោពុត ។

១៩៦៧. មកថ្កានពាលីបីជំហុត បីជង់ហើយចេញយុ.
ក៏ពោលពាក្យខំខាស់ហោង ។

១៩៦៨. ហៃហានពតីង់ថ្វើសឃ្មង ពីង់ម្លួតចេះចង
មានះអង្គម្តិស្វារ ។

១៩៦៩. ឈ្មោះអញគឺគ្រុងពានរ មានពូជពង្សស-
សក្តិសាយជ័ជំងាភ ។

១៩៧០. អញពុំនាំពលយោធា អញចេញមួយនា
សរិលជ័សមតីងងង់ ។

១៩៧១. អញហោងគឺជ័ហៅទូភី ដោយសុមេរគិរី
សមុទ្រក៏ជ្រួយជ្រិងងល់ ។

១៩៧២. ហៃពាលីវៃងសោតសល់ ចេញមកយើងនឹងដេ
កម្លាំងតប្បូវកុំបីលង់ ។

១៩៧៣. ហៃហានពតីង់ទ្រាំរង់ ពាលីហោងថ្លង់
តីងវៃងរូបព្រះភិមុខពាន (1) ។

១៩៧៤. លេះតីងបីមកឈុកឈាន ស្មើតីងនាំប្រាណ
មកជូនព្រះស្រីស្សួវហោង ។

១៩៧៥. អាណា(2) ទ្បើយមិញ ទូភីគឺអញ
ជ័មហិមា អញជ្រួយសមុទ្រ
គិរីកាណ អះអញហោងណា
គីនាមបីហៅទូភី ។

១៩៧៦. អញជ្រួយសមុទ្រ ត្រីជង់ស្លាប់ស្លុត
មនគឺជាតិ (3) នគរខាស់ខិន
ជាមានពាលី ចេញមកស្រដី
បីប្រយុទ្ធជ័មួយជង ។

១៩៧៧. ជាទ្បើយទូភី មនគឺអញពាលី
ជ័ក្រៃវៃងហោង អញកាច់កតីង
បីខ្ពួលមួយងង អញសោតកន្លង
កាច់ស្នែងគ្រវី ។

១៩៧៨. ជាទ្បើយក្របី មិនតុំពាន់ព្
តេជៃងពាលី អញយះខ្លួនតីង

(1) MBN et RIB : braḥ dhimukh bān
(2) RIB : ānāth
(3) RIB : măn gī dịk jāti

អញលើកអញលី ពែងតីងពាលី
នោះដ៏ខែងពុំទ្រែង ។
១៩៣៩. ជាទើយពាលី មនតីអញទូភី
ដឹងជាប្រពៃង(1) អញគ្រើយសាជស្ងួត
ពុំមានគិត(2)ខ្សែង ស្វាស្លាប់ពុំពែង
តប្បូវនេះហោង ។
១៩៤០. ជាទើយក្រុបី ដឹងពុំមានឮ
ពុំដឹងវៃឯបង អញកាជកតីង
បីស្ទួចជួយឯង ទើបអញមកលង
កម្លាំងនាមាន ។
១៩៤១. ក្រុងពាលីភាងហោបាន មួតមង្គតើងថ្កាន
ពុំខ្លឹកទូភីមហិមា ។
១៩៤២. ទើយទូភីតីងជាតិជា មហិម្បូនោះសា
ក៏ខ្ទួលសាពុកក្សិណាក្ស័យ ។
១៩៤៣. តាំងពុំដឹងដើមតេងវៃ ពង្សពានរវៃន
ត្រាកងប្រក្ចួតប៉ះបុញ្យ ។
១៩៤៤. អញឯងឲ្យអស់ជីពជន្ម តាំងពាលក្ស័យក្សិណា
នេះនៅតេងតេជោរស៏យ ។
១៩៤៥. ពាលីពាណោក្រោធវៃក្រ ហោះមិចមង្គឮ
មណ្ឌលមន្ទិរទឹងថ្វាត់ ។
១៩៤៦. ឡើងលើប្រាង្គប្រាសាទសត្ត- រួតរម្យភាយរត្ន
កញ្ចាន់កញ្ចក់មាលមាស ។
១៩៤៧. ពាន់ពាក់ពក្ត្រា(3)ពាពាស ក្រោងក្រោយឯរាំឯរាស
រលេចរលង់ឡើងរត្ន ។
១៩៤៨. ទ្រង់ព្រះខ័នពេជ្រហោះថ្វាត់ ទូភីប្រយ័ត្ន
ប្រយោជន៍ប្រយុទ្ធជាញជ័យ ។
១៩៤៩. សឹងសាញនោះសាជ៏ទីវៃ ទូភីនិរភ័យ
លលេលលាំងរួសរង ។
១៩៥០. ភ្លោកភ្លើសងរណើគ្រើយគ្រឹង វៃវវាត់ភ្លេងឈ្នង
រលើងរលំត្រាំក្សា ។
១៩៥១. ថ្លាយថ្លាក់បែកបាក់បញ្ចា ហើយប្អួយងរងា
រណាស់ស្រួចស្រឹង្គម៉ាយមៀង ។
១៩៥២. វិលវេះវៃវវាត់ខ្លាំងខ្លៀង ស្ទុះស្ទាសងាបងៀង
ក្រមេក្រក្រឡាស់ឃាក់ហោះ ។

(1) RIB : gralaeṅ
(2) RIB : ṭit
(3) RIB : bhaktrā

១៩៩៣- ក្រុងពាលីលុះបានញស្ដោះ ខ្ញាក់ដូចគេដោះ
ពុំនឹកដល់អង្គឧបិរង្សា ។

១៩៩៤- ស្នែងស្និទ្ធពីរពេជ្រខ្លាញខ្លា ពះលើសិល្បាពា-
លីរាជពុំអាចបិនូវមុត ។

១៩៩៥- ដូចលំពែងពេជ្រមុតបីប្រាកដ អ្នកចាក់ដ៏ជំពាត
ទំលុះលើមហាពេជ្រឯង ។

១៩៩៦- ប្រះទ័នពេជ្រពះពេជ្រស្នែង ពេជ្រនូវពេជ្រឯង
ប្រកួតប្រកិបចេស្ដា ។

១៩៩៧- ពាលីវៃវេះដ៏វេហា ទុភីរងរា
ទន្ទុំទន្ទិលយវិលវាត់ ។

១៩៩៨- ទុភីពាលីសឹងស្ទាត់ សឹងវែងវងបានញក្ដាត់
ប្រយ័ត្នប្រយុទ្ធកោះការ ។

១៩៩៩- ក្រោមក្រុតប្រេះប្រជតីញ័រ កក្រើកក្រៃព្រៃទូរទ័រ
អស្ដូរឫកាំងទេពស្ថិតស្ថាន ។

២០០០- ហិមបោះចេញចាកដ៏ពិមាន ពេញអាកាសស្ពាន
មកមើលសារសើរចេស្ដា ។

២០០១- វែរងសូរ្យចន្ទ្រដរឃ្លាតឃ្លា ពុំព្រៀងឆាយា
ស្រឡប់ពុំដូចប្រក្រតី ។

២០០២- កោលាហលហេតុទុភី ពះលើពាលី
ពាណកុពលបានញជ័យ ។

២០០៣- ពាលីដឹងឫទ្ធិដ៏ទិទៃ ស្មោះស្មើតេជវែង
មហិង្សរាជទុភី ។

២០០៤- នោះទើបក្រុងរាជពាលី លោកវែលងទុភី
ក៏រិះនូវប្រាជ្ញាល្បែង ។

២០០៥- បានពោះបីអង្គអញឯង ប្រយុទ្ធនៅក្រវក្រែង
ពុំឈ្នះនូវមហាមហិង្សា ។

២០០៦- រូបរុងក្រើសប្រវ៉ន់នូវពាណ នៅកណ្ដាលពសុធា
ទុលាយស្រលះអស់កល[1] ។

២០០៧- ទំនើងវិលវាត់បានញដល់ ក្ខរអញរកកល
បង្អោនបង្អស់ជន្មា ។

២០០៨- អញនូវនាំចរចុលគោហា បានឹងយកបា
សុពណ៌មឈ្មួសរងអង្គ ។

២០០៩- ស្ដោះហើយទុភីលប្ងង់ មានះចុលក្នុង
គោហាចង្អៀតអង្គឯង ។

(1) RIB : as' aṅg

២០១០- ទំនើងអញដើរដាក់វែង ឥតកោតឥតក្រែង
ក៏ផ្ទួល[1] ឲ្យលុះមរណា ។
២០១១- ប្រជុំមោទ័យដើមប្រជុំ ប្រយុទ្ធលុះសន្ធយា
ប្រជុំមិនទើបបិទសំពាន ។
២០១២- ពាលីស្រែកហោះរឹងប្រកាន ខាស់ខិនជ័ពិមាន
ក៏ហៅសុគ្រីពមកផ្ដាំ ។
២០១៣- ឯងប្អូនទុតិនោះលើសណាំ វិលទេះឆ្វេងស្ដាំ
ដំហានដំហារឥតក្រែង ។
២០១៤- បងចូលបន្តិចលងលេង ស៊ុះស្ទាបចុងស្នែង
នោះមុតគីពេជ្រខ័នធ្លា ។
២០១៥- ស្ដុំមៃស្ដេចដំណាត់មហិមា ត្រៃវែងមហិម្ហ
ក៏ផ្ងាញ់កម្លាំងបងបាន ។
២០១៦- បងនឹងទៅធ្វើកលមួយនាំប្រការ ព្រះគោបាស្ថាន
ក៏ចូលប្រយុទ្ធលេងលង ។
២០១៧- មួយគោតត្រែងគាត់ឈ្មោះបង បានាំពលដង
ដញ្ញូនគិរីទៀបរង ។
២០១៨- បើបាយល់ឈាមជាតិយង់[2] នោះគីឈាមអង្គ
មហិម្ហភាពមហិមា ។
២០១៩- ឈាមថ្លា[3] ឈាមអញបងបា បាយកបញ្ចា
មហាគិរីសន្ធប់ ។
២០២០- ហើយបាគោយភ្ជាប់ស្ដល់ស្ដប់ ខាស់ខិនពិភព
បីជួជន្ទទៅកាលបងនៅ ។
២០២១- ពាលីផ្ដាំប្អូនហើយទៅ ទុតិរង់នៅ
កណ្ដាលកំពែងពសុធា ។
២០២២- ជាទ្រីយទុតិមហិមា តាំងភាពមហិម្ហ
ក៏អាចមកឈរទៀលារគ្គ ។
២០២៣- អញគោតក្បូត្រពានរពង្ស លេះយើងយកអង្គ
មកមររកណ្ដាលប្រជតី ។
២០២៤- គ្នូរយើងយកស្ពានជ័គិរី ជាមណ្ឌលទី
មឈ្លួសសេយ្យាសន៍យើងក្បូត្រ ។
២០២៥- ទោះយើងអស់ជន្មាក្ខាត់ នោះជាស្ពានរត្ន
ប្រាសាទព្រះសពយើងហោង ។
២០២៦- ទុតិខ្លួនខ្លាឈ្មើសឈ្មោង ជាគាប់គួរហោង

(1) RIB : kǎ phal
(2) RIB : poe pān yal' jhām jāt yaṅ'
(3) RIB : jhām thlai

ទៅដោយពាក្យពាលីថា ។

២០២៧. ធូលយុទ្ធក្នុងទ្រូងគោឃា ឯអង្គមហាវង្សា
កម្រនឹងរិលប្រែប្រាណ ។

២០២៨. ពាលីលុះពិឃាតបាន នូវចំណាប់ហេតុមាន
ឧបាយប្រុះប្រាជ្ញាពល ។

២០២៩. ឈាមហូរហាក់កលជាតិដល ដោរពោរសាយសល់
តគុកគឹមហាសាគរ ។

២០៣០. យល់ចេស្តាស្តែងពានរ ទូទាំងស្ថិតប-
វនិម្មិតនិម្មានរតី ។

២០៣១. តុសិតយាមាសួគ៌ស្រី ត្រៃត្រឹង្សរួមទាំងទី
ចាតុម្មហារាជិកា ។

២០៣២. ស្ងប់ស្ងែងអស់អង្គទេវតា ទាំងឥកាយា
បង្គួរនូវភ្លឺសួគ៌សាង ។

២០៣៣. ពេញពាសអាកាសដោះបាច ប្រាយរាយបាចសាច
ផ្កាណោមត្រឡប់តន្ត្រា ។

២០៣៤. ថ្វាយសាធុការបូជា សរសើរចេស្តា
នៃពាលីរាជពានរ ។

២០៣៥. រីអស់ត្របកកេសរ ភ្លឺស្លឹកខ្វាយខ្វរ
រុះរាយលើដារដរណី ។

២០៣៦. ត្រូវត្រាំនឹងឈាមធូលី ប្រែផ្លាស់ស្មើ
ផ្កាកដដូចឈាមពានរ ។

២០៣៧. ដងនោះសុគ្រីពនូវប- រិពារពលនិករ
ដឹកនាំពិចារណាថា ។

២០៣៨. ឈាមនេះអង្គឈាមមហាវង្សា ឈាមនេះជាក់ជា
ព្រះរិទ្ធិ[1] រាជពាលី ។

២០៣៩. ក្រែងព្រះរៀមរាជនរបតី លុះនូវតេជធូលី
ពិឃាតព្រះជន្មក្បួរត្រៃ ។

២០៤០. ដឿជាឈាមពាលីនៃ សុគ្រីពសោកក្រៃ
នូវអស់ពានរបរិពារ ។

២០៤១. សុគ្រីពពិណាបលុត សំអុតបរិទូញការ
រំភុតរិះរៀមសម្ដារ សង្រេងសោយសោកាក្តាត់ ។

២០៤២. ទុក្រុងពាលីរាជ អំណាចស្ដែងលើសលែងក្បួត្រ
សោពសោយសុខសម្បត្តិ សំបូណ៌បុណ្យជ័ស្ទុល់ស្ទុប់ ។

២០៤៣. ឡើសឡើយព្រះចេស្តា ស្ដេចស្ដែងពុម្ពផ្កាកដសាយសព្វ
ទូទ័រទាំងពិភព ពិមានសួគ៌លោតសឹងខ្លាច ។

(1) RIB : braḥ rịddhī

២០៤៤- ព្រះប្រាជ្ញាវិញប្រាជ្ញប្រុះ ស្ដេចល្បើយមកលុះនូវអំណាច
នៃមហាមហិទ្ធិរាជ ទូទីសារភ័យកោណ ។

២០៤៥- ទាំងទេសមុខមារ ទាំងសព្វតាលនៃនាគា
សឹងបាញ់ព្រះចេស្ដា ស្ដេចបាញ់លេងជាប្រក្រតី ។

២០៤៦- ឱស្ដេចស្ដេចល្បើយមកស្មុគគត អសារបទឫទ្ធិទូទី
ឱកើតកេរតិក្រុងពាលី លុះអំណាចមហិទ្ធិសល់ ។

២០៤៧- សុគ្រីពបន្ទោទុក្ខទល់ សោយសោកានល
រលីងរលាមនេត្រា ។

២០៤៨- សុគ្រីពក្រោកបន្លួលជា នូវអស់សេនា
យោធាមុខមន្ត្រីជង ។

២០៤៩- អញតឥតចិត្តចេតនាត្រង់ សេពសោយរាជ្យស្នង
ក្រុងរាជពាលីដេស្លា ។

២០៥០- អញនូវតាមតិឃាតមហិទ្ធិ ពាលោនូវពាណ
មកជាសត្រូវនុករាន ។

២០៥១- មន្ត្រីទូលតាស់សូមមាន កុំព្រះអង្គមាន
ព្រះឫទ័យចងវេរា ។

២០៥២- បើស្ដេចទៅតាមមហិទ្ធិ ពុះបង់សេនា
ប្រជានុរាស្ដ្រពលនិករ ។

២០៥៣- សមស្មូស្យចេងទាំងព្រះនគរ អស់អង្គពានរ
នេះឥតពាំនាក់ល្បើយណា ។

២០៥៤- ប្រាសតែព្រះទៀមសង្ហារ ស្ដេចព្រះអនុជា
ពាំគ្រងរាជរដ្ឋជ័យបុរី ។

២០៥៥- សុគ្រីពស្ដាប់រាជមន្ត្រី ទូលតាស់នូវក្ដី
ប្រយោជន៍ប្រពៃពេកណា ។

២០៥៦- ស្ដេចប្រាប់ប្រើអស់បរិពារ បរពលក្រាស់ក្រាល
ប្រញាប់នូវរាជសេនីយ ។

២០៥៧- គោះកៀរពលពានរពី ខាស់ខិនជ័យបុរី
ជញ្ជូនគិរីសិលា ។

២០៥៨- សន្ធប់ទូររត្នគោឃា ដោះជិតជិតជា
អនេកនូវត្នុំជ័យប្រមាណ ។

២០៥៩- សន្ធប់ទូរគោឃាឋាន សុគ្រីពទឹងថ្កាន
នគរខាស់ខិនជ័យបុរី ។

២០៦០- ទល់ទុក្ខនូវមុខមន្ត្រី តារាភាជទេពី
នូវស្រីព្រះស្មំស្នេហា ។

២០៦១- សឹងសោយសោកសល់ជ័យសោភា ដួញដើម[1]ក្រុងពា –

(1) RIB : duoñ pantoem ~ duoñ pantoer

លីភាជសន្ធឹកសត្វព្រៃ ។

២០៦២. ឯងនោះពាលីនិរភ័យ ឆ្អៀលទូភ័ក្ត្រយ
នូវតេជអំណាចមហិមា ។

២០៦៣. ស្រេចដើរដល់ទ្វារគោហា យល់សឹងសិលា
គិរីសន្ធប់ជិតនៅ ។

២០៦៤. ពាលីស្រែកជង្ហោយហៅ ហោតុភ្នំក្រាស់ក្រៅ
ពុំឮពាក្យពាលីឡើយ ។

២០៦៥. ពាលីពុំឮសព្ទឆ្លើយ ថយទៅក្រោយហើយ
ក៏ស្រែកសីហនាទនូវឫទ្ធិ ។

២០៦៦. កាត់កឈ្លូវយកសិរសី មហិទ្ធិទូទី
ក៏លើកស្នួយស្ទុះនូវពលា ។

២០៦៧. ស្ទុះធាក់ធ្លាយធ្លាក់បព្វតា របើកទ្វារគោហា
នូវសិលាដាខ្ទាត់ខ្ទាយ ។

២០៦៨. ស្ទើតអស់ភ្នាភ្នំធ្លាក់ធ្លាយ ធ្លាក់ទល់សមុទ្រឆ្ងាយ
ដោយតេជក្រុងភាជពានរ ។

២០៦៩. ពាលីចេញពីគោហាចរ ចូលឋានព្រះនគរ
ក៏ឡើងលើប្រាសាទស្ថាន ។

២០៧០. ស្ដេចខ្ញាល់ពេកពន់នូវប្រមាណ ពុំបន្ទុលស្ថាន
ទេពីមន្ត្រីឯងសោត ។

២០៧១. ទុំទាំងព្រះភក្ត្រក្រៃក្រោធ ក្រាស់អារតិរោធ
រូបាននូវដេះឃាឫទ័យ ។

២០៧២. ឯងនោះសុគ្រីពភិតភ័យ គិតខ្លួនខ្លាចក្ស័យ
ក៏ឡើងច្វាត់ច្វាយបង្គំ ។

២០៧៣. ទូលថាបពិត្រអញខ្ញុំ ឯងឲ្យជំនុំ
វិវាទ[1] ពិតពិចារណា ។

២០៧៤. ឈាមនេះអគ្គីឈាមមហិង្សា យល់ជាក់ជាតិជា
ព្រះលោហិតហូរចេញមក ។

២០៧៥. នោះទើបខ្ញុំប្រាមប្រើយក អស់បពិតមក
ស្ទុះបិតសន្ធប់គោហា ។

២០៧៦. តាំងជេរនូវព្រះអាជ្ញា ទិញ[2] ថ្វាយព្រះចិន្តា
ពិសេសព្រះករុណាឈ្លើង ។

២០៧៧. សូមមានស្ដេចទៅទតឯង មើលឈាមនោះក្រែង
កម្លៅឈើបខ្ញុំពុំជាក់ ។

២០៧៨. មួយសោតយល់ស្ដេចជំពាក់ ប្រយុទ្ធយល់ប្រត្យក្ស

(1) RIB : varavād
(2) RIB : doep

ឮសព្ទពន្លឹកហើយផាត់ ។

២០៧៩. ខ្ញុំទៅតាមព្រះមហាក្សត្រ អស់មន្ត្រីឃាត់
ខ្លាចខ្មើលកំលុងព្រះនគរ ។

២០៨០. ទូភីតិឃាតបរមប - ពិត្រលុះជ័មរ
ក្រែងកើតកោណាហាលលោង ។

២០៨១. ដង់នោះពាលីទ្រើសឃ្លង ពុំមេត្រីផង
សុគ្រីពអនុជបីសំឡាញ់ ។

២០៨២. មឹងពុំដឹងគេដៃងអញ មឹងជាជាធាញ់
ទូភីមហិង្សាសត្វ ។

២០៨៣. មឹងមោះមុសាវាទក្តាត់ ចង់រាជសម្បត្តិ
រកកលពិឃាតជេស្ឋា ។

២០៨៤. មឹងឲ្យជញ្ជូនបព្វតា មោះបិតគោហា
សន្ធប់ពុំឲ្យចេញបាន ។

២០៨៥. ហើយមឹងធ្វើស្លូតមកបាន មេត្រីសោះសាន្ត
ពុំដឹងអំពើពុតពាល(1) ។

២០៨៦. មឹងចង់ក្បួចបងសង្ហារ ចិត្តចោរទ្រើបគ្រាល
កុហកកម្លោមោហា ។

២០៨៧. ក្រុងពាលីក្រោធមហិមា ទះទ្រូវសិរសា
សុគ្រីពពុំអាចរប់បាន ។

២០៨៨. ស្លុះមោះចេញចាកវៃលង្ហាន គ្រាសារពិមាន
ពាលីមោះតាមពុំវៃង ។

២០៨៩. ដោយដេញទៅទល់កំពែង ចក្រវាលទូវកំហែង
កំហឹងនោះខ្លាំងឃោរទំ ។

២០៩០. ទាន់ទះបណ្តើរដាល់ដំ សុគ្រីពត្រូវដំណំ
ពន្លឹកដ្ឋាល់នឹងមរណា ។

២០៩១. វិលទៅៈមោះចុះទៀហា ពុំឃ្លាតនឹងពា -
លីរាជក៏តាមជិតដោយ ។

២០៩២. ទាន់ទរទះទៅពីក្រោយ ក្រុំក្រែកពុំឲ្យ
សុគ្រីពឃ្លាតនូវដំណំ ។

២០៩៣. សុគ្រីពនឿយណាស់ខាស់ខំ ចុះព្វូនទឹងភ្នំ
ជ្រោះជ្រែកលង្វែកសិលា ។

២០៩៤. ពាលីមោះចុះបព្វតា ដោយជិតជ័ប្រវា
ដាប់ជើង(2) ទាំងតារជ័ត្រវី ។

២០៩៥. នឹងដោកស្មើខ្នងគិរី សុគ្រីពមានស្មារតី

(1) RIB : amboe but vā
(2) RIB : jāp' joeṅ

កន្ត្រោងកន្ត្រាក់យាយោះ ។

២០៩៦- របូតពីដៃទក្ស៊ិណានោះ　　　សុគ្រីពយោះស្ទោះ
ចូលវិស្សតំបពិត [1] ។

២០៩៧- ពាលីផុលពុំបានបរ　　　ស្ពាននោះសន្ទូត
នៃព្រះវិស្សតំតសី ។

២០៩៨- ស្តេចខ្លាល់កាលក្រុងពាលី　　　ពិឃាតខូតី
ឈាមហូរទៅលើអាស្រម ។

២០៩៩- វិស្សតំតសីសន្ធំ　　　សាបាលនៅភ្នំ
នោះពុំឲ្យពាលីជិត ។

២១០០- ដើរដល់ល្មុះក្ស័យជីវិត　　　នោះពាលីគិត
ពុំអាចនឹងចូលទៅបាន ។

២១០១- ពាលីវិលវិញទៅស្ពាន　　　ត្រាណាខតិមាន
រូបមានទិញទេពស្នូត៌ា ។

២១០២- សុគ្រីពញ្ញូននឹងបញ្ញា　　　ទល់ទុក្ខសោកា
សង្គ្រែងប្រយោជន៍ពីនូរាមរ៍ ។

២១០៣- ខ្លួនព្រះរៀមរាជពានរ　　　ខ្លួនរាស្ត្រនិករ
កំលុងខាង់ចិនបុរី ។

២១០៤- ដលនេត្រាជាជលនទី　　　ហៀរហូរចេញពី
គិរីគីរីព្រោះសោកា ។

២១០៥- មាននៃមានុមានឯងជា　　　ក្លួយក្មេងរក្សា
នូវជាកំដរសព្វថ្ងៃ ។

២១០៦- សុគ្រីពបង្គំសំឃាប៊ូទ័យ　　　ផ្ញើជីវិតនៃ
ព្រះមានុមានបុត្រស្វា ។

(1) Sur la lecture "vissataṃ", voir R.I., p. 128, n. 1.

# កណ្ឌទី១៣

២១០៧- ដឹងនោះពីរព្រះរាជា ស្ដេចតាមសីតា
ទេពីស្រីរត្នដ៏បវរ ។

២១០៨- ពីរព្រះអង្គស្ដេចពនេចរ ឥតឈប់ឥតឈរ
សំរានព្រះអង្គឡើយណា ។

២១០៩- ស្ដេចស្ដេចលុះព្រៃបព្វតា ឆ្លងត្រាច់យាត្រា
ក៏លុះនាព្រៃពនាលី ។

២១១០- ឮសព្ទមហិង្សាសីហា ទាំងហ្វូងឈ្មោលញី
ស្រកុំស្រកាំងជ្រូកធ្លូក ។

២១១១- អឺអឺងទាំងព្រៃស្កាំងស្កក រងាំងរងាសរត់ជ្រក
បំពាក់បំពូនអាត្មា ។

២១១២- ស្ដេចឮស្នូររាជមហិង្សា ខ្លួចស្ដោះមាត់
ដាមហាស្លុនសិង្ហសក្ដិ ។

២១១៣- ស្ដេចឈប់ឈរប្រែព្រះភក្ត្រ បៀងទតព្រះលក្ស្ម
ព្រះអនុជនាថស្នេហា ។

២១១៤- ឱឃាលក្ស្មនាយើងយាត្រា ដល់ស្ថាននេះណា
ឮសព្ទមហិង្សាស្នូរ ។

២១១៥- ខ្លួចថ្លូកស្មៀរស្មឹរសព្ទខ្ចូរ ស្លុននេះបរិបូណ៌
ប្រសើរឥតឯកលោកា ។

២១១៦- ចេរកាលនូវប្រទះអ្នកងា ទល់ទុក្ខវេទនា
នូវមកពឹងចេស្ដាយើង ។

២១១៧- នូវបំពេញលាភយសឲ្យខ្ពើង ចំណោរទៅសោតយើ
នូវចាប់លក្ខាផ្ទានបាយ ។

២១១៨- ស្ដេចបន្ទូលទិញដំទំនាយ ឲ្យអនុជស្រាវស្រាយ
ទំនាយសម្ដេចដេស្នា ។

២១១៩. ស្ដេចទាយទំនាយមហិក្ស តើរព្រះយាត្រា
ស្រីបាត់ដោយដងដៃព្រៃព្រឹក្ស ។
២១២០. មានស្វាយមួយធំជីអធិក លូតលាស់នូវស្លឹក
ត្រសុំត្រសាយសាខា ។
២១២១. ជុំក្លិនកេសរគន្ធា ខ្ជួរទាំងទិសា
បីដោយព្រះពាយផ្សាយទៅ ។
២១២២. ឮសូរសព្ទសត្វច្រៀងនៅ សូរសៀងក្រអៅ
មមះសសិតស្លាបលេង ។
២១២៣. ខ្លះទំខ្លះហើរបីប្រលែង សព្ទសូរទូរភ្លេង
តន្ត្រីយចំរៀងស្លូតិ ។
២១២៤. ស្ដេចផ្ទុំក្រោមមហាព្រឹក្សា ព្រឹក្សមានឆាយា
ស្រីមោលអម្លប់សាន្តសិង ។
២១២៥. ជុំជិតនិត្យនៅជុំទីង ក្រដាក់នៅនឹង
ព្រះពាយក្រសៀកបីរំភើយ ។
២១២៦. ស្ដេចផ្ទុំព្រះសិរស្ដេចកើយ លើទីរូព្រះលក្សហើយ
ជាខ្នើយសម្ដេចរាមា ។
២១២៧. កាលនោះហេតុបារមីតា រីព្រះសុរិយា
ពុំអាចអស្ដង្គតទៅ ។
២១២៨. ព្រះសុរ្យឈប់រថនឹងនៅ ត្រង់ព្រឹក្សាក្រៅ
សិងមានអម្លប់សាយសាន្ត ។
២១២៩. ដូចអ្នកសង់ឆត្រដោយស្ពាន ប្រជាប់នូវស្ពាន
បណ្ដោលព្រះអង្គផ្ទុំនិត្យ[1] ។
២១៣០. ដងនោះសុគ្រីពរាជបពិត្រ យល់បុព៌និមិត្ត[2]
ប្រសើរអរតតគណនា ។
២១៣១. ជាហៃហនុមានអើយបា បាមើលសុរិយា
រសៀលអស្ដង្គតហើយ ។
២១៣២. ស្ដីកអ្វីស្រីមោលត្រង់នៅឡើយ ហៃហនុមានអើយ
សមអ្នកដ៏មានបុញ្ញៀន ។
២១៣៣. ត្រេចត្រង់តង់នៅនាព្រៃ នោះទើបស្រីមោលថ្ងៃ
រសៀលរទៀលជុំទីង ។
២១៣៤. ត្រង់ព្រឹក្សាក្រៅឈប់ឈឹង ឈឹងត្រង់នៅនឹង
អំពល់នូវផលផ្លែផ្កា ។
២១៣៥. មានរសផ្អែមផ្អែកពិសា ហៃហនុមានបា
ឃ្លូរបា អាសាមា[3] ហោង ។

(1) RIB : phdaṃ nidr
(2) RIB : pūrbanirmitr
(3) MBN : āsā moel

២១៥៣- ព្រះលក្ស្មណ៍ចាប់ធ្នូសត្តភាយ(1) កោះសរនូវទំលាយ
ទំលាក់នៃភាដក្របី ។
២១៥៤- ក្សិណានោះស្តេចតើនឡើងខ្ចី ព្រះជាទនរបតី
ជល្តិជនៃព្រះអនុជា ។
២១៥៥- ជាវៃបាលក្សូកើយស្ដេចជា ជាកោះសរថ្លា
ជានូវខ្លែងអ្វីនេះឥឡូវ ។
២១៥៦- ព្រះលក្ស្មណ៍ជាក់សរសិទ្ធធ្នូ ក្រាបទូលព្រះភូ-
ជទេវ្រ្ទជិភាជជ័ជក្រី ។
២១៥៧- បពិត្រស្វាមួយអប្រិយ សសុទ្ធដុជសិម្បី
អ្នកផ្ដេចបញ្ជីរភោះបង់ ។
២១៥៨- ទំលាក់ស្លឹកស្វាយលើព្រះអង្គ ខ្ញុំជាត់រឹងតែជង់
ទំលាយទំលាក់ច្រើនក្រៃ ។
២១៥៩- ខ្ញុំខឹងវាត់កោរទ្នាជ័យ ខ្លែងផ្លាញឲ្យក្ស័យ
នាស្វាកំណាចនោះណា ។
២១៦០- ស្វានោះមានឫទ្ធិដេស្ដា ប្រាកដជាមិមា
ឥកធ្នូពីដៃខ្ញុំបាន ។
២១៦១- លោតឡើងសាខាតួនពាន ត្បូនថ្វាប់ណាក់ប្រាណ
នាត្កូបព្រឹក្សនិត្យនៅ ។
២១៦២- ខ្ញុំខ្លែងតាមស្វាយកធ្នូ ទើសដើងព្រះភូ-
ជទេវ្រ្ទជិភាជខ្ញុំហោង ។
២១៦៣- ស្វានេះរកភានបីកន្លង ល្អជណាក់ធ្នូគ្គង
បំពាក់បំពួនពុំយល់ ។
២១៦៤- ក្សិណានោះនារាយភាមទសពល ជាមិត្តិតក្ដល់
បំពេញនូវព្រះដេស្ដា ។
២១៦៥- ទើបព្រះនរនាថភាមា ទតឡើងយល់ពា-
នរនៃភាជជ័ក្របី ។
២១៦៦- សសុទ្ធរុងរឿងរស្មី សងកាំមានៃ
កំពាក់នូវកុណ្ឌលរត្ន ។
២១៦៧- នោះទើបព្រះពង្សមរិទ្រ្ធក្សត្រ ស្ដេចស្ដាប់បន្ទូលថ្វាត់
កំឃាត់ទៅព្រះអនុជា ។
២១៦៨- ជាវៃបាលក្សូកើយថ្លូរជា កុំបីក្រេវក្រោធ
ជាមើលទៅស្វានោះហោង ។
២១៦៩- ស្វានេះប្លែកនឹងស្វាជង ពាក់កុណ្ឌលជង
កាំមាពិពណ៌សោភា ។
២១៧០- មានមានឫទ្ធិដេស្ដា ជុះពីព្រឹក្ស

(1) RIB : dhanū sar nārāy(ṇ)

មកថ្វាយបង្គំនរបតី ។

២១៧១- ស្រេចថ្វាយឆ្នូព្រះចក្រី ទូនអង្គសិរសី
បង្គំប្រណម្យបាទា ។

២១៧២- ក្រាបទូលពីរព្រះក្សត្រា ព្រះអង្គជាតិជា
ឥស្សូរប្រសើរខ្ញុំហោង ។

២១៧៣- ព្រះអង្គទ្រង់ជម្ពជ័យកន្លង លើសវែងក្សត្រផង
ប្រកបនូវព្រះមុទុតា ។

២១៧៤- បពិត្រស្ដាយខ្ញុំផ្ដាំជា ពោះនុះអ្នកឯណា
អាចយល់កណ្ដាលទិព្វថ្លៃ ។

២១៧៥- អ្នកនោះឯងជាក់ជាតិ - ស្នូរបាឯងនៃ
អាចយល់កណ្ដាលនេះណា ។

២១៧៦- ឥឡូវនរេន្ទ្ររាជក្សត្រា ទ្រង់ឫទ្ធិដេស្ដា
ជ័យជាឥស្សូរខ្ញុំហោង ។

២១៧៧- ខ្ញុំនូវរងគុណអាសារង ព្រះគុណជ័យកន្លង
ពិសេសនូវព្រះករុណា ។

២១៧៨- ក្សិណនោះព្រះលក្សអនុជា ពុំចេញចររា
ស្ដេចស្មើចងឯងក្នុងហឫទ័យ ។

២១៧៩- ហនុមាននៅអញ្ជ្រាស្រ័យ យល់ព្រះលក្សពុំជឿនៃ
នូវពាក្យអញទូលនេះណា ។

២១៨០- នោះទើបហនុមានឫទ្ធា ស្រេចស្ទាបឡើងហា
ដាក់យល់រស្មីព្រោងព្រាយ ។

២១៨១- ភ្លុះសទិសទិព្វពន្លាយ ភ្លឺស្វ្រូងសព្វសាយ
នៃដល់បាតាល[1] ទសទិស ។

២១៨២- ក្សិណនោះព្រះហរិន្ទ្រពង្សពិស្ណុ យល់អស្ចារ្យកិះ
ព្រះលក្សស្ដេចអនុជា ។

២១៨៣- ទីស្វានេះថ្លៃកមហិមា ជាតិជានភា -
ជិនេន្ទ្រនៃរាជជ័យក្រុងបី ។

២១៨៤- នោះទើបព្រះបាទនរបតី បើកព្រះនេត្របីមប្រិយ
ជល្ដាំងនៃរាជពានរ ។

២១៨៥- ថាវៃហាពានរនាមករ សឫទ្ធីព្រះពរ
ព្រះវិស្ដងនោះតើឈ្មោះអ្វី ។

២១៨៦- អញចប់ដឹងដើមសេចក្ដី ព្រះវិស្ដងកើតពី
ឫសីឬពីទេពតា ។

២១៨៧- ហនុមានក្រាបទូលឆ្លងជា ខ្លួនខ្ញុំនេះណា

(1) RIB : nai traipātāl

គឺពាយុបុត្រ សុរបុត្រ (1) ។

២១៨៨- រីនាមករខ្ញុំប្រាកដ ព្រះជនកសន្និត
ខ្ញុំឈ្មោះកំហែងហនុមាន ។

២១៨៩- នាខ្ញុំមកនៅនាស្ថាន នោះសោតខ្សៀតមាន
ពានរពីររាជក្សត្រា ។

២១៩០- ជាកលពិភេទនូវគ្នា មួយឈ្មោះក្រុងពា-
លីនោះដ៏លើសនូវឫទ្ធិ ។

២១៩១- មួយឈ្មោះសុគ្រីពរាជដ៏ក្របី ជាប្អូនពាលី
គឺឯកឧទរមាតា ។

២១៩២- អ្នកទាំងពីរនោះសឹងជា មាខ្ញុំឯងណា
អម្តីអ្នកដទៃហោង ។

២១៩៣- រីក្រុងពាលីរាជជាច្បង ស្ដេចក្រេវក្រោធខ្លាំង
ដ៏ក្រោធក្រឹត្យធម៌បុរាណ ។

២១៩៤- ស្ដេចខឹងតិះដៀលដេរជា បណ្ដេញព្រះអនុជា-
ធិរាជឲ្យចេញវែងស្ថាន ។

២១៩៥- នេះតម្លូវសុគ្រីពស្ដេចមាន ទុក្ខទល់ប្រះប្រាណ
រួហានមកដល់អ្នកប៉ង់ (2) ។

២១៩៦- នៅព្រៃស្មសានឯកអង្គ រំញយំលន្លង់
លន្លោចត្រមោចឯងនៅ ។

២១៩៧- ទើបព្រះបន្ទូលរឹងទៅ ទុក្ខអញនេះហោ
ជបាទុក្ខានលៃក្រ ។

២១៩៨- ហនុមានប្រុះប្រាជ្ញាថ្លាវៃ ដឹងអត្ថាស្រ័យ
មាបទ័យសម្ដេចរាមា ។

២១៩៩- ចាប់យល់សុគ្រីពរាជា ស្រេចហនុមានណា
ព្រះបាទសម្ដេចនរបតី ។

២២០០- ហោះហោះរួសដោយឫទ្ធិ ដល់រាជក្របី
សុគ្រីពក្របិន្ទ្ររាជា ។

២២០១- ហនុមានទូលព្រះបិតុលា បពិត្រព្រះមា
សម្ដេចប្រើខ្ញុំរកអ្នក ។

២២០២- ណាមានបុណ្យកបរិវលក្ខណ៍ ខ្ញុំយល់ជាតិជាក់
អ្នកបុណ្យនេះឯងហើយណា ។

២២០៣- សូមអញ្ជើញសម្ដេចព្រះមា ព្រះអង្គស្ដេចលេណា
ទៅថ្វាយបង្គំខ្វាត់ហោង ។

២២០៤- សុគ្រីពត្រេកអរប៉ុនប៉ង គិតទៅហោះខ្សែង

(1) RIB : sūryaputr
(2) RIB : rū hān mak ṭal' anak p̈aṅ

សំណាក់សម្តេចរាមា ។

២២០៥- ដងនោះព្រះបាទរាមា  ប្រើព្រះអនុជា
ឲ្យណាទៅរកជលធី ។

២២០៦- ថាហៃលក្ស្មណ៍ធុរបាលី -  ណាំរកជលធី
មកឲ្យមនុស្សបរិភោគស្រប់ ។

២២០៧- ព្រះអនុជបង្គំលុតជង្ឃ  លើកករនូវកិបង់
ជូលីព្រះរៀមយាត្រា ។

២២០៨- រុករានស្វែងព្រៃព្រឹក្សា  យល់ស្ទឹងជាធារា
ទឹកថ្លៃកស្រ្គីពានិរភ័យ ។

២២០៩- ព្រះអនុជស្តេចដងជលស័យ  រត់រួសរឹងរៃ
មកថ្វាយព្រះរៀមនរបតី ។

២២១០- នោះព្រះអង្គសោយជលធី  យល់ប្រែអង្គក្តី
ពុំដូចវិស័យជលសា ។

២២១១- ហៃលក្ស្មណ៍បាជងទីឯណា  ទម្ពូវជលសា
ប្រែវែងវារីដងៃ ។

២២១២- ជលនេះជាអស្ចារ្យក្រៃ  ពុំដូចជលស័យ
ជលធីនីមួយដងហោង ។

២២១៣- ហៃលក្ស្មណ៍បាទៅរកលង  ដើមទឹកនោះហោង
ក៏ហូរអំពីស្ថានណា ។

២២១៤- ព្រះលក្ស្មណ៍បង្គំយាត្រា  ស្វែងស្រប់ជលសា
ក៏រកនូវដើមទឹកនៃ ។

២២១៥- យល់មានភ្នំមួយធំក្រៃ  ហូរជ្រោះជលស័យ
ល្អែងចេញអំពីនោះហោង ។

២២១៦- ឮសព្ទថ្ងូញទំនួញដ៏កន្លង  ស្តេចស្តាប់ជាក់ជង
នូវសព្ទយោបំសោកា ។

២២១៧- ព្រះលក្ស្មណ៍វិលវិញយាត្រា  ក្រាបទូលអភិវាទ
ព្រះរៀមជិតរាជថ្លែងផ្លាស់ ។

២២១៨- បពិត្រព្រះរាជតំរាស់  ព្រះអង្គស្តេចត្រាស់
ប្រើខ្ញុំរកដងជលស័យ ។

២២១៩- នោះមានភ្នំមួយធំក្រៃ  ហូរជ្រោះជលស័យ
អំពីភ្នំនោះហោងណា ។

២២២០- ហើយឮសព្ទយោបំសោកា  ថ្ងូញយំមហិមា
នូវសព្ទកណ្តោង[1]ទុរគម ។

២២២១- ទើបព្រះសារពេញឧត្តម  បើកព្រះសារសម
ក៏ប្រើអនុជស្នេហា ។

(1) RIB : kanleṅ

២២២២. ហោលក្ស្មណ៍ផ្ទួរថាយាត្រា វាយភ្នំនេះណា
ក៏ដើលជាអ្នកណាហៅ ។
២២២៣. ព្រះអនុជស្ដាប់ព្រះបន្ទូលថ្លៃ ហើយទាទូលថ្លៃត្រា
គំរាប់ភ្នំនោះឯងហោង ។
២២២៤. ក្សិណោះនោះព្រះអនុជស្ដេចថ្លឹង កៅទណ្ឌាបីសំពង
ក៏វាយភ្នំនោះហោងណា ។
២២២៥. ពុំបែកពុំធ្លាយឡើយណា រឹងឫទ្ធិចេស្ដា
សិលានក៏វាយប្រត្យក្ស ។
២២២៦. ភ្នំទល់រឹងព្រះពុំបាក់ ស្ដេចវាយប្រត្យក្ស
កក្រើកអំពើកធរណី ។
២២២៧. សព្វសត្វយប់ឃ្លងផ្អើលគី ភ្លឹកខ្លាចជ័ឫទ្ធិ
ក៏រត់បំពាត់ខ្ចាត់ខ្ចាយ ។
២២២៨. សុគ្រីពឆ្លាស់ឆ្លើយអភិប្រាយ បពិត្រស្ដេចកុំបីវាយ
កុំព្រួយព្រះអង្គឡើយណា ។
២២២៩. ស្ដេចយកចង្វៀលកៅទណ្ឌាថ្លា ភ្នំះមិញធ្លាយណា
កុំព្រួយព្រះអង្គវាយទៃ ។
២២៣០. ស្ដេចស្ដាប់វានរនិរភ័យ ទូលថ្កានក្សត្រថ្លៃ
ក៏ថ្លែងនូវពាក្យនោះហោង ។
២២៣១. ស្ដេចយកចង្កួយកៅទណ្ឌគង់ ភ្នំះភ្នំនោះហោង
រលើងរលំសោះសា ។
២២៣២. នោះក្រុងសុគ្រីពភាជា ឱនក្រាបសិរសា
បង្គំព្រះលក្ស្មណ៍នរបតី ។
២២៣៣. ព្រះលក្ស្មណ៍ស្ដេចនាំជ័ក្របី ដើរមកថ្វាយចក្រី
ព្រះទៀមពិភពជ័ភូធរ ។
២២៣៤. ព្រះលក្ស្មណ៍នូវក្រុងវានរ ចាកព្រឹក្សាករ
លុះដល់សម្ដេចនរបតី ។
២២៣៥. ព្រះលក្ស្មណ៍ថ្វាយក្រុងជ័ក្របី វានរាធិបតី
ក៏ថ្វាយបង្គំភាជា ។
២២៣៦. ក្សិណោះនោះស្ដេចទ្រង់មុទិតា មាសូរភាជា
សុគ្រីពស្ដេចរងទុក្ខទល់ ។
២២៣៧. ស្ដេចឈ្ងល់ដោយព្រះយោបល់ ទោះអ្នកទុក្ខទល់
ទម្ងន់នូវអញបានណា ។
២២៣៨. ដោះមានហេតុអ្វីក្រុងពា- លីក្រេវក្រោធា
បណ្ដេញព្រះថ្លែងបរបង់ ។
២២៣៩. សុគ្រីពទូលក្រាបលុតជង្ឃ នបទាទបីកំបង់
បង្គំសម្ដេចនរនាថ ។
២២៤០. បពិត្រខ្ញុំនូវទូលដើមអាទិ៍ ឲ្យក្រាបវរបាទ

សម្តេចជ័យទ្រង់ធរណី ។

២២៤១- មនមាន[1] ភាគិមហិង្សាសីហា    អាងអួតឫទ្ធិ
កម្លាំងកម្លោះគោះគា ។

២២៤២- ទ្រង់នាមទូភីមហិមា    រាងរូបឫទ្ធា[2]
កិស្សួរអង្រើកសារសីហា ។

២២៤៣- ត្រេចត្រង់ខាងខិនជ័យបុរី    ហើយហៅពាលី
នូវចប់ប្រយុទ្ធលេងលាង ។

២២៤៤- ពាលីស្តេចហាចហោះស្ទួង    ចរចេញយុទ្ធផង
នូវក្របីទូភីមហិមា ។

២២៤៥- ស្តេចប្រយុទ្ធនូវភាគិមហិង្សា    ពីប្រថមសុរិយា
លុះអស្តង្គតបាត់ថ្ងៃ ។

២២៤៦- សឹងជាញ់ឿលារង្គជ័យទិវៃ    ពុំលុះនាក្ស័យ
ជីវិតនោះមួយៗណា ។

២២៤៧- ពាលីនូវក្របីមហិង្សា    យុទ្ធយល់ចេស្តា
ប្រកឹងប្រកោះឿលារង្គ ។

២២៤៨- ទូភីពាលីពីរអង្គ    សឹងឿយពុំគង់
កម្លាំងកម្លោះចេស្តា ។

២២៤៩- ព្រះពាលីស្តេចមកនា    ខាងខិននូវមហា-
តិភពសំភានព្រះអង្គ ។

២២៥០- ស្តេចស្តាំខ្ញុំឯងប្រើខ្បង់[3]    ពលពានររង់
នាក្រៅកំពែងព្រះសីមា[4] ។

២២៥១- ប្រើដកបពិតសិលា    ថ្មជាជីជា
ជំពូកៗដោយងារ ។

២២៥២- ស្តេចឈ្មោងក្រាស្រាតិស្តារ    បបួលទូភីពាល
ប្រយុទ្ធក្នុងស្ពានគោហា ។

២២៥៣- គឺដោះស្តេចស្តាំខ្ញុំជា    ទោះឈាមមហិង្សា
នោះក្រាលបីខួចជាតិយប់ ។

២២៥៤- ឈាមផ្កានោះគឺឈាមអង្គ    បងស្មោយទិព្យ-
ប្តូតកាលដោយកម្មវេតា ។

២២៥៥- ដូរធាយកអស់បព្វតា    ថ្មបោះបិតនា
វៃទូរគោហារត្នស្ពាន ។

២២៥៦- ស្តេចស្តាំខ្ញុំហើយហោះស្ការ    ទូភីហៅបាន
ក៏ចូលប្រយុទ្ធលេងលង ។

(1) RIB : mun mān
(2) RIB : rāṅ rū ṛddhā
(3) RIB : proe khbaṅ'
(4) RIB : kaṃbaeṅ braḥ vehā(s)

២២៥៧- ក្នុងព្រះគោហានោះហោង បានដូចបំណង
សម្ដេចព្រះបងមហិមា ។

២២៥៨- ស្ដេចត្រាច់ឈ្នួលរាជមហិង្ស បានដូចប្រាថ្នា
មហាពិសេសពិស្ដារ ។

២២៥៩- កាលនោះអស់ទេពសួគ៌ា ស្រែកថ្វាយសាធុការ
បង្គំនូវថ្កាគន្ធភារ ។

២២៦០- ហេតុនោះឈាមក្របីមហិង្ស ខាលខ្លាទីងជា
ខ្ញុំស្អានឈាមក្របីពាលី ។

២២៦១- ទើបខ្ញុំនូវមុខមន្ត្រី នាំពលដំរីក្របី
យកថ្មបោះបិតព្រះគោហា ។

២២៦២- ពាលីស្ដេចឈ្លួលមហិង្ស ស្រែកហៅយក្របីពា-
លីផាក់សិលាខ្ទាត់ខ្ទាយ ។

២២៦៣- ថ្មរាំងគោហាធ្លាក់ធ្លាយ ស្ដេចផាក់ទំលាយ
ក្រវីព្រះច័នជ័យស្រី ។

២២៦៤- ហោះមកខាស់ខិនជីបុរី ក្រេវក្រោធខ្ញុំអគ្គី
ក៏ដេះខ្ញុំភរិយា ។

២២៦៥- ស្ដេចខឹងតិះដៀលដេរថា កណ្ដាលកោងសេនា
មន្ត្រីជំនុំពលដង ។

២២៦៦- ថាខ្ញុំនូវជណ្ដើមរាជក្រង ចង់ភរិយាផង
ខ្ញុំខ្មាសជំងៀលនិន្ទា ។

២២៦៧- ស្ដេចក្រោធក្រៅក្រីតៀរភាជា ពុំមានពិចារណា
ញ៉ើយជល់បណ្ដេញខ្ញុំបង់ ។

២២៦៨- ខ្ញុំខ្មាសទល់ទុក្ខឯកអង្គ ទើបខ្ញុំត្រេចត្រង់
ក៏មកនៅស្ថាននេះណា ។

២២៦៩- ស្ដេចស្ដាប់សុគ្រីពភាជា ទូលថ្លែងអាត្មា
ដើមដាទុក្ខទល់ផ្លូវក្រៃ ។

២២៧០- ទើបស្ដេចបើកឱស្ឋារថ្លៃ បន្ទូលថាថៃហា
សុគ្រីពទុក្ខអញសោកម៉ាន ។

២២៧១- នេះតម្រូវអញមកដល់ស្ថាន ព្រៃនេះអញបាន
ប្រសប់នូវព្រះស្ដែងជា ។

២២៧២- ទុក្ខទល់សោកសោយអនិច្ចា ព្រាត់សំបាកអាត្មា(1)
ប្រដូចអញឯងទូទី ។

២២៧៣- ថាហៃសុគ្រីពធិបតី នេះតម្រូវកុំបី
ព្រះស្ដែងបារម្ភឡើយណា ។

(1) MBN : prās sampād ātmā

២៧៤- ការអញបំពេញជិន្តា ព្រះស្តែងប្រាជ្ញា
បីដោយចំណាប់ជាឯង ។
២៧៥- ផ្លូវមើលឫទ្ធិអញឯង នេះម្តងលងលេង
សំដែងនូវតេជឫទ្ធិ ។
២៧៦- អញយកខាស់ខិនជីបុរី នូវតាភទេពី
នោះឲ្យព្រះស្តែងឃោងណា ។
២៧៧- សុគ្រីពស្តាប់សព្ទមុខា ព្រះបន្ទូលករុណា
ពិសេសពិសាលសារទ ។
២៧៨- ក្សិណនោះសុគ្រីពត្រេកអរ យកបាទជីបវរ
សម្ដេចទុកលើសិរសា ។
២៧៩- នាខ្លួនខ្ញុំឯងឃោងណា ថ្វាយព្រះរាជា-
ធិរាជជាបរិពារ ។
២៨០- ពោះបីមានសត្រូវពាំងណា[1] ទូលជោជភូវនាថ
ប្រយោជន៍នូវទៀតដល់ព្រះអង្គ ។
២៨១- ខ្ញុំនូវយកពលពានរពង្ស ដែងជាញទៀណាវគ្គ
តាំងជិតសិបអសង្ខេយ្យ ។
២៨២- ផ្សាងឯងកុំបីឲ្យដល់នា ពីរព្រះរាជា-
ធិរាជស្ដេចព្រួយដល់ព្រះអង្គ ។
២៨៣- មួយសោតនាអញខ្ញុំចប់ ទូលឲ្យជ្រាបគ្រប់
នាកិច្ចមួយនោះឯងណា ។
២៨៤- ក្សិណហនុមានក៏ព្រះរាជា សុគ្រីពព្រះមា
កុំឲ្យទូលទៀតឡើយឃោង ។
២៨៥- ខ្លាចក្រែងអាក់អន់ឆ្គាំឆ្គង[2] ពុំបានដូចបំណង
ចំណាប់នៃព្រះប្រាជ្ញា ។
២៨៦- សុគ្រីពហនុមានក្រាបណា ព្រះបាទរាមា-
ធិរាជបរមបពិត្រ ។
២៨៧- ចេញមកនៅក្រៅស្ថានស្ថិត ហនុមានគន់គិត
ក៏ដឹងគំនិតព្រះមា ។
២៨៨- នាមានក្តីមួយនោះណា សុគ្រីពរាជា
ពុំទាន់ចរចាឆ្លាស់ឆ្លើយ ។
២៨៩- ហនុមានជាបពិត្រអ្នកមាហើយ អញខ្ញុំដឹងហើយ
សម្ដេចពុំជឿចេស្តា ។
២៩០- ព្រះបាទសម្ដេចរាមា រីអ្នកនេះណា
គឺអង្គព្រះនារាយឯងឃោង ។

(1) RIB : satrūv sāhas bāl
(2) RIB : gāk' gīoeṅ chgāṃ chgaṅ

២២៩១- ស្ដេចតុំជឿខ្ញុំនេះម្ដង សូមស្ដេចមើលលង
នាសងខាងព្រះអង្គា ។

២២៩២- មានលាយលក្ខណ៍រលំផ្លាស់ជា ចក្រសិលដ៏ក្រិត
មហិមាចេស្ដាពីប្រាកដ ។

២២៩៣- អ្នកនេះទិព្វទេពសន្ដត នារាយញូតដ៏ប្រាកដ
មកកើតជាព្រះរាមា ។

២២៩៤- តោះយើងចង់ដឹងចេស្ដា ប្រមាណកម្លាំងតា
លំលើសដ៏រឹងឫទ្ធិ ។

២២៩៥- យើងនាំព្រះបាទនរបតី មើលក្រុងទូទី
រៀលតេជពាលីថ្លុលមរ ។

២២៩៦- មួយនឹងចង់ដឹងឫទ្ធិសរ សិល្បសក្ដិព្រះភូចរ
នារាយរាមាពិស្ដារ ។

២២៩៧- យើងនាំទៅទតសប្ដតាល ដុះលើនាគពាល
ដំណាលមហាប្រជតី ។

២២៩៨- ឲ្យស្ដេចថ្លៃងលងឫទ្ធិ ដឹងតេជនរបតី
នាកាលនោះឯងហោងណា ។

២២៩៩- មានមានទូវសុគ្រីពចរចា ស្រេចហើយវេលា
ទៅគាល់សម្ដេចនរបតី ។

២៣០០- ក្សិណនោះព្រះបាទនរបតី នារាយចមក្រី
ស្ដេចឈ្វេងព្រះញាណទិព្វថ្លៃ ។

២៣០១- ទើបស្ដេចបន្ទូលជាហៃ សុគ្រីពស្ពានណាហៃ
ពាលីក៏ថ្លុលមហិម្បា ។

២៣០២- អញចង់យល់តេជក្រុងពា- លីថ្លុលនោះណា
នៅក្នុងគោហានោះហោង ។

២៣០៣- សុគ្រីពក្រាបបាទទូលស្នង អញ្ជើញស្ដេចហោង
តាមព្រះដំណោះប្រាថ្នា ។

២៣០៤- ព្រះអង្គតេរពង្សក្សត្រា ស្រេចស្ដេចវេលា
អនុជនូវទៀមរូសីហា ។

២៣០៥- ទៅលុះនាសពទូទី មហិម្បារូគិរី
រលើងរលំស្កឹមវៃស្ក ។

២៣០៦- ស្ដេចកោះកោទណ្ឌសរជ័យ សភាឫទ្ធិថ្លៃ
គឺអគ្គីវាសផ្លាញផ្លា ។

២៣០៧- ស្ដេចថ្លៃងរូបរាជមហិម្បា ជេះបាប់មហិមា
ក៏សុះជាជេះជុំយឆង ។

២៣០៨- ហើយព្រះយកតិរុណវាសធ្នូង ថ្លែងទៅលត់បង់
នាភ្លើងសរសក្ដិផ្លាញផ្លា ។

២៣០៩- ទើបព្រះនារាយរាមា យកពាយុវាសនា

បំពង់ព្រះអង្គទ្រង់វាត ។

២៣១០- ថ្លែងទៅប្រមូលអស់ជាតិ ឆ្ពោះទៅនាជាត
មហាសមុទ្រជលសា ។

២៣១១- មានុមាននូវសុគ្រីពភាជា យល់ថ្លែងចេស្តា -
នុភាពព្រះអង្គលើសក្រៃ ។

២៣១២- លុតជង្ឃ្យក្រាបបាទាទៃ នារាយរាមក្សត្រថ្លៃ
ប្រសើរពិសេសពិស្តារ ។

២៣១៣- ទូលថាបពិត្រភូវនាថ មានត្រីក្សសប្តតាល
កើតកាលដំណាលប្រជតី ។

២៣១៤- សូមព្រះតំរពង្សស្តេចលី - លាលងនូវឫទ្ធិ
អំណាចនៃសរសក្តិថ្លា ។

២៣១៥- ស្តេចស្តាប់សុគ្រីពទូលថា ចង់ដឹងចេស្តា -
ផិការព្រះអង្គក្សត្រថ្លៃ ។

២៣១៦- ទើបស្តេចបន្ទូលថាថៃ សុគ្រីពស្ពាននោះនៃ
តើនៅតំបន់ស្ពានណា ។

២៣១៧- ឃូរព្រះថ្លែងនាំមាគ៌ា យើងតំរក្សត្រា
នូវទៅលងតេជឫទ្ធិ ។

២៣១៨- ក្បិលានោះសុគ្រីពរាជក្របី លើកករអញ្ជលី
សម្តេចព្រះស្រីសារពេជ្ញ ។

២៣១៩- អញ្ជើញតំរព្រះអង្គស្តេច លេណាទៅតិច(1)
លេចថ្ងៃ នេះទៅយល់ហោង ។

២៣២០- នោះព្រះអនុជវៀមល្បួង ស្តេចត្រេចដោយបង
ដល់ថ្ងៃត្រីក្សពនាន្ធ ។

២៣២១- លុះដល់ស្ពានមហាសប្តតាល ដុះលើនាគពាល
ប៉ុំដូចចក្ររត្នភារាយ ។

២៣២២- ក្បិលានោះនារាយរាមឫទ្ធិសាយ ប្រុះព្រាព្រួព្រាយ
ប្រសើរនូវទិព្វញាណយល់ ។

២៣២៣- ជើងតាលដុះគីដោយកល(2) ទើបព្រះទសពល
ស្តេចឈ្វេងនូវព្រះប្រាជ្ញា ។

២៣២៤- ស្តេចថាសប្តតាលត្រីក្សា នេះសមដុះនា
លើខ្នងមហានាគរាជ ។

២៣២៥- ទើបស្តេចសំដែងព្រះអំណាច ឲ្យទេពអសូរខ្លាច
នូវឫទ្ធិតេជព្រះករ ។

២៣២៦- ស្តេចយាងព្រះបាទសុបវិរ ស្ពានជាន់ខ្ជាប់ឈរ

(1) RIB : dau ṭāc'
(2) RIB : ṭuḥ aṅgī kal'

សង្កត់កន្ទុយនាគា ។
២៣២៧- នាគស្ដើលភិតនឹងព្រះចេស្ដា ណាលួនអាត្មា
តាំងរូបសោតស្ងប់ស្ងៀមនៅ ។
២៣២៨- ដើមតាលណាជាស្នូរទៅ ទើបស្ដេចបីសំដៅ
ផ្លែងសរព្រហ្មាសមុតថ្លា [1] ។
២៣២៩- ត្រូវលេចសព្វតាលដ៏មហា- ព្រឹក្សធ្លាក់ផ្អិតជា
កំណាត់ៗខ្ចាត់ខ្ចាយ ។
២៣៣០- ពួសពុះឫទ្ធិសរសន្ធាភាយ ទាល់ព្រហ្មលោកឆាយ
រូបសែនរន្ធុះគណនា ។
២៣៣១- អស់ទេពយមព្រហ្មតិត្រា សឹងថ្វាយមាលា
ភ្ញីស្ពត់ជាសាធុការ ។
២៣៣២- រីនាគរាជពិសពាល ទុកព្រែកជាតាល
ទៅពួននាដ្ឋិតសាគរ ។
២៣៣៣- ក្សិណានោះសុគ្រីពរាជពានរ លុតលើកទសករ
បង្គំដាក់លើសិរសា ។
២៣៣៤- ទារធូលទូលបទធាតា ស្រែចទូលព្រះករុណា
នារាយនរិន្ទ្រឫទ្ធិត្រៃ ។
២៣៣៥- ទូលជាបពិត្រក្សត្រថ្លៃ ជាតស្នូរភពត្រៃ-
លោកលើសនូវឫទ្ធិចេស្ដា ។
២៣៣៦- ខ្ញុំយល់ធ្លាស់ស្ដែងនូវឫទ្ធា- នុភាពព្រះអង្គមហា-
ភិន្និកពន្លឺដ៏កន្លង ។
២៣៣៧- លើសវិលឯទេពអស្នូរផង អញ្ជើញស្ដេចយាង
ទៅនាខាស់ខិនបុរី ។
២៣៣៨- ស្ទូមស្ដេចផ្ទៃឯផ្កាញពាលី នូវសរនរបតី
ប្រសើរឫទ្ធីជាញជ័យ ។
២៣៣៩- ពេះពាលីធាញ់តេជវៃ លុះជន្មក្ស័យ
នូវសរស្ដេចភាជា ។
២៣៤០- ខ្ញុំនូវថ្វាយអស់ពលត្រីន្ទ្រា ជិតសិបអសង្ខេយ្យា
មហាអក្ខោភិនី ។
២៣៤១- ស្នងគុណព្រះបាទនរបតី ស្ដេចមានមេត្រី
ក៏ទ្រង់ព្រះរាជមុទិតា ។
២៣៤២- ពិសេសលើសក្សត្រនានា យោគព្រះអង្គជា
អំបូរនារាយពុទ្ធអង្គ ។
២៣៤៣- ឯងនោះព្រះដ៏ពីរពង្ស សម្ដេចស្ដេចទ្រង់
បីលុះនៃខាស់ខិនយោធ ។

(1) MBN : āriddhacand sar thlā

២៣៤៤. ព្រះប្រើសុគ្រីពទៅខ្លង　　　ហៅពាលីបង
ទទើរទួចឲ្យចិង ។

២៣៤៥. វៃឯបានពាលីឫទ្ធិរឹង　　　ចេញមកប្រយុទ្ធនឹង
សុគ្រីពកណ្ដាលទេវតា ។

២៣៤៦. បានព្រះនូវវេ្លងសារថ្លា　　　ខ្លួលផ្ដាច់ក្រុងពា-
លីលុះនូវសារព្រហ្មាស ។

២៣៤៧. សុគ្រីពថ្វាត់ថ្វាយអភិវាទ　　　បង្គំជំពិលាស
ក៏លាសស្ដេចយាត្រា ។

២៣៤៨. នោះទៅទាស់ទិនមហា-　　　នគរហៅក្រុងពា-
លីភាឯជ័ជាព្រះរៀម ។

២៣៤៩. ពីរព្រះបារិន្ទ្រភាឯឈរស្មៀម　　　ពោះសារសំរៀម
សំរេចសំភាស់ព្រះចេស្ដា ។

២៣៥០. ស្ដេចតឿនសុគ្រីពភពជា　　　ឲ្យហៅក្រុងពា-
លីលុះកណ្ដាលរណារង្គ ។

២៣៥១. សុគ្រីពបាបរទ្រើសទ្រប់　　　ការ់ចំនបីទ្រនប់
តន្ត្រំបាទាបីលលាម ។

២៣៥២. ឱពាលីភាឯជ័ព្រះរៀម　　　សុខសោយភាឯស្មៀម
តឡូវអញមកហៅណា ។

២៣៥៣. តីឯបរអញតិតគេសា　　　ស្ថិតនៅពានាផ្ទា
សំបាកនូវទុក្ខសព្វថ្ងៃ ។

២៣៥៤. ពីឯចេញមកយុទ្ធតៃង　　　វែងឯនឹងពិជ័យ
វិជ័យនៃយើងពីរហៅឯ ។

២៣៥៥. ពាលីស្ដាប់សពាទ(1) ឃ្លង　　　ក្រេវក្រោធកន្លង
រន្ធត់ញ័រនិភាវគ្គ ។

២៣៥៦. ករការ់ព្រះចំនជ័យថ្វាត់　　　វិលវៃបីគ្រវាត់
សព្វានូវ(2) ឫទ្ធិតេជះ ។

២៣៥៧. សត្វដំសត្វក្ដុកសត្វទះ　　　សត្វស្រែករូទ្ទះ
ប្រទះនូវចំនខាស់វែង ។

២៣៥៨. សត្វក្រែងត្រីភ្នំជាញ្ញដែង　　　នោះយាចាដែង
ក៏ធ្លាយកណ្ដាលទេវតា ។

២៣៥៩. គ្របិន្ទុភាឯតីរពានភា　　　ករការ់ព្រឹក្សា
គ្រវីគ្រវាសវាត់វាយ ។

២៣៦០. ដៃព្រព្រឹក្សបពិតផ្លាក់ផ្លាយ　　　ឫទ្ធិរឹងវាត់វាយ
ប្រវាយនូវព្រឹក្សផ្កាក់បែក ។

(1) RIB : stāp' sabd dāruṇ
(2) RIB : paṅhār nūv

២៣៦១. សត្វត្រេចត្រកុំស្រៀវស្រែក ខេវខឹងខាំបែក
ក្រចកក្រះចៅចាប់ចឹក ។
២៣៦២. បុកបែនបពាំតត្រៃព្រឹក្ស អឺអឹងដ៏អធិក
នូវឫទ្ធិរឹងព្រះសំផា ។
២៣៦៣. ក្របិន្ទុរាជក្រោធខ្ញូវ ឫទ្ធិរឹងអស្ចារ្យ
សំផាសំបើមនូវគ្នា ។
២៣៦៤. ក្រុងពាលីពេញនូវពាណ ដ៏ក្រៃលែងពា-
នរាអនុជទុរពាល ។
២៣៦៥. ហត់ហាហិចហោះហួសដល់ នារាយរាមស្ដេចយល់
ក្របិន្ទុបងលើសនូវពាណា ។
២៣៦៦. សុគ្រីពពាលីដ៏ខេង បហិយាប្រឹងប្រែង
សំផាពាំនោលនូវគ្នា ។
២៣៦៧. រូសីហាសោតសិំងមហិមា ឯណើមមេស្ដា
ពីដូចប្រយុទ្ធយប់ហោង[1] ។
២៣៦៨. ប្រកឹងប្រកោះ ទុមាររួំងស្ពោះ
សោតសឹងទ្រើសឃ្លង ប្រមុះប្រមេះ
ប្រយុទ្ធមួយជង ពាំនោលពាក្យលង
ពីថ្លែងទៅវឹង ។
២៣៦៩. ព្រះរាមរមិល ពានរពាំងពីរ
រូរាជសីហាសិដ្ឋ ឯករូបបេះបិត
ហិចហោះទៅវឹង ទើបព្រះរំពឹង
ពុំថ្លែងសរា ។
២៣៧០. សុគ្រីពធាញ់គេជជេស្ឋា រឹងលុតផាត
បង្គំសម្ដេចហរិវង្ស ។
២៣៧១. បពិត្រស្ដេចប្រើខ្ញុំត្រេចត្រង់ ខាត់ខិនបុរីរង់
ក៏ព្រះនូវថ្លែងព្រហ្មាស ។
២៣៧២. ឥឡូវខ្ញុំហោះទៅហាស ទៅដូចអភិកាស
សំដែងឯកណ្ដាលអម្ពរ ។
២៣៧៣. ម្ដេះព្រះអង្គពុំថ្លែងសរ ឥឡូវខ្ញុំថ្នាស់មារ
ក៏មកបង្គំនរបតី ។
២៣៧៤. ស្ដេចស្ដាប់សត្វរាជក្របី ធាញ់រាជពាលី
ក៏វិលសំណាក់អាត្មា ។
២៣៧៥. ស្ដេចជាពីរពានរា ពីរអង្គដូចថ្កា
កុមុទដ៏ពេញពីរស្មោះ ។

(1) RIB : prayuddh yuddh hoṅ

២៣៧៦. ដូចគជសារនូវគជស្មោះ    ដូចបតិតស្មោះ
ទាំងពីរទន្ទឹមនូវគ្នា ។
២៣៧៧. ទាំនោះដូចព្រះសុរិយា    ចាំងចែងទេវា
ទាំងពីរទន្ទឹមឥតសំគាល់ ។
២៣៧៨. ល្អល្អះស្រលះជ័រឆោល    ពណ៌ពលស្គល់ (1)
សំគាល់មិនមួយទាំងបាន ។
២៣៧៩. ស្ដួរឲ្យព្រះលក្ស្មណ៍ជ័យប្រធាន    វាន់មាណបាន
សំគាល់នូវទៀមអនុជា ។
២៣៨០. បានអញនូវថ្លៃងសរថ្លា    ព្រហ្មាសជ័យមហា-
វិជិតវិជ័យ ជ័យឫទ្ធិ ។
២៣៨១. ជីងនោះព្រះលក្ស្មនរបតី    ជាលដោះរូបខ្មី
ក៏វាន់មាណជ័យសុក្រីព ។
២៣៨២. ក្រាបថ្វាយបង្គំសូមពរជិត    ស្រេចហើយសុក្រីព
ក៏ហោះវិញថ្កានពាលី ។
២៣៨៣. ស្រៀវស្រែកកំលុងភត្រី    ថាឲ្យពាលី
បំពេញប្រយុទ្ធសង្គ្រាម ។
២៣៨៤. ពាលីក្រេវក្រោធជ័កំរាម    នេត្រក្រហលភក្ត្រជាម
ក្រញេវក្រញើញញសោះសា ។
២៣៨៥. ចាប់ព្រះខ័នរត្នជ័ក្រពា    ឈរឈានប្រឹងពា-
ហុករទាំងពីរខាស់ខែង ។
២៣៨៦. រូបរុងរួពេជ្រជ័កំពែង    ពណ៌ការស្ដែង (2)
អនេកអនន្តគណនា ។
២៣៨៧. ជីងនោះទេពីតារា    ទូលក្រាបអភិវាទ៍
បង្គំនៃក្រុងពានរ ។
២៣៨៨. បតិត្រកុំបីស្ដេចភ្លេចស្មរ    វីសុក្រីពនេះបង្អ (3)
បណ្ដាលនូវក្រោធានល ។
២៣៨៩. លេះចាញ់ហើយហោងអស់កល    ស្តីកអាំងកជល់
ទទែទទូចនូវប្រយុទ្ធ ។
២៣៩០. នេះយល់មនគឺកលហោង    សមមានដើក្ដង
នៃអ្នកជ័មានចេស្តា ។
២៣៩១. សូមស្ដេចទ្រង់ព្រះពិចារណា    កុំបីក្រេវក្រោធា
ដោយពាក្យអនុជនោះនៃ ។
២៣៩២. ឧបមាដូចភ្លើងនេះនៃព្រៃ    វិកណ្ដាបជិងក្ស័យ

(1) RIB : bal skār
(2) MBN : balā kāy staeṅ
(3) RIB : paṅ-ar

